Free



សារព័ត៌មាន ខ្មែរប៉ុស្ត៍ ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641

មាតិការឿង Issue 163 Oct 14th-27.th, 2014

# គណបក្សប្រជាជនកម្ពុជានៅឡូវែលជប់លៀងទទួល ឧត្តមសេនីយ ហ៊ុន ម៉ាណែត និងលោក អ៊ុច បូរិទ្ធ

**ដោយ : ខ្មែរផុសស.រ.អា.** លោក អ៊ុច បូរីទ្ធ រដ្ឋលេខាធិការក្រសួងការបរទេសកម្ពុជាអមដោយកូនប្រុសលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន គឺឧត្តមសេនីយឯក ហ៊ុន ម៉ាណែត បានមកធ្វើទស្សនកិច្ចនៅទីក្រុងឡូវែល ដើម្បីជួបជាមួយក្រុមមន្ត្រីសាលាក្រុងឡូវែលមុននឹងតំណាងសាលាក្រុងនេះចេញដំណើរទៅទីក្រុងភ្នំពេញនាដើមខែវិច្ឆិកាខាងមុខផងមកជួបជុំមន្ត្រីបំរើការក្រសួងការបរទេសទាំងអស់ផង និងជួបជុំសហគមន៍ខ្មែរនៅឡូវែលផង កាលពីថ្ងៃទី៤ តុលា ២០១៤។



លោកអភិបាលក្រុង រីគនី អេលៀត និងក្រុមប្រឹក្សាក្រុង ស្វាគមន៍ ដល់លោក ហ៊ុន ម៉ាណែត និងលោក អ៊ុច បូរិទ្ធ

ខ្មែរផុសស.រ.អាមិនបានទទួលការអនុញ្ញាតិឱ្យធ្វើបទសម្ភាសន៍ជាមួយភ្ញៀវកិត្តិយសរបស់ក្រុងឡូវែលទេ ដែលជាហេតុមិនមានព័តិមានស៊ីជម្រៅនឹងគ្មានការឃោសនាពីមន្ត្រីជាន់ខ្ពស់គណបក្សកាន់អំណាចជូនដល់លោកអ្នកអានពេលនេះបានក៏ប៉ុន្តែនាឱកាសជប់លៀងនារាត្រីថ្ងៃសៅរ៍ ទី៤ នៅភោជនីយដ្ឋានហុងកុងនៅចំពោះមុខភ្ញៀវប្រមាណ៣០០នាក់ ដែលប្រមានពាក់កណ្តាលអញ្ជើញមកពីរដ្ឋក្រៅផ្សេងៗលោក អ៊ុច បូរិទ្ធ ដែលជាឧប្បការីយូរឆ្នាំរបស់លោកនាយករដ្ឋមន្ត្រី



ភ្ញៀវក្នុងក្រុងនិងមកពីរដ្ឋផ្សេងៗស្តាប់សុន្ទរកថា ឧត្តមសេនីឯក ហ៊ុន ម៉ាណែត



អភិបាលក្រុងឡូវែលប្រគល់បការកិត្តិយស ដល់លោករដ្ឋលេខាធិការ អ៊ុច បូរិទ្ធ

ហ៊ុន សែន បានធ្វើសុន្ទរកថា បើកឆាកខ្លីមួយបន្ទាប់ពីកថា ស្វាគន៍ពីលោក អ៊ូ សុវណ្ណ អគ្គកុងស៊ុលកិត្តិយសខ្មែរក្រុងឡូវែលមកតែសុន្ទរកថា នយោ-បាយក្នុងស្រុកចំនួន៥៥នាទីបានត្រូវសម្តែងដោយឧត្តមសេនីយ ហ៊ុន ម៉ាណែត ទេវិញ ។ ភ្ញៀវទាំង២បានសម្តែងការភ្ញាក់ផ្អើល និងរីករាយចំពោះបដិសណ្ឋារកិច្ចដ៏ត្រចះត្រចង់រៀបចំកម្មវិធីពេញមួយថ្ងៃជាកិត្តិយសដោយលោកអគ្គកុងស៊ុលនឹងលោក តុលា យុទ្ធអ៊ុក នៅចំពោះមុខភ្ញៀវមន្ត្រីសាលាក្រុងឡូវែលតំណាងមន្ត្រីសាលាក្រុងលីនរដ្ឋម៉ាសាឈូសែតឯកអគ្គរាជទូតខ្មែរប្រចាំក្រុងវ៉ាស៊ីនតោនឯកអគ្គរាជទូតខ្មែរថ្មីប្រចាំអ.ស.ប. អគ្គកុងស៊ុលកិត្តិយសមកពីស៊ីអាថលអគ្គកុងស៊ុលកិត្តិយសមកពីឡុងប៊ីចពីតំបន់ឯទៀតៗ និងមានអ្នករួមដំណើរមកពីរដ្ឋឆ្ងាយជិតមានទាំងមកពីកាណាដាច្រើនរូបក៏ចូលរួមផងដែរ ។

ក្នុងសុន្ទរកថាឧត្តមសេនីយ ហ៊ុន ម៉ាណែត ដែលនិយាយច្រើនពីព្រឹត្តិការណ៍សង្គមនយោបាយ វប្បធម៌អន្តោប្រវេសន៍ទាក់ទងទៅនឹងនិរន្តភាពនៃនយោបាយបច្ចុប្បន្នមានលក្ខណជាច្រើនជាការឆ្លើយតបទៅនឹងការចោទប្រកាន់ចំពោះរដ្ឋាភិបាល តែមិនបាននិយាយពីការប្រែប្រួលនៃបរិយាកាសនយោបាយដែលលោកមានបំណងការពារមិនបាននិយាយពីភាពងាយស្រួល ឬដំលំបាកនៃឧត្តមសេនីយជាកូននាយករដ្ឋមន្ត្រី ហ៊ុន សែន ដ៏ល្បីល្បាញនឹងមិនបាននិយាយពីស្ថានភាពយោធាខ្មែរដែលជាតួរនាទីរបស់លោកហើយដែលសាធារណជនចង់ដឹងពីលោកនោះទេ ។



តំណាងសាលាក្រុងឡូវែលនឹងសាលាក្រុងលីនបានសម្តែងការកោតសរសើរដល់លោករដ្ឋលេខាធិការ អ៊ុច បូរីទ្ធ និងឧត្តមសេនីយ ហ៊ុន ម៉ាណែត ព្រមទាំងជូនវត្ថុអនុស្សាវរីយប្រចាំក្រុងដល់អ្នកទាំងពីរផង ។ ក្រុមតន្ត្រីពីងពាងខ្មៅបានសម្តែងកំដរពេញមួយយប់ដោយបទភ្លេងនឹងចំរៀងពីរោះចូលរួមដោយអ្នកចំរៀងល្បីឈ្មោះមកពីវៀស៊ីនាតែអ្នករាំដែលសំលៀងមាត់ទុកមិនបានឡើងរាំទេ ដោយឆាកជាប់រវល់ដោយការថតរូបអនុស្សាវរីយ៍ជាមួយនឹងកូនប្រុសច្បងលោកហ៊ុន សែន ដែលបាននិយាយថា ខ្ញុំចាស់ហើយតែរូបលោកនៅសង្ហារនៅឡើយ ៕



ឧត្តមសេនីឯក ហ៊ុន ម៉ាណែត ទទួលការកោតសរសើរពីតំណាងសាលាក្រុងលីន

# ពិធីបុណ្យចេញព្រះវស្សា និងបុណ្យកឋិន

**ដោយ : ថាច់ វណ្ណា**

បន្ទាប់ពីព្រះសង្ឃកាន់ព្រះវស្សាបាន៣ខែរួចមកប្រជាពុទ្ធបរិស័ទក៏បានប្រារព្ធធ្វើពិធីបុណ្យចេញព្រះវស្សានៅថ្ងៃទី១៥ ខែអស្សុជជា រៀងរាល់ឆ្នាំ ក្នុងរយៈពេល៣ខែកាន់ព្រះវស្សានេះព្រះសង្ឃអង្គណាដែលបានប្រកាន់ខ្ជាប់ខ្លួនមិនចេញទៅទីណាឆ្ងាយពីវត្តអារាម និងមានការតាំងសមាធិភាវនាចំរើនព្រះបរិត្តរៀងរាល់ថ្ងៃភិក្ខុសង្ឃនោះនឹងត្រូវបានកំណត់ថា ជាព្រះសង្ឃបរិសុទ្ធ ។

ហេតុដូច្នោះហើយ ទាយកទាយិកាទាំងឡាយណាដែលមានសទ្ធាជ្រះថ្លាធ្វើបុណ្យកឋិនទាន គេនឹងជ្រើសយកភិក្ខុសង្ឃបរិសុទ្ធដូចបានពណ៌នាខាងលើ ដើម្បីប្រគេនត្រៃចីវរ និងបច្ច័យ៤ចំពោះព្រះសង្ឃអង្គនោះ ការជ្រើសរើសបែបនេះ គេហៅថា ជ្រើសព្រះសង្ឃគ្រងកឋិន ។


វត្តសាមគ្គីសន្តិការាម


វត្តពន្លឺពុទ្ធចក្ក

បុណ្យកឋិននឹងត្រូវជ្រើសយក១ថ្ងៃក្នុងចំណោម២៨ថ្ងៃ គឺចាប់តាំងពីថ្ងៃ១រោចខែអស្សុជដល់ថ្ងៃ ១៥កើតខែកត្តិកជារៀងរាល់ឆ្នាំ ។ បុណ្យកឋិនទានជាទានដ៏ធំជាងទានឯទៀត ម្លោះហើយប្រះជាបរិស័ទណាដែលមានជីវភាពក្រីក្រមិនហ៊ានមានចិត្តប្រាថ្នា ចង់ធ្វើបុណ្យកឋិនឡើយ ព្រោះថាតាំងពីបុរាណមកទាយកទាយិកាដែលជាសាម៉ីដើមបុណ្យកឋិនទាន មាន៩០% ជាអ្នកមានទ្រព្យសម្បត្តិស្តុកស្តម្ភពុំនោះសោតក៏ជាឥស្សរជនមានឋានៈដ៏ខ្ពង់ខ្ពស់ ការចំណាយប្រាក់ធ្វើបុណ្យកឋិនដ៏ច្រើនហួសពីក្តីស្មានរបស់ពុទ្ធបរិស័ទទាំងពួង ។


វត្តបាលីលេយ្យ

នេះជាកត្តានាំឱ្យទាយកទាយិកាណាដែលមានទ្រព្យស្តួចស្តើងមានការរារែកក្នុងសទ្ធារបស់ខ្លួនឯង ។

ក្នុងទ្រឹស្តីនៃព្រះពុទ្ធសាសនាសំដែងអំពីការធ្វើទានមានច្រើនរាប់រយពាន់ក្នុងសីមា.កម្រមាននរណាអាចរាប់ទានបានគ្រប់ឡើយ , ប៉ុន្តែទានណាក៏ដោយក៏កើតមានពីសទ្ធាជ្រះថ្លារបស់ទាយកទាយិកា មិនមានទានណាត្រូវធ្វើដោយបង្ខំចិត្តនោះឡើយ ។

ចំណុចសំខាន់ក្នុងពិធីបុណ្យកឋិន គឺត្រៃចីវរ ១ត្រៃ ឬ២ត្រៃ និងបច្ច័យ៤ ព្រមទាំងផ្កាប្រាក់ ២ដើម រៀបចំដាក់ក្នុងអង្គកឋិន (រាងកឋិន)ដង្ហែយកទៅវត្តនៅមុនពេលចង្ហាន់ត្រង់និមន្តព្រះសង្ឃ ៤អង្គ ឬ២១អង្គឡើងគង់ហត្ថបាសចំរើនអានិសង្សកឋិនជាកិច្ចឆ្លងបុណ្យ ។

ពិធីធ្វើសង្ខេបបែបនេះ មិនជាបង់ខាតប៉ុន្មានទេ អ្នកដែលមានទ្រព្យបង្គួរក៏អាចនឹងធ្វើបានដែរ ។

ហេតុនេះសូមប្រជាមិត្តពុទ្ធបរិស័ទទាយកទាយិកា ទាំងអស់កុំបីមានចិត្តរារែកក្នុងការធ្វើបុណ្យកឋិនទាន ជាទានមានអានិសង្សដ៏ខ្ពង់ខ្ពស់ (សូមអញ្ជើញសិក្សាស្រាវជ្រាវអំពីអានិស្ស៥យ៉ាងរបស់បុណ្យកឋិនទានក្នុងត្រៃបិដកនៅតាម វត្តអារាម) ទាយកទាយិកា និងបានយល់ច្បាស់អំពីអានិសង្សនៃបុណ្យកឋិនទាន ។

**ដើមនិទានអំពីព្រះសង្ឃកាន់វស្សា និងបុណ្យកឋិន**

ក្នុងខណៈដែលព្រះសម្មាសម្ពុទ្ធបានត្រាសដឹងនៅក្នុងប្រទេសឥណ្ឌា.នៅក្នុងប្រទេសនេះមានរដូវភ្លៀងរលឹមហៅថា ម៉ុនស៊ុន "ព្រះអង្គបានយល់ឃើញថា ប្រជាកសិករកំពុងធ្វើស្រែចំការទូទាំងប្រទេស រីឯសាវ័ករបស់ព្រះអង្គក៏ចេញដើរគ្រប់ទិសទីអាចនឹងបណ្តាលឱ្យមានការខូចខាតសន្ទូងស្រូវនឹងសព្វសត្វដ៏ទៃទៀត ដោយអចេតនាហេតុដូច្នោះហើយព្រះង្គក៏ទ្រង់បញ្ញត្តិដល់ភិក្ខុ និងភិក្ខុនី សាមណេរ និងសាមណេរី ទាំងអស់ឱ្យឈប់សម្រាកក្នុងវត្តអារាម ឬលំនៅដ្ឋាន អាស្រមឱ្យប្រមូលគ្នាធ្វើកិច្ចសមាធិ ចំរើនភាវនាក្នុងវត្តរយៈពេល៣ខែ ។

ហេតុនេះទើបមានទម្លាប់កាន់ព្រះវស្សារហូតមក ។ ក្នុងពេលនោះមានភិក្ខុសាវ័កចំនួន ៣០អង្គដែលមានលំនៅដ្ឋានក្នុងព្រៃហិមពាន្តបាននាំគ្នាធ្វើដំណើរ **តទៅទំព័រទី ០៥**

## តមកពីទំព័រទី ០៤ ពិធីបុណ្យចេញព្រះវស្សា និងបុណ្យកឋិន

កាត់ព្រៃហិមពាន្ត ដើម្បីទៅសុំគាល់ព្រះអង្គយកវត្តប្រតិបត្តិមុនពេលចូលព្រះវស្សា ព្រោះហេតុនោះសព្វថ្ងៃមុនពេលចូលព្រះវស្សាព្រះសង្ឃតែងតែនិមន្តទៅសុំយកវត្តប្រតិបត្តិអំពីព្រះគ្រូឧបជ្ឈាយ៍រួចហើយ ទើបវិលមកកាន់វស្សានៅទីអារាមរបស់ខ្លួនវិញ ។

ពេលដែលភិក្ខុសាវកទាំង៣០អង្គកំពុងធ្វើដំណើរដេូវភ្លៀងម៉ុនស៊ុនក៏បានធ្លាក់មកធ្វើឱ្យមានការខកខានក្នុងការធ្វើដំណើរនិមន្តទៅគាល់ព្រះពុទ្ធឱ្យបានទាន់ពេលមុនចូលវស្សា ភិក្ខុទាំងនោះក៏បាននាំគ្នារកទីជម្រកជាមួយគ្នាដើម្បីធ្វើការសមាធិ និងកាន់ព្រះវស្សាជាមួយគ្នាក្នុងព្រៃនោះ រហូតអស់រយៈពេល៣ខែ ដុតពេលកំណត់កាន់ព្រះវស្សាដោយអាស្រ័យផ្លូវដើពោរពេញទៅដោយភក់ល្បាប់ មេឃខ្មៅខ្វលខ្មាញ់ពាសពេញនភាល័យភ្លៀងរលឹមស្រិច១ ស្រោចស្រប


វត្តបាលិលេយ្យ

លើព្រៃប្រឹក្សា ភិក្ខុសង្ឃនាំគ្នាធ្វើដំណើរដោយឥតឈប់ ដើម្បីទៅគាល់ព្រះពុទ្ធ ពេលដែលនិមន្តទៅដល់ ត្រៃចីវរត្រូវប្រឡាក់ភក់នឹងទទឹកជោកអស់ ភិក្ខុទាំងនោះនាំគ្នាអង្គុយឆ្ងាយពីព្រះភក្ត្រព្រះពុទ្ធ ដោយមានការខ្មាស់អៀន ព្រោះស្បង់ចីវរត្រូវប្រឡាក់ភក់ និងទទឹកជោកអស់យ៉ាងនេះ ។

ប៉ុន្តែព្រះពុទ្ធបានទទួលភិក្ខុសង្ឃទាំងនោះយ៉ាងកក់ក្ដៅ ព្រះអង្គបានសាកសួរអំពីពិធីកាន់ព្រះវស្សារួមជាមួយគ្នា តើមានខ្វែងគំនិតគ្នា ឬទេ? ម្ហូបអាហារគ្រប់គ្រាន់ដែរ ឬទេ? ភិក្ខុទាំងនោះបានឆ្លើយថា បពិតព្រះដ៏មានភាគ ម្ហូបចំណី បានគ្រប់គ្រាន់បរិបូរណ៍ហើយ ។

**បញ្ហាបន្ទាប់មកនឹងទាក់ទិនដល់បញ្ហាត្រៃចីវរ ។**

យោងទៅតាមព្រះវិន័យ ព្រះសង្ឃមិនអាចទៅទិញ ឬជាវត្រៃចីវរ ឬខ្ចីពីសំណាក់ព្រះសង្ឃអង្គណាបានឡើយ ឬមួយទៅសុំបុណ្ណបាតត្រៃចីវរពីសំណាក់បរិស័ទណាក៏ដោយ រឿងទាំងនោះនឹងបានហាមប្រាមជាដាច់ខាត ។

ស្បង់ និងចីវរ ត្រូវយកក្រណាត់ "បរិសុទ្ធ" គឺក្រណាត់ដែលមិនទាន់មានរណាប្រើប្រាស់ ម្លោះហើយភិក្ខុសង្ឃទាំងឡាយនាំគ្នារុករកក្រណាត់ក្នុងគំនរសំរាមដែលមានចម្រៀកតូចៗគេបោះចោល, មានក្រណាត់ខ្លះប្រឡាក់ដោយលោហិតខ្លះទៀត ក៏យកក្រណាត់ដែលគេរុំសាកសពមុនពេលបូជាក្នុងឈាបនដ្ឋានក្រណាត់ទាំងនោះ យកទៅស្ងោរជាមួយសំបកឈើ ឬខ្លឹមឈើស្បែងដែលមានពណ៌លឿង រួចភិក្ខុក៏នាំគ្នាដេរ ផ្គុំជាចីវរ សំរាប់ខ្លួន ។

ការលំបាករបស់បុព្វជិតពេលនោះ ដោយមិនមានការអនុញ្ញាតិឱ្យមានត្រៃចីវរសំរាប់ប្តូរផ្លាស់នោះឡើយ ។ គឺអនុញ្ញាតិឱ្យមានតែចីវរ១ និងហង្សរាក់១ ព្រមទាំងស្បង់១ និងវត្តពន្ធ១ ប៉ុណ្ណោះឯង ភិក្ខុទាំង៣០អង្គត្រូវប្រើប្រាស់ចីវរដែលប្រឡាក់ភក់ និងដុះផ្សិត រយៈពេលយ៉ាងយូរ ទើបអាចនឹងរកក្រណាត់ពីគំនរសំរាម ឬក្រណាត់រុំសពបានមកធ្វើជាត្រៃចីវរ ។

ពេលព្រះសម្ពុទ្ធទ្រង់ញាណយល់ដល់ការលំបាករបស់បុព្វជិតដែលមានលំនៅក្នុងព្រៃរួចហើយ

**តទៅទំព័រទី ២១**

# សេវាបកប្រែភាសានៃសមាគមខ្មែរឈ្នះប្រាក់រង្វាន់៥០០០ដុល្លារពីកម្មវិធីសហគ្រិនភាព

**ទីក្រុងឡូវែល** : កាលពីថ្ងៃទី៩ ខែកញ្ញា ឆ្នាំ២០១៤ លោក មួង ណារ៉េត សេវាបកប្រែភាសារបស់សមាគមខ្មែរបានឈ្នះរង្វាន់៥០០០ដុល្លារពីកម្មវិធីសហគ្រិនភាព Entrepreneur ship for All) ។

លោក ណារ៉េត បានចូលរួមកម្មវិធី Afor All Summer Accelerator ដែលមានរយៈពេល១២សប្តាហ៍ ។ កម្មវិធីនេះ បង្កើតឡើង ដើម្បីជួយអ្នកដែលចង់បើកមុខរបរថ្មី ឬបើកអង្គការមិនរកប្រាក់កម្រៃដោយត្រូវឆ្លងកាត់វគ្គសិក្ខាសាលាជាច្រើន និងទទួលការផ្តល់ប្រឹក្សាយោបល់ និងណែនាំផ្ទាល់ពីអ្នកជំនាញផ្នែកជំនួញ ។ ជាចុងក្រោយអ្នកចូលរួមអាចឈ្នះរង្វាន់ជាប្រាក់ពីកញ្ចប់ប្រាក់រង្វាន់សរុប៣ម៉ឺនដុល្លារ ។

ក្នុងវគ្គសិក្សានោះ លោក ណារ៉េត បានរកឃើញឧបសគ្គចម្បងមួយដែលរារាំងក្រុមហ៊ុនអង្គការ និងអ្នកផ្តល់សេវាផ្សេងៗ ក្នុងការទាក់ទងគ្នាជាមួយសហគមខ្មែរ ។ របាំងដែលរារាំងមិនឱ្យទាក់ទងគ្នាបាននោះ គឺបញ្ហាភាសា និងវប្បធម៌ ។ គួររំលឹកថាទីក្រុងឡូវែលមានពលរដ្ឋខ្មែររស់នៅជាង៣ម៉ឺននាក់ស្មើនឹង១ភាគ៣នៃចំនួនប្រជាពលរដ្ឋទាំងអស់ដែលរស់នៅក្នុងទីក្រុងឡូវែល ។

លោក ដេវីដ ផាកឃើ នាយកកម្មវិធី EforAll មានប្រសាសន៍ថា "យើងរីករាយខ្លាំងណាស់ ដែលបានទទួលលោក ណារ៉េត និងសហគមន៍ខ្មែរឱ្យចូលរួមក្នុងវគ្គ២០១៤ EforAll Summer Accelerator ។ លោក ណារ៉េត និងសហគមន៍ខ្មែរពិតជាទទួលបានអត្ថប្រយោជន៍ និងចំណេះដឹងជាច្រើនពីកម្មវិធីរបស់យើង រួមទាំងចំណេះផ្នែកជំនួញ ជំនាញ ផ្នែកទាក់ទង និងទទួលបានប្រាក់រង្វាន់៥០០០ដុល្លារផងដែរ ។ យើងខ្ញុំនៅតែបន្តជួយលោក ណារ៉េត និងសហគមន៍ខ្មែរ ដើម្បីជួយឱ្យសេវាបកប្រែភាសារបស់សហគមន៍ខ្មែរទទួលបានជោគជ័យកាន់តែខ្លាំង ។

លោក ណារ៉េត មានបទពិសោធន៍ក្នុងវិស័យបកប្រែភាសា ។ ចាប់ពីខែសីហា ឆ្នាំ២០០៧ ដល់ខែ កុម្ភៈ ឆ្នាំ២០១៤ គាត់ជាមន្ត្រីជាន់ខ្ពស់ផ្នែកបកប្រែភាសាផ្ទាល់មាត់នៅសាលាក្តីខ្មែរក្រហមនៅប្រទេសកម្ពុជា ។



2014 Summer EforAll Winner - Nareth Muong

នៅទីនោះ គាត់បានបកប្រែផ្ទាល់មាត់ពីភាសាខ្មែរទៅជាភាសាអង់គ្លេសក្នុងពេលធ្វើសវនាការកាត់ក្តីអតីតមេដឹកនាំខ្មែរក្រហម ។ នៅសហរដ្ឋអាមេរិកគាត់ជាអ្នកបកប្រែដែលមានការទទួលស្គាល់ផ្នែកសុខាភិបាល ។

ឥឡូវនេះ សមាគមខ្មែរបើកបំរើសេវាបកប្រែភាសា ដើម្បីដករបាំងផ្នែកភាសាក្នុងការប្រាស្រ័យទាក់ទងគ្នា ។ សេវាបកប្រែភាសានេះ ផ្តល់ជូនតាមលក្ខណៈស្តង់ដារ និងអាជីពច្បាស់លាស់ដោយធានាគុណភាពល្អ គួរឱ្យជឿទុកចិត្តបំផុត ។

លោក ណារ៉េត សូមអំពាវនាវដល់បណ្តាក្រុមហ៊ុនអង្គការ និងអ្នកផ្តល់សេវាផ្សេងៗឱ្យជួយគាំទ្រសេវាបកប្រែភាសារបស់សមាគមខ្មែរ ។ លោកមានប្រសាសន៍ថា "បើលោកអ្នកប្រើសេវាបកប្រែរបស់សមាគមខ្មែរលោកអ្នកមិនត្រឹមតែទទួលបានគុណភាពបកប្រែល្អបំផុតប៉ុណ្ណោះទេ ប៉ុន្តែលោកអ្នកថែមទាំងបានគាំទ្រដល់អង្គការ សហគមន៍ ដែលមិនរកប្រាក់កម្រៃមួយនេះផងដែរ ។ សេវាបកប្រែភាសានេះនឹងជួយប្រជាពលរដ្ឋខ្មែរឱ្យទទួលបានសេវាផ្សេងៗ និងបង្កើតឱកាសការងារ ៕

**ខ្មែរប៉ុស្តស.រ.អា**

# CMAA TRANSLATION SERVICES Wins $5,000 at Entrepreneurship for All (EforAll) Awards Event

**Lowell:** On September 9th, Nareth Muong of Cambodian Mutual Assistance Association (CMAA) won $5,000 from Entrepreneurship for All (formerly known as the Merrimack Valley Sandbox) at their 2014 Accelerator Awards Event.

Nareth took part in the 2014 EforAll Summer Accelerator, a twelve-week program that helps people launch their own businesses or non-profit organizations through workshops, personal mentors, and a $30K prize pool.

During the program Nareth identified the language and cultural barriers that prevented the service providers, companies and organizations from reaching out to Cambodian community which makes 1/3 of the population of Lowell.

"It was great having Nareth and the Cambodian Mutual Assistance Association take part in the 2014 Efor All Summer Accelerator," said David Parker, the Executive Director for Efor All. "Nareth and the CMAA took full advantage of the business knowledge, connections, and $5,000 prize money they received from the accelerator and we look forward to helping them grow their much needed translation services."

Nareth had worked at the Cambodia Khmer Rouge Tribunal as a Senior Court Interpreter prior to coming to live in the State **Continued to page 07**

# វិស្សមកាលចុងរដូវក្តៅ នៅរ៉ូដអាឡិន "ភាគ៣"

**ដោយ : ពិន សំខុន**

បញ្ចប់ពីទស្សនាសួនសត្វនៅប្រូវីដិនស្លែក ឡើងថ្ងៃទី២៩សីហា ២០១៤ យើងបន្តដំណើរទៅខាងឆ្នេរសមុទ្រ "អាត់ឡង់ទិក" ម្តុងតំបន់ដែលសម្បូរដោយរមនីយដ្ឋានដំត្រកាលកាពារនឹងថៃទាំជាឧទ្យាន ឬសំណង់ប្រវត្តិសាស្ត្រ សម្រាប់ជាការរៀនសូត្រដល់ប្រជាជាតិនឹងទេសចរណ៍គ្រប់ជំនាន់ផង ។

ដំណើររបស់យើងទៅចំថ្ងៃឈប់បុណ្យកាងារដែលមិនត្រឹមតែជាឱកាសវិស្សមកាលទេ តែជារដូវក្តៅផងថ្ងៃឈប់សម្រាក៣ថ្ងៃចុងក្រោយផងមុននឹងសិស្សានុសិស្សត្រឡប់ចូលរៀនវិញ ដូច្នេះមនុស្សម្នាតាមផ្លូវស្លេកស្លុះស្លះចរាចរស៊ើរគ្រប់កន្លែង ។យើងបានរកកក់កន្លែងសម្រាក១សប្តាហ៍មុនពេលចេញដំណើរនៅសណ្ឋាគារតាម **តទៅទំព័រទី ១៩**



# លោក រ៉ាឌី ម៉ម ទទួលការគាំទ្រសំខាន់ៗថ្មីទៀត



ក្នុងឱកាសជិតដល់ទិវាពាណិជ្ជកម្មខ្នាតតូច មន្ត្រីធំៗនៅឡូវែលបានជួបជុំគ្នានៅភោជនីយដ្ឋានភ្នំពេញ លោកស្រី អេលីន ដណាយូ ជាតំណាងព្រឹទ្ធសភារដ្ឋម៉ាសាឈូសេតបានណែនាំលោកអភិបាលរដ្ឋ ផាទ្រីក ឌូវ៉ល ចូលរួមដោយលោកស្រី នីគី សុងហ្គាស សមាជិកព្រឹទ្ធសភាសហរដ្ឋអាមេរិក លោក ធំ ហ្គោលឌិន ជាតំណាងរដ្ឋ និងអភិបាលក្រុងឡូវែលអ្នកទាំងអស់មានបំណងជួបនឹងពាណិជ្ជករក្រុងខ្មែរ នាឱកាសពាណិជ្ជកម្មខ្នាតតូចនោះ ក្នុងពេលជាមួយគ្នានោះ ជាពិសេសចូលរួមអបអរសាទរនឹងពិធីជប់លៀងរៀបចំដោយ រ៉ាឌី ម៉ម បេក្ខជនតំណាងរដ្ឋសង្កាត់លេខ១៨ ហើយសម្តែងការគាំទ្រដល់បេក្ខជនរូបនេះទាំងអស់គ្នា សម្រាប់ការបោះឆ្នោតនៅថ្ងៃទី០៤ ខែវិច្ឆិកា ខាងមុខ មុននឹងនាំគ្នាទៅជួបពាណិជ្ជករខ្មែរដ៏ច្រើនដែលរស់ផ្តុំគ្នានៅទីនោះ ៕

**Continued from page 06**

## CMAA TRANSLATION SERVICES

early this year. He has earned a Medical Interpreter Certification in Lowell, Massahusetts.

CMAA hopes its newly launched Translation Services will help to bridge language and cultural barriers between the Cambodian community and the service providers in Greater Lowell.

Nareth shared with KhmerPost USA "I am very proud to represent CMAA and won the prize. The $5,000 grant will help us upgrade CMAA translation services website, design flyer, and launch the outreach campaign to increase the awareness about our new services" It is also Nareth hope that this will help the community have better access to services and increase the job opportunities.

# Review of "Year Zero"
# បានទៅទស្សនារឿង"ឆ្នាំសូន្យ"

**ដោយ : វីកនីតហាវ**

នេះខ្ញុំបានតៅទស្សនារឿង"ឆ្នាំសូន្យ" នៅរោងល្ខោនមើរីម៉ាករីផើថ៉ររឿននិពន្ធដោយម៉ាយកឹលគុលុមកូ ។ រៀបចំតំឡើងនៅឡុងប៊ីច កាលពីឆ្នាំ ២០០៣ ឆ្នាំសូន្យក៏និទានរឿងរបស់ វុឌ្ឍីនឹងរ៉ា យុវវ័យជាបងប្អូន២នាក់ដែលមានឪពុកម្តាយបានគេចចេញរួចពីរបបខ្មែរក្រហម ។ ឪពុកអ្នកទាំង២បានស្លាប់ប៉ុន្មានឆ្នាំមុន នៅសល់ម្តាយដែលលក់ដូរទំនិញក្នុងភូមិក៏ទើបតែនឹងស្លាប់លាលោកទៅទៀត ។ នាងរ៉ាបានទៅរៀននៅមហាវិទ្យាល័យនៅតំបន់ឆ្ងាយមួយនៃកាលីហ្វ័រញ៉ាហើយរស់នៅជាមួយប្រុសកំណាន់របស់នាងឈ្មោះគ្លេនដែលជាកូនប្រុសរបស់គ្រួសារចៅចិនអ្នកមានម្នាក់ ក៏កំពុងរៀនយកថ្នាក់វេជ្ជបណ្ឌិត ។ ថ្ងៃមួយពេលរ៉ាមកផ្ទះហើយកំពុងសំអាតផ្ទះរបស់ខ្លួននាងបានគិតរៀបចំឱ្យ វុឌ្ឍី បានទៅនៅផ្ទះជាមួយគ្រួសារមិត្តម្នាក់ រហូតដល់បានរៀនចប់វិទ្យាល័យ ។ ពេលកំពុងនៅផ្ទះនោះនាង រ៉ា បានទាក់ទងទៅហាន់មិត្តប្រុសកាលពីនៅរៀនវិទ្យាល័យដែលទើបចេញពីគុកបន្ទាប់ពីទទួលទោសចប់ពីបទ

**តទៅទំព័រទី ២៧**

**By Richard P. Howe Jr.**

Recently I went to the Merrimack Repertory Theatre to see "Year Zero", a play by Michael Golamco. Set in Long Beach in 2003, Year Zero is the story of Vuthy and Ra, two teenagers whose parents escaped from the Khmer Rouge. Their father died several years earlier and their mother who ran a small neighborhood store just died. Ra is in college in another part of California where she lives with her boyfriend, Glenn, who is the son of a wealthy Chinese family and who is studying to be a doctor. Ra has come home to clean out the house. She has arranged for Vuthy to live with a family friend until he graduates from high school. While she is home, Ra connects with Han, her boyfriend from high school who was just released from prison after serving a sentence for crimes he committed **Continued to page 27**

# រឿងវត្តអារាមនៅឡូវែលដល់ណាហើយ?



ពិន សំខុន

**បទវិភាគសង្គមដោយ : ពិន សំខុន**

បន្ទាប់ពីឱកាសបុណ្យធំប្រចាំឆ្នាំនៃពិធីភ្ជុំបិណ្ឌសហគមន៍ពុទ្ធបរិស័ទខ្មែរ នាខែកញ្ញានេះមកយើងគួរងាកមកស្វែងយល់ជាថ្មីម្តងទៀតនូវស្ថានភាពនៃវត្តអារាមខ្មែរតើមានការផ្លាស់ប្តូរដល់ណាហើយ? តើសហគមន៍ខ្មែរមានដឹងទេថា ខ្លួនកំពុងមានវិបត្តិថ្នាក់ដឹកនាំកាន់តែធ្ងន់ធ្ងរទៅហើយដោយសារតែការបែកបាក់គ្នាមិនចេះចប់នោះ? តើស្ថានភាពថ្មីដែលបានកើតឡើង តើបានជាជំនួយដល់ការពិចារណារកដំណោះស្រាយត្រឹមត្រូវផ្សះផ្សាជា នាគ្នាបាន ឬទេ?

**ស្ថានភាពថ្មីនៅវត្តត្រៃរតនារាម**

បន្ទាប់ពីមានសាលាបុណ្យបានត្រូវបិទព្រះសង្ឃវត្តលើបានត្រូវគង់យ៉ាងស្ងៀមស្ងាត់នៅកុដិក្បែរសាលាដែលមិនបានរងគ្រោះដោយការបិទដូចសាលាបុណ្យនោះទេ។ រីឯព្រះសង្ឃវត្តក្រោមក៏ពុំបានទទួលការនិមន្តឱ្យទៅគង់រួមគ្នាជាកិច្ចសង្គ្រោះជាបច្ច័យរួបរួមគ្នានាគ្រាអាសន្នទេ ព្រះសង្ឃទាំងអស់នៃវត្តក្រោមបានទៅជ្រកនៅផ្ទះជួលមួយអស់រយពេល...ខែមុននឹងគណកម្មការវត្តក្រោមសម្រេចទិញអាគារតូចល្មមមួយនៅ"ធិងប៊ូរ៉ូ"ប្រគេនព្រះសង្ឃឱ្យគង់ដាច់ពីកង្វល់ទំនាស់វត្តលើវត្តក្រោម ពីព្រោះមិនដឹងថា សាលាបុណ្យនោះនឹងបើកឡើងវិញបាន ឬក៏មិនបាននោះទេ។ ឆ្នាំនេះបើយោងតាមបរិយាកាសធ្វើបុណ្យនៅកន្លែងឆ្ងាយពីអ្នកឈ្លោះគ្នាភាពរីករាយនឹងជ្រះថ្លាប្រាកដជាកើតមានច្រើនជាងពេលមុនៗជាពិសេសរំដោះចេញពីការមិនមានជាប់ឈ្លោះនឹងវត្តដែលដាបដោយការប្តឹងប្តល់គ្នាជាង១០ឆ្នាំមកហើយនោះទៀតទេ។ ចំណែកឯវត្តត្រៃរតនារាមខាងលើវិញថ្វីត្បិតតែបរិយាកាសបានប្រសើរដោយមិនមានការប្រទាញប្រទង់ដូចពេលមានវត្តជាប់គ្នានឹងវត្តក្រោមមែនតែសាលាបុណ្យធំបិទចោលនៅជ្រងោនាក្បែរនោះធ្វើឱ្យអ្នកមកធ្វើបុណ្យខកចិត្តដោយធ្វើបុណ្យមិនបានពេញមុខនឹងគេសោះថែមពីនេះទៀតដែលហៅថាគណកម្មការវត្តត្រៃរតនារាមស្របច្បាប់នោះមានជាងពាក់កណ្តាលជាគណកម្មការវត្តក្រោមដែលមានសិទ្ធគ្រប់គ្រងនៅវត្តខាងលើដែរនៅឡើយ។

តើអ្នកគ្រប់គ្រងវត្តលើធ្វើយ៉ាងណាឱ្យបានឯករាជ្យពេញលេញពីគណកម្មការវត្តក្រោម? តើធ្វើយ៉ាងណាឱ្យអាចបើកសាលាបុណ្យមកប្រើប្រាស់វិញបាន? ចម្លើយមានតែមួយគឺគណកម្មការស្របច្បាប់ទាំងលើទាំងក្រោមស្រុះស្រួលគ្នាធ្វើសេចក្តីសម្រេចរួមគ្នាឱ្យបានភាពឯករាជ្យនឹងកើតមានឡើងតែមិនច្បាស់ថា ភាពត្រឹមត្រូវនឹងកើតឡើងជាមួយនោះទេ ពីព្រោះករណីចុងក្រោយនេះតម្រូវអោយមានភាពបរិសុទ្ធ។

ភាពស្រុះស្រួលគ្នាបង្កើតបានតែជាសន្តិភាពបណ្តោះអាសន្នប៉ុណ្ណោះតែបើមានភាពបរិសុទ្ធថែមទៀតផងនោះនឹងបង្កើតសន្តិភាពបានយូរអង្វែង។



មាយ៉ា : ឯងថា ឱ្យអ្នកណា?
បាតុករ : អញថាឱ្យអាលោកដេកជាមួយស្រី! ឯងមានខ្លួន មានតែឯងធ្លាប់ដេកជាមួយលោកនោះ!



ប៉ូលិសដេញឱ្យត្រ...ប់ទៅកន្លែងដើមវិញ

**វត្តពន្លឺពុទ្ធចក្រ**

តាមការសង្កេតលើអារម្មណ៍ប្រជាពលរដ្ឋដែលមកធ្វើបុណ្យហើយជឿថាបានបុណ្យ :

បុណ្យទី១វត្តពន្លឺពុទ្ធចក្រគឺជាកន្លែងដែលពុទ្ធសាសនិកបានទទួលនូវអារម្មណ៍ស្ងប់ពីភាពបរិសុទ្ធនៃព្រះសង្ឃរួមគ្នានឹងគ្មានជម្លោះដណ្តើមឥទ្ធិពលនៃគណកម្មការវត្ត។ មានការរៀបចំពិធីបុណ្យសមរម្យមនុស្សម្នាជាច្រើនមកធ្វើបុណ្យជាបន្ថែមទីនោះ ពីព្រោះតែចង់គេចពីវត្តផ្សេងៗដែលកំពុងមានវិបត្តិ។

បុណ្យទី២វត្តពន្លឺពុទ្ធចក្រក៏សាងស្មារតីប្រុងប្រយ័ត្នចំពោះកេរ្តិ៍ឈ្មោះជាវត្តប្រពៃទាំងស្ថាប័នព្រះសង្ឃក៏ដូចជាគណកម្មការអាចារ្យវត្តនឹងបរិស័ទជើងវត្តបន្ថែមពីនោះទៀតវិន័យក្នុងវត្តមានការគោរពគ្នាទៅវិញទៅមកមិនមានស្ថាប័នណាមួយបំពានមួយទៀតដោយគ្មានតម្លាភាពនឹងភាពបណ្តែតបណ្តោយបានឡើយ។ យន្តការគោរពវិន័យនឹងគោរពគ្នាទៅវិញទៅមករវាងស្ថាប័ននេះជាយន្តការទំនើបដែលគេប្រើប្រាស់ក្នុងប្រទេសប្រជាធិបតេយ្យធ្វើនយោបាយចូលរួមសម្បាច់បានសុខនឹងស្ថេរភាពយឺនយូរបាន។

បុណ្យទី៣ឱវាទទាំងឡាយណាដែលចេញពីបុគ្គលបរិសុទ្ធដោយកាយវាចានឹងចិត្តមានបរិស័ទទទួលយកនឹងធ្វើតាមឱវាទនោះបានកុសលផលបុណ្យនឹងកើតនៅពេលនោះដោយពុំចាំបាច់ចារឈ្មោះលើចម្លាក់ភ្ជាប់ជាមួយរូបព្រះពុទ្ធនោះឡើយ ។ នៅមានវត្តឡូវែលខ្លះមិនបរិសុទ្ធដឹកនាំដោយបុគ្គលដែលសំគាល់ថាជាព្រះសង្ឃតែនៅមានពុទ្ធសានិកមួយចំនួនតាមចង់បានកុសលផលបុណ្យពីបុគ្គលនោះនៅឡើយនេះជាទង្វើអ្នកចង់បានបុណ្យ ឬបានកិត្តិយសឆាប់ភ្លេចគិតថា ជាមួយគ្នានេះមានមូលដ្ឋាននៃភាពបរិសុទ្ធក្នុងវាចានឹងចិត្តថែមពីលើពណ៌លឿងនៃស្បង់ទៀតខ្វះភាពបរិសុទ្ធកុសលផលបុណ្យមិនកើតឡើងទេ ។



សង្ឃ : "អញមានដេកជាមួយនាងឯងឯណា?"

អ្នកខ្លះនិយាយថា ខ្លួនអ្នកធ្វើបុណ្យមិនមានខុសអ្វីទេ បើលោកសង្ឃខូចបាបតែលោកម្នាក់ប៉ុណ្ណោះ ប៉ុន្តែមិនត្រឹមតែធមិទេ សូម្បីតែច្បាប់ក៏និយាយដែរថាអ្នកសមគំនិតខូចគឺខុសដូចគ្នា ។ ដូច្នេះថ្នាក់ដឹកនាំសហគមន៍ខ្មែរគួរណែនាំឱ្យពលរដ្ឋខ្លួនឱ្យចេះសំគាល់ត្រូវនឹងខុសបុណ្យនឹងបាបបើខ្លួនមានបំណងជួយពលរដ្ឋខ្មែរឱ្យបានចម្រុងចម្រើនពិតមែននោះ។

តទៅទំព័រទី ១៥

# មន្ទីរច្នៃប្រឌិត


Richard Howe

**រាយការណ៍ដោយ :** Richard P. Hower Jr.
**បកស្រាយដោយ : ថាច់ វណ្ណា**

សារមន្ទីរ "Smith Sonain institution" ស្ថាប័នស្មិតស៊ូនៀន, ជាក្រុម១ស្ថិតនៅមជ្ឈមណ្ឌលស្រាវជ្រាវ និងសារមន្ទីរដែលរដ្ឋាភិបាលស.រ.អាឱ្យមានដំណើរការឡើង ។

មជ្ឈមណ្ឌលស៊ីម៉ែវសឹន"Leneson"សំរាប់សិក្សាវិធីសាស្រ្តច្នៃប្រឌិត និងរៀបរៀងជាថ្មីឡើងវិញនោះ ក៏ជាចំណែកមួយនៃមន្ទីរស្មិតស៊ូនៀនដែរ ។ ក្នុងចំណោម៦ទីក្រុងក្នុងស.រ.អាធ្វើឱ្យមានលក្ខណៈថ្មីនៃការតាំងពិពណ៌ច្នៃប្រឌិតក្នុងស.រ.អា ពិធីតាំងពិពណ៌នេះ និងបានធ្វើនូវថ្ងៃទី៤ ខែកក្កដា ឆ្នាំ២០១៥ ខាងមុខនេះ នៅមន្ទីរស្មិតស៊ូនៀនសារមន្ទីរប្រវត្តិសាស្រ្តជាតិអាមេរិកាំងនៅវ៉ស៊ីងតឹន ឌីស៊ី Washionton DC ។

ទីក្រុងឡូវែលបានផ្តល់វិភាគទានចូលរួមក្នុងពិធីតាំងពិពណ៌នោះដោយមានកាសែតវីដេអូខ្លីៗចំនួន៤កាសែត ដោយផ្សារភ្ជាប់ជាមួយលក្ខណៈច្នៃប្រឌិតក្នុងក្រុងឡូវែលក្នុងរូបភាពរបស់កាសែតមិនបានបញ្ចាំងឱ្យឃើញនៅគ្រឿងយន្តនៅឯកជនណាមួយដែលបានបង្កើតឡើងក្នុងក្នុងទីក្រុងឡូវែលនេះ ប៉ុន្តែរូបភាពបានបញ្ចាំងឱ្យឃើញថា ប្រជារាស្រ្តមានការកែច្នៃបង្កើតឡើងដោយខ្លួនឯងម្តងហើយម្តងទៀត ជាច្រើនលើកនៅក្នុងពេលនេះ ក្នុងវីដេអូទី១បាន អធិប្បាយអំពីការកកើតទីក្រុងឡូវែលនេះក៏ជាការច្នៃប្រឌិតមួយ ពីព្រោះនៅក្នុងពេលនេះពុំមាននរណាបានឃើញនូវដំណើរការរបស់សមាគមន៍ឧស្សាហកម្មមានទំហំយ៉ាងណានោះទេ ។

ក្នុងវីដេអូទី២ ស្តីពីការកែច្នៃសារជាថ្មីឡើងវិញ នេះជាវិធីសាស្រ្តច្នៃប្រឌិតរបស់ក្រុងឡូវែលកកើតឡើងជារៀងរហូតមកជាប់ប្រវត្តិសាស្រ្ត ។

ក្នុងវីដេអូទី៣ បានបញ្ចាំងឱ្យឃើញការកកើតសេដ្ឋកិច្ច និងពន្យល់អំពីបាវចនា"Motto" របស់ក្រុងឡូវែល "Art is the handmaid of human good" មានន័យថា: វិចិត្រសិល្បៈជាស្នាដៃសំរាប់បំរើរបស់មនុស្សលោក" ដើម្បីបំពេញលក្ខណៈឱ្យវិចិត្រសិល្បៈមានការប៉ិន ប្រសព្វក្នុងការច្នៃប្រឌិត. មន្ទីរហ្វឹកហាត់ វ៉ែស ស្ទើន អាវីញូ. ស្ទូឌីអូ (Western Avenue Studio) បានផ្តោតទៅលើរូបភាពទាំងនោះ ។

ក្នុងវីដេអូចុងក្រោយស្តីពីឥទ្ធិពលនៃវប្បធម៌ខ្មែរនៅក្រុងឡូវែល និងរូបភាពក្រុមរបាំអង្គរព្រមទាំងមជ្ឈមណ្ឌលសហគមន៍រក្សាសុខក្រុងឡូវែលផងដែរ ។

ក្នុងកាសែតវីដេអូខ្លីៗទាំង៤ បានបង្ហាញឱ្យឃើញភាពពិតនៅទីក្រុងឡូវែលវាអាចនឹងមានលក្ខណៈសំខាន់ក្នុងសារមន្ទីរប្រវត្តិសាស្រ្តពិភពលោក ៕

# Lowell: Place of Invention

**By Richard P. Howe Jr.**

The Smithsonian Institution is a group of museums and research centers operated by the United States government. The Lemelson Center for the Study of Invention & Innovation is part of the Smithsonian. Back in 2010, the Lemelson Center selected the city of Lowell to be one of six places in America that will be featured in a new exhibit on invention in America. This exhibit will open on July 4, 2015 at the Smithsonian's National Museum of American History in Washington, D.C.

Lowell's contribution to this exhibit will be four short videos produced jointly by the American Textile History Museum and Lowell Telecommunications Corporation (LTC) the feature invention in Lowell. The films do not feature individual machines that people in Lowell invented. Instead, the films show how Lowell and its people have invented and re-invented themselves many times.

The first video explains how the city of Lowell was created. This is an invention because at that time, no one knew what a large industrial community would look like. The second video is about reinvention and the ways in which Lowell continuously has reinvented itself throughout its history. The third video looked at the creative economy and how Lowell's city motto, "Art is the Handmaid of Human Good" fits perfectly with the kind of artistic inventiveness practiced at places like Western Avenue Studios which was the focus of this film. The final video was about the influence of Cambodian culture on Lowell and featured the Angkor Dance Troupe and the Lowell Community Health Center.

All four of these short films show Lowell in a positive way. They will be featured in one of the most important history museums in the world.

# ជំងឺអេបូឡាកំពុងរីករាលដាលក្នុងសហរដ្ឋអាមេរិក

រូបថតលោក ធម្ម អែ រិក ដន កែន (Thomas-Eric Duncan) ស្លាប់ដោយជំងឺអេបូឡាក្នុងរដ្ឋថៃកសឹសស.រ.អា លោក ដន កែន បានស្លាប់ក្នុងមន្ទីរពេទ្យរដ្ឋថៃក សឹស នៅថ្ងៃនេះទី៨ ខែតុលា ឆ្នាំ២០១៤ វេលាម៉ោង៧:៥១នាទីព្រឹក ។

ស.រ.អាបានចេញបញ្ជាឱ្យពិនិត្យយ៉ាងតឹងរឹងនៅលើខ្លួនអ្នកទេសចរណ៍ដែលបានធ្វើដំណើរចេញចូលមកសហរដ្ឋអាមេរិកជំងឺអេបូឡាអាចនឹងឆ្លងតាមរយៈសត្វឆ្កែផងដែរ ។ នេះជារូបថត





គ្រូពេទ្យម្នាក់ឈ្មោះ Teresa Romos តេរ៉េសា រ៉ូម៉េរ៉ូ រ៉ាម៉ូ បានប៉ះត្រូវនឹងមេរោគអេបូឡាក្នុងរយៈពេលដែលគ្រូពេទ្យរូបនេះព្យាបាលជំងឺអេបូឡាឱ្យបុព្វជិតម្នាក់នៅប្រទេសស្បែន "Spain" ស.រ.អាបានបញ្ជូនក្រុមជំនាញខាងទប់ស្កាត់ជំងឺឆ្លងចំនួន៤ពាន់នាក់ រួមជាមួយនឹងក្រុមទាហានជំនាញការប្រទេសអង្គលេ៧៥០នាក់ធ្វើដំណើរទៅប្រទេស Sierra Leone ដើម្បីទប់ស្កាត់បញ្ហាជំងឺនេះ ។

**ដកស្រង់ពី ប៊ីប៊ីស៊ី ញូវ**

បុរសម្នាក់ "សូមមិនបញ្ចេញឈ្មោះ" បានធ្វើដំណើរតាមយន្តហោះពីប្រទេស "Libria" ស៊ីបប្រៀ បានដល់សហរដ្ឋអាមេរិកនៅថ្ងៃទី២០ ខែកញ្ញា ឆ្នាំ២០១៤ ដើម្បីទៅសួរសុខទុក្ខបងប្អូននៅរដ្ឋថេតស៊ីស Texas ។

រហូតដល់ថ្ងៃទី២៤ គឺ៤ថ្ងៃក្រោយមកគាត់ក៏ចាប់ផ្ដើមមានជំងឺគ្រួសាររបស់គាត់ក៏បានទូរស័ព្ទហៅប៉ូលិសសង្គ្រោះ "911" ដើម្បីដឹកទៅមន្ទីរពេទ្យនៅទីក្រុងដាលឡាស Dallas ភាគខាងជើងនៃរដ្ឋថែនស៊ុស ។



២ថ្ងៃបន្ទាប់មកទៀត គឺនៅថ្ងៃទី ២៦ ខែកញ្ញា ឆ្នាំ២០១៤ មន្ទីរពេទ្យក៏បានឱ្យគាត់វិលត្រឡប់មកផ្ទះគ្រួសាររបស់គាត់វិញ ។

ដោយអាស្រ័យប្រទេសលីប្រៀស្ថិតនៅប៉ែកខាងលិចនៃទ្វីបអាហ្វិកធ្លាប់មានជំងឺនេះចំនួន៦ពាន់នាក់ នឹងបណ្ដាលឱ្យមានមនុស្សស្លាប់ ៣.០៨៣នាក់ ។

ម្លោះហើយមន្ទីរពេទ្យក៏ធ្វើការស្រាវជ្រាវតាមរយៈឈាមអ្នកជំងឺរួមជាមួយនឹងអាការៈ

តទៅទំព័រទី ១៨

# សោភ័ណ ឡារី អ្នកចម្រៀង សង្គ្រោះជាតិ

ដោយ : ខ្មែរផុសស.រ.អា.

យុវអ្នកចំរៀង សោភ័ណ្ឌ ឡារី បានមកដល់ឡូវែលមួយខែហើយ មិនទាន់បានសម្រាកពីការងារសិល្បៈចម្រៀងនៅឡើយទេ ។ កាលពីខ្លួននៅកម្ពុជា ឡារី ច្រៀងចំរៀងស្នេហាជាតិកំដរ គណបក្សសង្គ្រោះជាតិបានទទួលកេរ្តិ៍ឈ្មោះល្បីពីក្នុងដល់ក្រៅប្រទេសបានយ៉ាងឆាប់រហ័ស តែ ឡារី និយាយថា ពុំបានទទួលកំរៃអ្វីទេ លើកលែងតែអំណោយបន្តិចបន្តួចពីសប្បុរសជនក្រៅប្រទេសតែប៉ុណ្ណោះ ។


សិល្បករ ឡារី ទៅសម្តែងនៅរ៉ូដអាយឡិន


យុវសិល្បករ ឡារី ថតជាមួយនឹង សុខផល ប្រធានយុវជនសង្គ្រោះជាតិនៅឡូវែល

ថ្ងៃទី៧តុលានេះ នៅឡូវែល ឡារី បានរ៉ាយរ៉ាប់ប្រាប់ពីជីវិតប្រាប់ខ្មែរផុសថា មិនបានសម្រាកពីការសម្តែងជូនសាធារណជននៅសហរដ្ឋអាមេរិកនេះទេ តែលើកនេះ ការខំប្រឹងប្រែងបានទទួលកំរៃចូលមកសមរមហើយ ។ ពីម្សិលមិញនៅរដ្ឋស៊ីអាថលថ្ងៃនេះនៅឡូវែលស្អែកនៅហ៊្វីឡាដែលហៀកម្មវិធីធ្លាក់មករដឹកនាំយកអ្នកកម្លោះចម្រៀងគណបក្សសង្គ្រោះជាតិដែលបានក្លាយជាសិល្បករផង នឹងវីរបុរសស្នេហាជាតិផង ទៅបង្ហាញខ្លួនជាមោទនភាពនៃគណបក្សពីឆ្នេរខាងកើត រហូតដល់ខាងលិចនៃសហរដ្ឋអាមេរិក ។

វ័យនៅក្មេងរូបរាងក៏សង្ហារ ឡារី ជាយុវជនដែលបានរៀនដល់ថ្នាក់ទី១២ ទៅបន្តការសិក្សាខាងបច្ចេកទេសសម្តែងបាន៦ដង ទើបតែសម្តែងបាន២ដង ក៏មានគេហៅឱ្យទៅច្រៀងក៏ចេញច្រៀងទៅតាំងតែពីថ្ងៃនោះមក ។

ឡារី ក៏ជាយុវជនមានការគិតគូរអាណិតអាសូរដល់ប្រទេសដែលខ្លួនរស់នៅមើលឃើញអនាគតគួរឱ្យជឿបានក្នុងដំណើររបស់គណបក្សសង្គ្រោះជាតិ ក៏សម្រេចចិត្តចូលរួមក៏សាងជាមួយ ។ ឡារី និយាយថា ការសម្រេចចិត្តនេះ មិនបានជួយដល់អាជីពជាសិល្បករដែលហ៊ានសម្តែងប៉ះពាល់ដល់រដ្ឋាភិបាលទេ ពីព្រោះនៅកម្ពុជាមិនមាននរណាហ៊ានយកយើងទៅសម្តែងទេ។ នៅពេល ឡារី បានជួបក្រុមយុវជនសង្គ្រោះជាតិនៅឡូវែលសេចក្តីសង្ឃឹមថ្មីមួយទៀតបានកើតឡើង គឺនៅពេលត្រឡប់ទៅកម្ពុជាវិញ នឹងផ្ជាប់ទំនាក់ទំនងរវាងក្រុមយុវជនឯណោះនឹងក្រុមយុវជនសហរដ្ឋអាមេរិកឱ្យមានកម្លាំងតស៊ូរឹតតែប្រសើរឡើង ៕



# បវរកញ្ញា VTY Depew អៃវ៉ីឌីភីវ នៅ រ៉ូដអាយឡិន

**រៀបរៀងដោយ : ថាច់ វណ្ណា**

បវរកញ្ញា ឌីភីវ បានទៅចូលរួមការប្រកួតប្រជែងមួយនៅ Board walk Hall ប៉តវ៉ក់ ហាល ទីក្រុងអាឡិន ត៊ិក រដ្ឋនីវជើស៊ី ។

ឌីភីវបានឈរនៅជួរក្រោយនាងបានសន្លប់ដួលនៅលើវេទិកាក្នុងខណៈដែលលោកអភិបាលរដ្ឋនីវជើស៊ី" Kim Guadagno "គីម ហ្គាតដាចណូ កំពុងប្រទានរង្វាន់ឱ្យក្រុមប្រកួតប្រជែងក្នុងរាត្រីដំបូងនាថ្ងៃអង្គារ៍ ទី៩ កញ្ញា ឆ្នាំ២០១៤ លោក Dena Blizzard ឌីណា ប្លីស្សាដ អ្នកវេទិការីក បាននិយាយប្រាប់ទស្សនិកជនថា : ដោយអាស្រ័យនាង ឌីភីវ មានការរំជួលចិត្តខ្លាំងពេក ទើបបណ្ដាលនាងសន្លប់នាង ឌីភីវ នឹងត្រូវបានគេដឹកយកទៅមន្ទីរពេទ្យ អាត្លង់ទិន ត៊ិក នីវជើស៊ី ។

លោក Sharon Pearce សារ៉ុន ភៀស ប្រធានអង្គការបវរកញ្ញាអាមេរិកាំង ក៏បានបញ្ជាក់ថា នាង ឌីភីវ បានសន្លប់មែន ប៉ុន្តែមិនមានភាពធ្ងន់ធ្ងរទេ ។

នាង ឌីភីវ បានចេញពីមន្ទីរពេទ្យបន្ទាប់១ថ្ងៃ ហើយបានចូលទៅរួមប្រកួតប្រជែងតទៅមុខទៀត នៅយប់ថ្ងៃពុធ ទី១០ ខែកញ្ញា ឆ្នាំ២០១៤ ។

**ព័ត៌មានដកស្រង់ពី**
**Westein Massachusette News និង Rhod Island Breaking News**

ATLANTIC CITY, N.J. (AP) - A contestant in the Miss America competition collapsed onstage and had to be taken off the stage for medical treatment during the first night of preliminary competition Tuesday.

Ivy DePew, Miss Rhode Island, was standing in the back row of contestants at Atlantic City's Boardwalk Hall when she collapsed during an awards presentation by New Jersey Lt. Gov. Kim Guadagno.

Dena Blizzard, the pageant's host, told the audience "She just got a little overheated."

It was not immediately clear whether DePew was taken to a hospital or treated at Boardwalk Hall.

Sharon Pearce, president of the Miss America organization, said DePew had fainted, but would be all right.







# ខេត្តបាត់ដំបងមានរមណីយដ្ឋាន៣ប្រភេទ សំរាប់ភ្ញៀវទេសចរទស្សនាកំសាន្ត

**ខេត្តបាត់ដំបង :** "បាត់ដំបង" ជាឈ្មោះខេត្តដែលពាក់ព័ន្ធនឹងរឿងព្រេងបុរាណនិទាន "តាដំបងក្រញូង" ។ បើយោងតាមសិលាចារិក គ២០៥, គ២០៦, គ២១១, គ២១៤ ទឹកដីខេត្តបាត់ដំបង រួមមានមួយផ្នែកស្ថិតនៅភាគខាងលិច និងភាគពាយ័ព្យនៃបឹងទន្លេសាបជាអតីតទឹកដីឪអាមោឃៈបុរៈ និងមួយផ្នែកទៀតស្ថិតនៅភាគខាងត្បូងឆៀងខាងលិចជាចំណែកមួយនៃអតីត "ភិមបុរៈ" ។ នៅក្នុងសៀវភៅព័តិមានទេសចរណ៍របស់ខេត្តបាត់ដំបងបានសរសេរថា តាមការស្រាវជ្រាវខេត្តបាត់ដំបងប្រហែលជាទឹកដីមួយឯករាជ្យពាក់កណ្ដាល និងចំណុះឱ្យនគរចេនឡាពាក់កណ្ដាលនៅដើមសតវត្សទី៦ ។ នៅចំកណ្ដាលទីរួមខេត្តបាត់ដំបងបច្ចុប្បន្ន គឺជាទីក្រុងបុរាណដ៏ចំណាស់មួយដែលត្រូវបានប្រសិទ្ធនាមថា "ទីក្រុងបេតិកភណ្ឌដ៏ប្រណីត" ក្នុងក្រសែភ្នែកទេសចរគ្រប់រូប និងបានបន្សល់ទុកនូវអនុស្សាវរីយ៍ជាច្រើនជាមួយសំណង់បេតិកភណ្ឌដូចជាអគារសាលាខេត្តចាស់ ស្ពាន ថ្នល់ ផ្ទះល្វែង រាប់រយខ្នងដែលជារចនាបថល្អឯក ដងស្ទឹងសង្កែដែលហូរកាត់ជាច្រើន តំបន់រមណីយដ្ឋានប្រសាទបុរាណ ភ្នំ ល្អាងភ្នំ ធម្មជាតិ វប្បធម៌ ទំនៀមទំលាប់ និងជីវភាពរស់នៅរបស់ម្ចាស់ស្រុកជាដើម ។

លោកម៉ក់ ស៊ីណារ៉ា អនុប្រធានមន្ទីរទេសចរណ៍ខេត្តបាត់ដំបង បានថ្លែងថា បច្ចុប្បន្ន រមណីយដ្ឋាននៅក្នុងខេត្តបាត់ដំបងមានប្រហែល ៣០កន្លែង ប៉ុន្តែមានប្រហែល២០កន្លែងប៉ុណ្ណោះដែលភ្ញៀវទេសចរតែងធ្វើដំណើរទៅទស្សនាកំសាន្ត ។ លោកម៉ក់ ស៊ីណារ៉ា បានថ្លែងទៀតថា តំបន់ទេសចរណ៍ខាងលើនេះបានត្រូវបែងចែក៣ប្រភេទ គឺ១-មរណីយដ្ឋានបែបវប្បធម៌ ២-រមណីយដ្ឋានបែបធម្មជាតិពិត១ និង៣-រមណីយដ្ឋានបែបកែច្នៃ...។ លោកអនុប្រធានរូបនេះបានបញ្ជាក់ប្រាប់ពីលក្ខណៈរមណីយដ្ឋានទីមួយ១ថា រមណីយដ្ឋានបែបវប្បធម៌មាន ដូចជាប្រាសាទបុរាណ ផ្ទះបុរាណ ឬភូមិវប្បធម៌ សារមន្ទីរ ទីវត្តអារាមចំណាស់១ ។ ប៉ុន្តែរមណីយដ្ឋានធម្មជាតិខ្លះក៏ជារមណីយដ្ឋានបែបវប្បធម៌ដែរ ព្រោះជាអតីតបុរេប្រវត្តិ ដូចជាល្អាងភ្នំទាក់ទ្រាំងដែលស្ថិតនៅស្រុករតនមណ្ឌលជាដើម ។ រីឯរមណីយដ្ឋានបែបធម្មជាតិវិញ ដូចជារមណីយដ្ឋានបរិស្ថានសេកសក រមណីយដ្ឋានជ្រលងបុព្វតា រមណីយដ្ឋានថ្មសំរូត រមណីយដ្ឋានពពុះពេជ្រចិន្តា និងរមណីយដ្ឋានរាប់សិបកន្លែងទៀត ដែលសុទ្ធសឹងជារមណីយដ្ឋានបែបធម្មជាតិពិត១ ។ រមណីយដ្ឋានទាំងនេះភាគច្រើននៅតាមតំបន់ព្រៃភ្នំជាពិសេសស្ថិតនៅតាមដងស្ទឹងសង្កែ ដែលហូរកាត់ស្រុកបាណន់ ស្រុករតនមណ្ឌល និងស្រុកសំឡូត ។

ដោយឡែករមណីយដ្ឋានបែបកែច្នៃវិញ លោក ម៉ក់ ស៊ី ណារ៉ា បានពិពណ៌នាថា វាគឺជារមណីយដ្ឋានដែលយើងកែច្នៃរៀបចំតុបតែងឱ្យក្លាយជាតំបន់ទេសចរណ៍ ឧទាហរណ៍ដូចជាតំបន់ទេសចរណ៍អាងកំពីងពួយនេះជាដើម ។ លោកថ្លែងថា តំបន់ទេសចរណ៍អាងកំពីងកំពួយជាការកើតឡើងក្នុងសម័យខ្មែរក្រហម (៣ឆ្នាំ ៨ខែ ២០ថ្ងៃ) ដែលពួកមេដឹកនាំខ្មែរក្រហមកេណ្ឌមនុស្សរាប់សែននាក់ដាក់ប្រើកំលាំងបាយសុទ្ធសាធ ដើម្បីលើកទំនប់ទប់យកទឹកប្រើប្រាស់បង្កបង្កើនផល ប៉ុន្តែរហូតមកទល់បច្ចុប្បន្ននេះ វាបានក្លាយជាតំបន់ទេសចរណ៍ដ៏ពេញនិយមបំផុតក្នុងខេត្តបាត់ដំបង ។ ប៉ុន្តែនៅតាមរមណីយដ្ឋានបែបធម្មជាតិខ្លះក៏មានការកែច្នៃបន្ថែមខ្លះ១ដែរ ដើម្បីឱ្យតំបន់នេះមានសោភ័ណភាពកាន់តែប្រសើរឡើង ។ ទោះជាបែបណា បើយោងតាមការផ្ដល់ព័តិមានជាក់ស្ដែងនៅតាមតំបន់ទេសចរណ៍នីមួយ១ នៅក្នុងខេត្តបាត់ដំបង គឺតំបន់ទេសចរណ៍ដែលពេញនិយមបំផុតនោះគឺមានតំបន់ទេសចរណ៍បុរាណប្រាសាទបាណន់ តំបន់ទេសចរណ៍ធម្មជាតិ និងបុរាណភ្នំសំពៅ តំបន់ទេសចរណ៍កែច្នៃអាងកំពីងពួយ តំបន់ទេសចរណ៍បែបធម្មជាតិសេកសក ជ្រលងបុព្វតា និងការដើរទស្សនាផ្ទះបុរាណនៅក្នុងទីក្រុងបាត់ដំបងជាដើម ៕





តមកពីទំព័រទី ០៩

## រឿងវត្តអារាមនៅ...

### អាកកំប្លែងពីវត្តត្រើយម្ខាង

ថ្វីត្បិតតែរឿងអាស្រូវល្បីល្បាញពេញវត្តត្រើយម្ខាងវត្តគ្រប់គ្រងដោយលោកតា សៅ ឃន ក៏ដោយក្តីវត្តនេះនៅតែមានកម្មវិធីទូរទស្សន៍ផ្សាយរៀងរាល់អាទិត្យបង្ហាញមុខអាស្រូវរបស់ខ្លួនជូនសាធារណជនមិនដែលខានធ្វើឱ្យដីរស្លាប់គ្របដោយចង្អេរលោកតា សៅ ឃន មានក្លិនឆ្អងកញ្ជក់ទូរទស្សន៍ដល់អ្នកមើលមិនថាក្មេង ឬចាស់ឡើយ ។ ពិសេសទៅទៀតនោះក៏គ្មានថ្នាក់ដឹកនាំកិរិតផ្លូវការណាមួយហ៊ានផ្តល់យោបល់ពីអ្វីដែលត្រូវអ្វីដែលខុសរបស់វត្តខ្មែរណាមួយទប់ស្កាត់ការផ្សព្វផ្សាយដែលគ្រោះថ្នាក់ដល់ការអប់រំសហគមន៍ខ្មែរនោះទេទុកឱ្យពលរដ្ឋខ្លួនរងគ្រោះដោយឱ្យច្រឡំស្បង់ថា ជាលោកសង្ឃអស់ច្រើនវស្សាមក ហើយៗនឹងនៅបន្តរងកម្មច្រើនឆ្នាំទៅមុខទៀត ។ ថ្មីៗនេះទៀតមានរឿងកំប្លែងមួយដែលពិតជាកំស្តែងមួយបានត្រូវគេថតផ្សព្វផ្សាយតាមទូទស្សន៍ LTC កាលពីថ្ងៃទី...។ វេលាម៉ោង៦ក្រុមផ្សាយទូទស្សន៍វត្តខ្មែរឡូវែលបានមកដល់ពេលហៀបនឹងចូលអាគាLTCបានត្រូវក្រុមបាតុករស្រែកឱ្យថា "នោះអាលោកខូចស្រីមកដល់ហើយ!" នៅក្នុងក្រុមនោះមានបុរសស្លៀកស្បង់ម្នាក់ដែលគេស្គាល់នៅក្នុងខ្សែវីដេអូអនាមិកមួយសេពសន្ធវៈជាមួយនារីម្នាក់ដែលគេអាចសំគាល់ក្នុងវីដេអូនោះដែរថា ជានាង ម៉ាយា ដែលដើរពីខាងមុខនោះ ។ ក្រុមបាតុករនោះ គឺមកគាំទ្របេក្ខជនខ្មែររបស់ខ្លួន គឺ ភលរដ្ឋា យ៉ែម ប្រជែងនឹង រ៉ាឌី ម៉ម នាថ្ងៃបញ្ចប់ឃោសនាឈរឈ្មោះជាដំណាងរដ្ឋម៉ាសាឈូសែតនាសង្កាត់លេខ៨ក្រុងឡូវែល ។ បន្តិចក្រោយមកនាង ម៉ាយ៉ា ដើរឆ្លងថ្នល់សំដៅមកកាន់ក្រុមបាតុកររកមុខអ្នកស្រែកថាឱ្យលោក ។ បន្ទាប់មកបុរសស្លៀកស្បង់ យ៉ែម គឹមតេង បានឆ្លងថ្នល់ដើរបន្តជម្លោះលើពាក្យចោទថា ឯងដេកជាមួយស្រី រីឯបុរសស្លៀកស្បង់និយាយថា អញមានដេកជាមួយនាងឯងឯណា? ដូច្នេះតើសង្ឃនោះ ដេកជាមួយនាងណា? នេះជារឿងកំប្លែងដែលពិតកើតនៅវត្តខ្មែរឡូវែល ៕

# ស.រ.អា.ធ្វើសង្គ្រាមប្រឆាំងនឹងទ័ពឥស្លាម ISIS

**ដកស្រង់ដោយខ្មែរផុស : ស.រ.អា.**

សហរដ្ឋអាមេរិកបានបើកយុទ្ធនាការវាយប្រហារតាមជើងអាកាសលើប្រទេសស៊ីរីយាជាលើកដំបូងនឹងលើអ៊ីរ៉ាក់ផ្នែកខាងលិចលើតំបន់ដែលកាន់កាប់ដោយទ័ពភេរវករឥស្លាម "អាយស៊ីស" កាលពីថ្ងៃច័ន្ទទី២២ កញ្ញានេះ បន្ទាប់ពីក្រុមនោះ បានអាករសម្លាប់អ្នកកាសែតអាមេរិកាំង២រូបឈ្មោះ ជេមហ្វូឡេ James Foley និង ស្ទីវិន សតឡូហ្វ Steven Sotloff នឹងអ្នកជំនួយការជាតិអង់គ្លេសឈ្មោះ ដេវីដ ហេន David Hains ថតបង្ហាញតាមកញ្ចក់ទូរទស្សន៍រួចមក ។

លោកប្រធានាធិបតី បារាក់ អូបាម៉ា បានទទួលសញ្ញាភ្លើងខៀវពីវិមាន "កាពីតូល" កាលពីខែមុនឱ្យវាយប្រហារតាមយន្តហោះនឹងជួយបំពាក់សព្វាវុធដល់ចលនាប្រឆាំងនឹងប្រធានាធិបតីបាស្ហាអែលអាសាដនៃប្រទេសស៊ីរីយាផងដែរ ។ តាំងតែពីអាណត្តិទី១ ដែលលោកប្រធានាធិបតី បារាក់ អូបាម៉ា បានបញ្ចប់ប្រតិបត្តិការយោធាជើងគោកអាមេរិកាំងនៅអ៊ីរ៉ាក់មកលោកមិនមានបំណងត្រឡប់ទៅអ៊ីរ៉ាក់ម្តងទៀតទេ

តទៅទំព័រទី ២០

نوسراو بۆ گەلیەکە سەگی یەکەم ئۆبامای سەیر، دەبەنگ گوێر ایەلیی کرد




**KhmerPost USA, LLC**

សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក

អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852

លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092

អ៊ីម៉ែល info@khmerpost.us

អានកាសែតនៅគេហទំព័រ www.khmerpost.us

តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម **Advertising**

អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*

លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office)

អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ **Editorials**

និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*

(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**

Kim Phien, Richard Howe,Jr.

ច្នៃសោភ័ណភាពកាសែត **Design Artist**

Heng Chhunleng

ជំនួយការរដ្ឋបាល Intern

Moniphal Bing

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at 100.00 or 120 Euros in Europe per year.





The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សៅរ៍ ទី២០ ខែតុលា ឆ្នាំ២០១៤

## អនុស្សរណៈ និងគោលការណ៍អមប្រាប់ពីសេចក្តីលម្អិតនៃកិច្ចព្រមព្រៀងស្តីពីជនភៀសខ្លួន

**ដោយ ហ្សមប៊រ ភីធឺរ | SEPTEMBER 29, 2014**

យោងតាមច្បាប់ចម្លងនៃកិច្ចព្រមព្រៀងបានឱ្យដឹងថា ជនភៀសខ្លួនដែលតាំងទីលំនៅថ្មីនៅប្រទេសកម្ពុជា ក្រោមកិច្ចព្រមព្រៀងថ្មីមួយជាមួយប្រទេសអូស្ត្រាលីនឹងត្រូវចេញពីរាជធានីភ្នំពេញបន្ទាប់ពួកគេបានរៀនភាសាខ្មែរមូលដ្ឋាននឹងបន្តទទួលជំនួយ ហើយនឹងទទួលបានជំនួយត្រឹមតែរយៈពេល១២ខែប៉ុណ្ណោះក្រោយពេលពួកគេចាកចេញពីរាជធានី។

លោក ស ខេង រដ្ឋមន្ត្រីក្រសួងមហាផ្ទៃ និងលោក ស្កត់ ម៉ូរីសុន (Scott Morrison) រដ្ឋមន្ត្រីក្រសួងអន្តោប្រវេសន៍អូស្ត្រាលីបានប្រកាសកិច្ចព្រមព្រៀងនេះដោយមានការពិសាស្រាសំប៉ាញនៅក្នុងពិធីចុះហត្ថលេខាមួយក្នុងរាជធានីភ្នំពេញកាលពីរសៀលថ្ងៃសុក្រ ទោះបីជាមានការរិះគន់ជាបន្តបន្ទាប់ថា ប្រទេសអូស្ត្រាលីកំពុងគេចវេះពីការទទួលខុសត្រូវរបស់ខ្លួនចំពោះជនភៀសខ្លួនដែលសព្វថ្ងៃកំពុងត្រូវបានឃុំខ្លួននៅក្នុងប្រទេសណូរូ ជាប្រទេសដែនកោះមួយនៅភាគខាងត្បូងមហាសមុទ្រប៉ាស៊ីហ្វិក ដោយសារការបញ្ជូនពួកគេទៅប្រទេសមួយក្នុងចំណោមប្រទេសក្រីក្របំផុត **តទៅទំព័រទី១៧**



## Documents Shed Light on Refugee Deal

**BY ZSOMBOR PETER | SEPTEMBER 29, 2014**

Refugees who resettle in Cambodia under a new deal with Australia will have to move out of Phnom Penh once they learn basic Khmer to continue receiving aid, and will get only 12 months of guaranteed assistance once they leave the capital, according to a copy of the agreement.

Interior Minister Sar Kheng and Australian Immigration Minister Scott Morrison christened the deal with a champagne toast at a signing ceremony in Phnom Penh on Friday afternoon despite persistent criticism that Australia is shirking its responsibility to the refugees, who are currently being held on the South Pacific island nation of Nauru, by sending them to one of the poorest and most corrupt countries in the world.

{On Friday, neither side provided a copy of the memorandum of understanding (MoU), which was negotiated in complete secrecy and without input from nongovernmental groups or the U.N. High Commissioner for Refugees (UNHCR). But an unsigned and undated copy of the MoU and its accompanying

**Continued to page 21**

## ក្រុមជនភៀសខ្លួននៅអូស្ត្រាលីបដិសេធការបញ្ជូនមកកម្ពុជា

**Tue, 30 September 2014Daniel Pye and វង្ស សុខេង ភ្នំពេញប៉ុស្តិ៍**

**ភ្នំពេញៈ** ជនភៀសខ្លួននៅកោះ Nauru បានថ្លែងថា ពួកគេនឹងបដិសេធសំណើរតាំងលំនៅថ្មីរបស់អូស្ត្រាលីនៅក្នុងកម្ពុជា បន្ទាប់ពីមានការតវ៉ានៅលើកោះជាមួយទូតអូស្ត្រាលី កាលពីម្សិលមិញ ខណៈមានហេតុការណ៍បង្ករបួសខ្លួនឯង និងការប៉ុនប៉ងធ្វើអត្តឃាត។

ជនភៀសខ្លួនអ៊ីរ៉ង់ម្នាក់ដែលមិនប្រាប់ឈ្មោះ ហើយនិយាយតាងនាមឱ្យអ្នករស់នៅក្នុងជំរំគ្រួសារនៅលើកោះបានប្រាប់ភ្នំពេញប៉ុស្តិ៍ កាលពីម្សិលមិញថា ការយល់ឃើញជាទូទៅថា កម្ពុជាជាប្រទេសក្រីក្រ និងហិង្សា មានន័យថា គ្មានអ្នកណាម្នាក់នៅក្នុងជំរំនឹងចង់ទទួលយកសំណើរតាំងលំនៅថ្មីនេះទេ។

លោកបន្តថាៈ "ប្រជាជននៅទីនេះគិតស្ថានភាពអាក្រក់នៅកម្ពុជា ព្រោះកម្ពុជាជាប្រទេសក្រីក្រ។ មានអំពើល្មើសច្រើនប្រវត្តិនៃការសម្លាប់និងរំលោភបំពាន។ គ្មានអ្នកណាម្នាក់នៅទីនេះចង់ទៅកម្ពុជាទេ"។

មន្ត្រីកម្ពុជាកាលពីម្សិលមិញបានបញ្ជាក់ថា ដំណាក់កាលសាកល្បងនៃការតាំងលំនៅថ្មីនឹងចាប់ផ្តើមនៅចុងខែនេះ។

ជនភៀសខ្លួនបានបញ្ជាក់ថាៈ "ឱ្យជនភៀសខ្លួន" គ្មានអ្វីត្រូវបាត់បង់ទេ គឺនឹងមានអត្តឃាតប្រសិនបើវាបន្តបែបនេះ។ ពួកគេអាចត្រឹមបញ្ជូនសាកសពទៅកម្ពុជា"។

ក្នុងអំឡុងបាតុកម្មដែលមានមនុស្សជាង ១០០នាក់ កាលពីព្រឹកម្សិលមិញ នៅក្រៅស្ថានទូតអូស្ត្រាលីជនភៀសខ្លួនបានអំពាវនាវឱ្យរដ្ឋាភិបាលអូស្ត្រាលីចេញទិដ្ឋាការការពារបណ្តោះអាសន្នដល់ពួកគេ ខណៈដែលមន្ត្រីនិយាយថា ពួកគេនឹងចេញឱ្យជនភៀសខ្លួននៅកោះ Christmas ដែលបានមកដល់លើទូកដូចអ្នកទាំងឡាយនៅកោះ Nauru ដែរ។

ជនភៀសខ្លួនអ៊ីរ៉ង់ បានថ្លែងថាៈ "ឱ្យអូស្ត្រាលី" កំពុងព្យាយាមបង្ខំមនុស្សឱ្យទៅកម្ពុជា។ យើងមិនអាចទ្រាំទ្របានទេ។ វាពិតជាល្បែងកខ្វក់ដែលពួកគេកំពុងលេង។ "ពីម្សិលមិញ" មានការប៉ុនប៉ងធ្វើអត្តឃាត និងបង្ករបួសខ្លួនឯង ឱ្យក្នុងជំរំ។

ជនភៀសខ្លួនបានបន្តថា ជនភៀសខ្លួនម្នាក់ទៀតដែលគេរាយការណ៍ថា បានអារកខ្លួនឯងបន្ទាប់ពីឮដំណឹងថា ខ្លួនមិនទទួលបានទិដ្ឋាការបណ្តោះអាសន្ននៅអូស្ត្រាលីនោះ ពុំត្រូវបានគេឮដំណឹងទេ ប៉ុន្តែកូនស្រីអាយុ១៤ ឆ្នាំរបស់បុរសនេះ

**តទៅទំព័រទី២៣**

## Refugee groups in Australia denies sending

**Tue, 30 September 2014, Daniel Pye and Vong Kheng Post**

Phnom Penh Post refugees on the island of Nauru, said they will reject Australia's request resettlement in the country after protests on the island with the Australian embassy yesterday while injuring himself and attempted suicide.

Iranian refugee who was not named, and speaking on behalf of the family living in camps on the island, told the Post yesterday that the general perception that Cambodia is a poor country and violence means that no one in the camp would like to accept the offer resettlement.

He said: 'People here think the situation worse in Cambodia because Cambodia is a poor country.Crime history of murder and abuse. No one here wants to Cambodia.

Cambodian officials yesterday confirmed that the pilot phase of the resettlement will start at the end of this month.

Refugees stated that: [refugee] nothing to lose but that would be suicide if it continues like this. They can only send bodies.

During the demonstration in which over 100 people yesterday morning outside the Australian embassy refugees called for the Australian Government temporary protection visas to them, while officials said they would be issued to refugees on Christmas Island who arrived on the boat as those on the island of Nauru.

Iranian refugees, said: '[Australia] are trying to force people to go to Cambodia. We can not endure. It was really a dirty game they are playing. [Yesterday] have attempted suicide and injuring themselves [in the camp].

**Continued to page 23**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស

អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

ច្បាប់ចេញផ្សាយថ្ងៃ សៅរ៍ ទី២០ ខែតុលា ឆ្នាំ២០១៤

តមកពីទំព័រទី ១៧ អនុស្សរណៈ និងគោលការណ៍អមប្រាប់...

និងពុករលួយបំផុតលើពិភពលោកក៏ដោយ។

កាលពីថ្ងៃសុក្រភាគីទាំងពីរមិនបានផ្ដល់នូវច្បាប់ចម្លងនៃអនុស្សរណៈនៃការយោគយល់គ្នា (MoU) ដែលត្រូវបានចរចាដោយសម្ងាត់ និងដោយមិនបានបញ្ចូលអង្គការក្រៅរដ្ឋាភិបាល ឬក៏ឧត្តមស្នងការអង្គការសហប្រជាជាតិទទួលបន្ទុកជនភៀសខ្លួន (UNHCR) នោះឡើយ។ ប៉ុន្តែច្បាប់ចម្លងនៃអនុស្សរណៈនៃការយោគយល់គ្នាដែលគ្មានការចុះហត្ថលេខា ឬកាលបរិច្ឆេទ និងគោលការណ៍អនុវត្តអមជាមួយដែលទទួលបានកាលពីចុងសប្ដាហ៍បានផ្ដល់នូវសេចក្ដីលម្អិតថ្មីអំពីផែនការនេះ។

ឯកសារទាំងនេះបញ្ជាក់ពីមូលដ្ឋានខ្លះនៃកិច្ចព្រមព្រៀងរយៈពេលបួនឆ្នាំ ដែលបានដាក់ចេញកាលពីថ្ងៃសុក្រ។ ឯកសារទាំងនេះមានខ្លឹមសារថា ប្រទេសអូស្ត្រាលីនឹងរ៉ាប់រងរាល់ការចំណាយទាំងអស់សម្រាប់ការតាំងទីលំនៅថ្មី និងសម្រាប់ការផ្គត់ផ្គង់ជនភៀសខ្លួន សូម្បីតែថ្លៃធ្វើដំណើរសម្រាប់មន្ត្រីកម្ពុជាទៅកាន់ប្រទេសណូរូ ដើម្បីជួបជាមួយគ្រួសារដែលទទួលបានសិទ្ធិ ក៏ប្រទេសអូស្ត្រាលីជាអ្នករ៉ាប់រងដែរ។ ហើយជនភៀសខ្លួនទាំងអស់គឺសុទ្ធតែស្ម័គ្រចិត្ត។

ហើយខណៈដែលមន្ត្រីកម្ពុជា និងអូស្ត្រាលីមិនបានឱ្យដឹងពីទីកន្លែងដែលជនភៀសខ្លួននឹងត្រូវស្នាក់នៅក្នុងប្រទេសកម្ពុជានោះ គោលការណ៍ទាំងនោះបានបញ្ជាក់ថា គេនឹងផ្ដល់កន្លែងស្នាក់នៅបណ្ដោះអាសន្នក្នុងរាជធានីភ្នំពេញដល់ពួកគេ "រហូតដល់ពួកគេចេះភាសាខ្មែរមូលដ្ឋាន ហើយនិងឆ្លងកាត់ការត្រួតពិនិត្យសុខភាព"។

គោលការណ៍ទាំងនោះមានខ្លឹមសារបន្តទៀតថា "ប្រទេសអូស្ត្រាលី និងកម្ពុជានឹងសហការគ្នាដើម្បីស្វែងរកទីតាំងមួយនៅក្រៅរាជធានីភ្នំពេញសម្រាប់ផ្ដល់សេវាតាំងទីលំនៅដល់ជនភៀសខ្លួន"។

គោលការណ៍ទាំងនោះមានខ្លឹមសារបន្ថែមថា សេវាតាំងទីលំនៅថ្មីនឹងបូករួមអ្វីទាំងអស់ដែលរាប់ចាប់ពីកន្លែងស្នាក់នៅឯកជនដល់ការផ្ដល់វគ្គបណ្ដុះបណ្ដាលផ្នែកភាសា និងការងារ ការផ្ដល់ប្រាក់កម្ចីសម្រាប់ចាប់ផ្ដើមអាជីវកម្ម អាហារ សម្លៀកបំពាក់ សេវាសុខភាព និងការចំណាយផ្សេងៗដែលភាគីទាំងពីរនឹងព្រមព្រៀងគ្នាតាមក្រោយ។

គោលការណ៍ទាំងនោះមានខ្លឹមសារទៀតថា "សេវាតាំងទីលំនៅថ្មីនឹងត្រូវផ្ដល់ឱ្យក្នុងរយៈពេល១២ខែ គិតចាប់ពីថ្ងៃដែលជនភៀសខ្លួនទីមួយៗចាកចេញពីកន្លែងស្នាក់នៅបណ្ដោះអាសន្ន។ ក្រោយរយៈពេល១២ខែដំបូងនេះ ការវាយតម្លៃមួយនឹងត្រូវធ្វើឡើងមួយករណីម្ដងៗ ដើម្បីចង់ដឹងថា តើមានតម្រូវការអ្វីបន្ថែមទៀតសម្រាប់សេវាតាំងទីលំនៅថ្មីនេះ"។

លោក ស ខេង មិនអាចទាក់ទងបានទេកាលពីម្សិលមិញ។ រីឯលោក សុខ ផល អគ្គនាយកនៃអគ្គនាយកដ្ឋានអន្តោប្រវេសន៍នៅក្រសួងមហាផ្ទៃក៏បានបដិសេធមិនធ្វើអត្ថាធិប្បាយដែរ។

លោកស្រី ដេនីស ខហ្វលេន (Denise Coghlan) ដែលដំណើរការអង្គការយេស៊ូផ្ដល់សេវាកម្មសម្រាប់ជនភៀសខ្លួន (Jesuit Refugee Service) នៅរាជធានីភ្នំពេញបានលើកឡើងថា ជំនួយរយៈពេល១២ខែនេះទំនងជាមិនគ្រប់គ្រាន់សម្រាប់ជនភៀសខ្លួនមួយចំនួនក្នុងចំណោមជនភៀសខ្លួនថ្មីនេះទេ។

លោកស្រីបានមានប្រសាសន៍ថា "មនុស្សដែលមានជំងឺ និងប៉ះពាល់ផ្លូវចិត្តអ្នកដែលមិនអាចរកការងារធ្វើបាននឹងត្រូវការជំនួយមូលដ្ឋានក្នុងពេលយូរ។ ប្រសិនបើជនភៀសខ្លួនត្រូវបានផ្ដល់ឱ្យនូវប្រាក់ឧបត្ថម្ភប្រចាំខែ បន្ទាប់ពីជំនួយ១២ខែនោះត្រូវបានបញ្ចប់ ពួកគេគួរតែត្រូវបានផ្ដល់ជំនួយខ្លះៗមួយឆ្នាំបន្ថែមទៀត ហេតុដូច្នេះជនភៀសខ្លួនអាចសម្របខ្លួនបានជាបណ្ដើៗ"។

លោកស្រី ខូហ្វលេន បានលើកឡើងបន្តថា កិច្ចព្រមព្រៀងនេះ ក៏មិនបញ្ជាក់ឱ្យបានច្បាស់អំពីថា តើជនភៀសខ្លួននឹងត្រូវរៀនភាសាខ្មែរមូលដ្ឋាននៅកន្លែងណាដែរ ព្រោះកិច្ចព្រមព្រៀងនេះនិយាយតែពីការផ្ដល់ "សេវានៅខាងក្រៅរាជធានីតែប៉ុណ្ណោះ ហើយក៏មិនបានបញ្ជាក់ឱ្យបានច្បាស់អំពីការបញ្ជូនពួកគេចេញពីរាជធានីដែរ។

លោកស្រីបានគូសបញ្ជាក់ថា ជនភៀសខ្លួនប្រមាណ៦០នាក់ ឬក៏ជនភៀសខ្លួនដែលសព្វថ្ងៃកំពុងរស់នៅក្នុងប្រទេសកម្ពុជាបានតាំងទីលំនៅ នៅជាយរាជធានីភ្នំពេញ ហើយថា អ្នកមកដល់ថ្មីមិនគួរប្រឈមនឹងការរឹតបន្តឹងបន្ថែមទាក់ទិនទីកន្លែងដែលពួកគេត្រូវរស់នៅឡើយ។

លោកស្រីបានមានប្រសាសន៍ថា "ការផ្ដល់សេរីភាពសម្រាប់ការតាំងទីលំនៅថ្មីដល់ពួកគេទំនងជាជម្រើសល្អបំផុត"៕ **ស៊ុយ ឈាង**

# តំណាងរាស្ត្រអនុម័តដាក់បញ្ចូលគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោតទៅក្នុងរដ្ឋធម្មនុញ្ញ

**ដោយ : ហ៊ុល រស្មី** | **OCTOBER 2, 2014**

កាលពីម្សិលមិញរដ្ឋសភាបានអនុម័តសេចក្ដីព្រាងច្បាប់មួយជាឯកច្ឆន្ទប្រែក្លាយគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត (គ.ជ.ប.) ទៅជាស្ថាប័នធម្មនុញ្ញដោយតំណាងរាស្ត្រគណបក្សប្រជាជនកម្ពុជាបានបំពេញតាមការសន្យាមួយក្នុងចំណោមការសន្យាសំខាន់ៗដែលគណបក្សកាន់អំណាចបានធ្វើជាមួយគណបក្សសង្គ្រោះជាតិនៅក្នុងកិច្ចព្រមព្រៀងមួយនាខែកក្កដាដែលបានបំបែកភាពទាល់ច្រកខាងនយោបាយនៅក្នុងប្រទេសដែលបានអូសបន្លាយអស់រយៈពេល១០ខែ។

គ.ជ.ប.បច្ចុប្បន្នមានសមាសភាពភាគច្រើនជាបុគ្គលដែលមានភក្ដីភាពចំពោះគណបក្សកាន់អំណាច ហើយគណបក្សសង្គ្រោះជាតិបានចោទប្រកាន់ថា ស្ថាប័ននេះតែងតែគាំទ្រគណបក្សប្រជាជនកម្ពុជានៅក្នុងការបោះឆ្នោត ។ តាមរយៈការដាក់បញ្ចូលគណៈកម្មាធិការនេះទៅក្នុងរដ្ឋធម្មនុញ្ញ និងការផ្ដល់ថវិកាផ្ទាល់ខ្លួន និងសិទ្ធិចំណាយរបស់ស្ថាប័ននេះ គណបក្សប្រឆាំងសង្ឃឹមថា នឹងធ្វើឱ្យគណៈកម្មាធិការនេះកាន់តែមានឯករាជភាព។

បន្ទាប់ពីការបោះឆ្នោតកាលពីម្សិលមិញ លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិបានមានប្រសាសន៍ថា វាជាជំហានដំបូងដ៏មានសារៈសំខាន់នៅក្នុងការធ្វើកំណែទម្រង់ប្រព័ន្ធបោះឆ្នោតដែលមានគុណវិបត្តិធ្ងន់ធ្ងរ។

លោកបានមានប្រសាសន៍ទៀតថា "នេះគឺជាជំហានមួយដ៏មានសារៈសំខាន់នៅក្នុងការឆ្ពោះទៅមុខ ដើម្បីរៀបចំគ.ជ.ប.ថ្មីដែលនឹងធានាថាការបោះឆ្នោតប្រព្រឹត្តទៅមានលក្ខណៈប្រជាធិបតេយ្យ សេរី ត្រឹមត្រូវ និងយុត្តិធម៌នៅលើកក្រោយ។ មិនថាយើងដើរឆ្ងាយប៉ុណ្ណាទេ គឺយើងត្រូវដើរជំហានដំបូងសិន។ ប្រសិនបើជំហានដំបូង

តទៅទំព័រទី ១៨

# Lawmakers approved the inclusion of the National Committee for election into the Constitution

**HUL BRIGHTNESS | OCTOBER 2, 2014**

Parliament yesterday approved a draft bill unanimously turned Committee National Elections (...) Constitution by parliamentary institutions CPP fulfilled a promise of the key promises that the ruling party has working with the National Salvation Party in an agreement in July to break the political stalemate in the country has lasted for 10 months.

...Currently composed mostly individuals who are loyal to the ruling party has alleged that the organization is always CPP support in the elections. Through the inclusion of the committee to the Constitution and the rights to provide a personal and institutional spending, the opposition hopes to make the committee more independence.

After the vote yesterday, Sam Rainsy, president of the National Salvation Party, said it was an important first step in making Electoral reform has serious drawbacks.

He said, "This is an important step in moving forward to prepare... which will ensure that new elections are held Democratic liberal democracy and justice in the next. Whether we walk far, but we needed to take the first step. If a good first step, we hope that other steps will also be good. "

Speaking in parliament, Mr. Eng Chhay Eang opposition lawmaker who helped draft constitutional amendment thanked parliamentary colleagues for their great support. He said that "it would help end the political crisis in future elections."

He emphasized that there is no meaningful discussions around this amendment because lawmakers 83 Among the 123 lawmakers of the parliament vote of more than two-thirds, which **Continued to page 18**

Continued from Page 17

## Lawmakers approved the inclusion of the National...

is necessary for constitutional amendments signed on it already.

Pen intellectual CPP lawmaker who helped draft the amendment, read articles to be amended in Assembly. Article One of those articles to ensure the independence of the members... And the Committee's budget and another article shows how to choose its nine members.

Until now members... Interior choose a password. The four members will be selected by the ruling four will be chosen by the other party with seats in 9th Parliament and members will be chosen by "consensus" among all parties.

Pen intellectual, said that promises 3 is amended law on the country's elections. He spoke to the Congress, "to ensure that... Fulfill their duties with independence and neutrality and ensure an electoral process free and fair manner the priority it needs to to be incorporated... Into a new chapter of the Constitution of the Kingdom. "

Eng Chhay Eang said that he hoped that the amendments to the law on the national elections and a new law on specific management... would be adopted by the end of this year.

The opposition wants to make several amendments to the law on elections, including the withdrawal process voter registration out of reach of commune officials, most dominant among these officials, a member of the CPP.Independent observers agreed that the registration process for the election last year, there are serious drawbacks and The most serious problem related to electoral issues.

When Congress yesterday and before the vote, Mr. Sam Rainsy and Hun Sen walked out to meet private for an hour. Following this meeting, Mr. Sam Rainsy said that the Prime Minister assured to assure that the project dam Stung Areng controversial in Koh Kong has not yet given approval for the construction of yet.

Earlier, a Chinese construction company has posted a statement on systems ranging from the internet that it has signed a contract with the company Chinese company Sinohydro Resources that lie behind this company is the cause of the environmental groups that oppose the dam more estimates that the government has already approved the project.

Sam Rainsy told reporters, "Hun Sen told me that no decision yet, so please brothers all, do not worry too much.Prince has said it can not be built in the mandate. " Sam Rainsy has refused to clarify another point he.

តមកពីទំព័រទី ១១

## ជំងឺអេបូឡាកំពុងរីករាលដាលក្នុង...

ខាងក្រៅដូចជា ក្អួត រាគ និង រមាស់ សព្វខ្លួនជាដើម ។

មន្ទីរពេទ្យឈាមនៅទីក្រុង Austin ! អ៊ីស់ ស្ទីន វេជ្ជបណ្ឌិត David Lakey ដេវីត លេឃី បានបញ្ជាក់ថា បុរសនោះ មានជំងឺពិតប្រាកដនៅវេលាម៉ោង៣:៣២ នាទីរសៀល ថ្ងៃទី៣០ ខែកញ្ញា ឆ្នាំ២០១៤ នេះជាអ្នកជំងឺមុនគេបង្អស់ក្នុងស.រ.អា ។

ជំងឺអេបូឡាអាចឆ្លងរីករាលដាលយ៉ាងឆាប់រហ័សសព្វថ្ងៃនេះ មន្ទីរពេទ្យមិនទាន់មានថ្នាំព្យាបាលនៅឡើយ ។ ក្រសួងមានសមត្ថកិច្ចការពារជំងឺឆ្លងបានបង្ខាំងគ្រួសារអ្នកជំងឺដាច់ដោយឡែកដើម្បីតាមដានសភាពជំងឺ២១ថ្ងៃ ។ ក្រុមអ្នកពេទ្យសង្គ្រោះបន្ទាន់២នាក់ក៏ត្រូវបានឃាំងដោយឡែកក្នុងរយៈពេល២១ថ្ងៃដូចគ្រួសារអ្នកជំងឺផងដែរ ។

ក្រសួងមានសមត្ថកិច្ចកំពុងស៊ើបបន្តទៅទៀត ចំពោះបងប្អូនញាតិមិត្តណាដែលបានប៉ះពាល់ដល់អ្នកជំងឺ ដើម្បីធ្វើការពិសោធន៍ទប់ស្កាត់ជំងឺពីការឆ្លងរាលដាលតទៅមុខទៀត ។

វេជ្ជបណ្ឌិត Edward Goodman អិដវិត ហ្គូដម៉ែន អ្នកសិក្សាស្រាវជ្រាវរោគរាតត្បាតបាននិយាយថា : រោគអេបូឡាជារោគ១គួរឱ្យភ័យខ្លាចវាអាចចម្លងតាមរយៈទឹកនោម ទឹកមាត់ ឈាម ឬអ្នកដែលប៉ះពាល់ដល់វា ។

មជ្ឈមណ្ឌលទប់ស្កាត់ជំងឺ (CDC) វេជ្ជ បណ្ឌិត Tom frienden "ថាម ហ្វ្រេដិន" បានមានប្រសាសន៍ថា : ប្រសិនជាមានអ្នកប៉ះពាល់នឹងជំងឺអេបូឡាអ្នកនោះនឹងមានអាការៈ ដូចជា គ្រុនក្តៅ អ្នកនោះ នឹងត្រូវឃាំងខ្លួនជាបន្ទាន់ ដើម្បីកុំឆ្លងទៅអ្នកផ្សេងទៀត ។

មេរោគដែលមានឈ្មោះ អេបូឡា មានដើមកំណើតនៅតាមដងទន្លេអេបូឡាប្រទេសកុងហ្គូ (Congo) បណ្តាលឱ្យមនុស្ស៣ពាន់នាក់បានបាត់បង់ជីវិត ។

**តើមជ្ឈមណ្ឌលទប់ស្កាត់ជំងឺនេះដោយវិធីណា ?**

បើបានប្រព័ន្ធតារាងយន្តហោះអន្តរជាតិនៅ Houston "ហ៊ូស្តុន"ក្នុង១ឆ្នាំមានចំនួន៧ម៉ឺននាក់ដែលធ្វើដំណើរមកពីអាហ្វ្រិកមកដល់ពេលនេះជំងឺអេបូឡាបានឆ្លងចូលទៅដល់ប្រទេសរួមមាន១៥ប្រទេសរួចទៅហើយ សូមមិត្តអ្នកអានចាំអានបន្តនៅលើកក្រោយ ។

**ដកស្រង់អំពីព័ត៌មាន ដាឡាស និងហាប់ ហ្វិងញូ**

តមកពីទំព័រទី ១៧

## តំណាងរាស្ត្រអនុម័តដាក់បញ្ចូល...

ល្អយើងសង្ឃឹមថា ជំហានផ្សេងទៀតក៏នឹងល្អដែរ" ។

ថ្លែងនៅក្នុងរដ្ឋសភា លោក អេង ឆៃអ៊ាង តំណាងរាស្ត្រគណបក្សប្រឆាំងដែលបានជួយធ្វើសេចក្តីព្រាងវិសោធនកម្មរដ្ឋធម្មនុញ្ញនេះ បានថ្លែងអំណរគុណតំណាងរាស្ត្រជាសហការីចំពោះការគាំទ្រដ៏ធំធេងរបស់ពួកគាត់ ។ លោកមានប្រសាសន៍ថា "វានឹងជួយបញ្ចប់វិបត្តិនយោបាយនៅក្នុងការបោះឆ្នោតនាពេលអនាគត" ។

លោកបានគូសបញ្ជាក់ថា គ្មានការពិភាក្សាដេញដោលទេជុំវិញការធ្វើវិសោធនកម្មនេះដោយសារតែតំណាងរាស្ត្រចំនួន ៨៣រូប ក្នុងចំណោមតំណាងរាស្ត្រទាំង ១២៣រូបនៃរដ្ឋសភាជាសំឡេងគាំទ្រលើសពីរភាគបីដែលត្រូវការចាំបាច់សម្រាប់ធ្វើវិសោធនកម្មរដ្ឋធម្មនុញ្ញបានចុះហត្ថលេខាលើវារួចទៅហើយ ។

លោក ប៉ែន បញ្ញា តំណាងរាស្ត្រគណបក្សប្រជាជនកម្ពុជាដែលបានជួយធ្វើសេចក្តីព្រាងវិសោធនកម្មនេះដែរ បានអានមាត្រាដែលត្រូវបានធ្វើវិសោធនកម្មនៅក្នុងរដ្ឋសភា ។ មាត្រាមួយក្នុងចំណោមមាត្រាទាំងនោះធានាឯករាជភាពរបស់សមាជិកគ.ជ.ប. និងថវិការបស់គណៈកម្មាធិការនេះ ហើយមាត្រាមួយទៀតបង្ហាញពីរបៀបជ្រើសរើសសមាជិកទាំងប្រាំបួនរូបរបស់វា ។

រហូតមកទល់ពេលនេះ សមាជិក គ.ជ.ប.ថ្មីត្រូវបានក្រសួងមហាផ្ទៃជ្រើសរើសជាសម្ងាត់ ។ ពេលនេះសមាជិកបួនរូបនឹងត្រូវជ្រើសរើសដោយគណបក្សកាន់អំណាចបួនរូបនឹងត្រូវជ្រើសរើសដោយគណបក្សផ្សេងទៀតដែលមានអាសនៈនៅក្នុងរដ្ឋសភា ហើយសមាជិកទី៩ នឹងត្រូវជ្រើសរើសដោយ "ការព្រមព្រៀងគ្នា" ក្នុងចំណោមគណបក្សទាំងអស់ ។

លោក ប៉ែន បញ្ញា បានមានប្រសាសន៍ថា ការសន្យាទី៣ គឺនឹងត្រូវធ្វើវិសោធនកម្មច្បាប់ស្តីពីការបោះឆ្នោតរបស់កម្ពុជា ។ លោកបានថ្លែងទៅកាន់អង្គសភាថា "ដើម្បីធានាថា គ.ជ.ប. បំពេញភារកិច្ចរបស់ខ្លួនដោយឯករាជភាព និងអព្យាក្រឹតភាព ហើយធានាឱ្យមានដំណើរការបោះឆ្នោតមួយប្រកបដោយសេរី និងយុត្តិធម៌ជាអាទិភាពវាចាំបាច់ណាស់ក្នុងការដាក់បញ្ចូល គ.ជ.ប. ទៅក្នុងជំពូកថ្មីមួយនៃរដ្ឋធម្មនុញ្ញរបស់កម្ពុជា" ។

លោក អេង ឆៃអ៊ាង បានមានប្រសាសន៍ថា លោកសង្ឃឹមថា ការធ្វើវិសោធនកម្មច្បាប់ស្តីពីការបោះឆ្នោតជាតិ និងច្បាប់ថ្មីមួយដែលបង្ហាញពីសេចក្តីជាក់លាក់ស្តីពីការគ្រប់គ្រង គ.ជ.ប. ថ្មី នឹងត្រូវអនុម័តនៅដំណាច់ឆ្នាំនេះ ។

គណបក្សប្រឆាំងចង់ធ្វើវិសោធនកម្មជាច្រើនចំពោះច្បាប់ស្តីពីការបោះឆ្នោត រួមទាំងការដកដំណើរការចុះឈ្មោះបោះឆ្នោតចេញឱ្យផុតពីដៃមន្ត្រីឃុំ-សង្កាត់ដែលភាគច្រើនលើសលប់ក្នុងចំណោមមន្ត្រីទាំងនោះជាសមាជិកគណបក្សប្រជាជនកម្ពុជាផងដែរ ។ ក្រុមអ្នកសង្កេតការណ៍ឯករាជ្យបានយល់ស្របថា ដំណើរការចុះឈ្មោះសម្រាប់ការបោះឆ្នោតកាលពីឆ្នាំមុន មានគុណវិបត្តិធ្ងន់ធ្ងរ និងជាបញ្ហាធ្ងន់ធ្ងរបំផុតពាក់ព័ន្ធនឹងបញ្ហាបោះឆ្នោត ។

នៅពេលកំពុងប្រជុំសភាកាលពីម្សិលមិញ និងនៅមុនពេលបោះឆ្នោតអនុម័តលោក សម រង្ស៊ី និងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានដើរចេញដើម្បីជួបគ្នាជាលក្ខណៈឯកជនអស់រយៈពេលមួយម៉ោង ។ បន្ទាប់ពីការប្រជុំនេះលោក សម រង្ស៊ី បានមានប្រសាសន៍ថា លោកនាយករដ្ឋមន្ត្រីបានធានាអះអាងចំពោះលោកថា គម្រោងទំនប់វារីអគ្គិសនីស្ទឹងជាយអារ៉ែងដ៏ចម្រូងចម្រាសនៅក្នុងខេត្តកោះកុងមិនទាន់ទទួលបានការអនុម័តសម្រាប់ការសាងសង់នៅឡើយទេ ។

កាលពីពេលថ្មីៗនេះ ក្រុមហ៊ុនសាងសង់មួយរបស់ចិនបានបង្ហោះសេចក្តីថ្លែងការណ៍មួយតាមប្រព័ន្ធអ៊ីនធើណិតថា ខ្លួនបានចុះកិច្ចសន្យាជាមួយក្រុមហ៊ុន Sinohydro Resources ជាក្រុមហ៊ុនចិនដែលស្ថិតនៅពីក្រោយក្រុមហ៊ុននេះជាហេតុបណ្តាលឱ្យអង្គការបរិស្ថាននានាដែលជំទាស់នឹងទំនប់នេះមានការប៉ាន់ស្មានកាន់តែច្រើនថា រដ្ឋាភិបាលកម្ពុជាបានអនុម័តគម្រោងនេះរួចទៅហើយ ។

លោក សម រង្ស៊ី បានថ្លែងប្រាប់បណ្តាអ្នកយកព័ត៌មានថា "សម្តេច ហ៊ុន សែន បានប្រាប់ខ្ញុំថា មិនទាន់មានសេចក្តីសម្រេចនៅឡើយទេ ដូច្នេះសូមបងប្អូនទាំងអស់គ្នាកុំបារម្ភខ្លាំងពេក ។ សម្តេចបានលើកឡើងថា វាមិនអាចមានការសាងសង់ទេនៅក្នុងអាណត្តិនេះ" ។ លោក សម រង្ស៊ី បានបដិសេធមិនបញ្ជាក់ពីចំណុចផ្សេងទៀតដែលលោកទាំងពីរបានពិភាក្សាគ្នាឡើយ ៕ **សុខុម**

# គួររៀនសូត្រពីចៅហ្វាយនាយខ្លះហើយ

**ដោយ : បញ្ញាសីលា**

សិស្សល្អត្រូវចេះយកតម្រាប់តាមគំរូល្អរបស់គ្រូឱ្យបាននេះជាផ្លូវដែលរដ្ឋាភិបាលខ្មែរត្រូវដើរតាមប្រសិនបើអស់លោកចង់កែកុនកំហុសរបស់ខ្លួនដែលបានធ្វើខុសឆ្គងតាំងតែពីដើមរៀងមកនោះ។ រដ្ឋាភិបាលខ្មែរជ្រើសរើសរកគ្រូល្អបានហើយសម្រាប់ខ្លួន តែគួរឱ្យស្តាយណាស់រដ្ឋាភិបាលខ្មែរគ្មានទាញផលប្រយោជន៍ឬល្បិចកល់ល្អៗពីលោកគ្រូខ្លួនទាល់តែសោះ។ យើងឃើញរដ្ឋាភិបាលយួនហាណូយដំបូងឡើយក៏ជាសិស្សយ៉ាងល្អនឹងវៀងវៃរបស់លោកគ្រូ"មហាប្រទេសចិន"ប្រជាមានិត្យ។ លោកគ្រូបានទំនុកបំរុងបង្ហាត់បង្រៀនជ្រជែងវាយកំចាត់អាណានិគមបារាំងឱ្យចាញ់សង្គ្រាមនៅឿនបៀនភូរួចត្រូវដកទ័ពទៅស្រុកឯនាយសមុទ្រទុកឱ្យហាណូយបានឯករាជនៅភាគខាងជើងនៃប្រទេសវៀតណាមក្រោមសន្ធិសិទ្ធទីក្រុងស៊ីណែវទៅ ។ ក្រោយមកបានមហាគ្រូចិនប្រជាមានិត្យជួយច្បាំងផងជួយគ្រឿងយុទ្ធោបករតូចធំ,សម្ភារៈចម្បាំងសន្ធឹកសន្ធាប់រាប់កោដិដុល្លារដើម្បីច្បាំងដណ្តើមយកភាគខាងត្បូងវៀតណាមពីរដ្ឋាភិបាលវៀតណាមខាងត្បូងក្រោមការឧបត្ថមគាំទ្រនៃសហរដ្ឋអាមេរិក។

ដោយដឹងគុណលោកគ្រូចិនដែលចង់បានប្រជុំកោះ Spratly ដែលកំពុងកាន់កាប់ត្រួតត្រាដោយរដ្ឋាភិបាលវៀតណាមខាងត្បូងនោះ ធីវ-គី) អ៊ុំហូក៏បញ្ជាឱ្យលោកផាមវ៉ាំងដុងចុះហត្ថលេខាទទួលស្គាល់ថា កោះនោះស្ថិតក្រោមបូរណភាពនៃមហាគ្រូចិនចាប់តាំងពីឆ្នាំ១៩៥៨មកម្លេះ ដោយគេដឹងថា កោះនោះមិនមែនស្ថិតនៅក្រោមបូរណភាពទឹកដីនៃក្រុងហាណូយផង។ ចិនចង់បានកោះនោះណាស់ ព្រោះជាចំណុចយុទ្ធសាស្ត្រសំខាន់ក្នុងអនាគតចិនកាន់កាប់កោះនេះអាចបានទទួលផលទាំងឡាយពីបាតសមុទ្រនៅភូមិភាគនោះផងនឹងបានត្រួតត្រាយុទ្ធសាស្ត្រជាលក្ខណៈអន្តរជាតិយ៉ាងសំខាន់នៅតំបន់នោះផង ។ ឥឡូវនេះ ហាណូយវាយដណ្តើមយកបានភាគខាងត្បូងវៀតណាមហើយកោះសប្រាទ្លីវានៅក្នុងបូរណភាពទឹកដីខ្លួន។ លោកគ្រូចិនទាមទារយកកោះនោះមកកាន់កាប់ដោយស្របច្បាប់កូនសិស្សយួនវនេះឡាំប៉ាមិនព្រមឱ្យលោកគ្រូ.បែរជាទៅពឹងពាក់គេឯងមកជួយទប់ចិនមានប្រទេសជិតខាងដូចជាប្រទេសអាស៊ានទីងរហូតដល់សហរដ្ឋអាមេរិកដែលខ្លួនបានចិនជួយវាយឱ្យបាក់ទ័ពរត់ទីងណាត់ទីងណែងយ៉ាងអាម៉ាស់សើចលែងសមនោះទៀតផង។ ហើយ

កាលដែលក្រុងហាណូយវាយលុកយកក្រុងភ្នំពេញពីក្រោមក្លៀកលោកគ្រូចិនសិស្សល្អនេះបានទៅបញ្ឆិះកលោកគ្រូសូវៀតយ៉ាងក្រមើមៗមកបញ្ឈឺចិត្តលោកគ្រូមហាប្រទេសចិនដូចជាចង់បង្ហាញថាគេហ៊ានបណ្តើរកំណាន់នៅមុខប្តីដើមដ៏លង់នឹងអសមត្ថភាពរបស់ខ្លួននោះ មើរ!អែងហ៊ាន "ធ្វើអីអញ? ។ រង់ចាំមើលថៃមហាមិត្តសូវៀតដល់ថៃអន្សាទើបលោកគ្រូចិនហ៊ានទាញក្បាលកូនសិស្សអកត្តញ្ញូរបស់ខ្លួនមកស្តីប្រដៅ:" មើរ!អានាង,ឯងសន្យាឱ្យប្រជុំកោះសប្រាទ្លីមកលោកគ្រូតាំងពីពេលកោះនោះនៅមិនទាន់ជារបស់ឯងម្លេះឥឡូវបានមកដៃអានាងឯងពេញទីហើយលោកគ្រូចូលកាន់កាប់ហើយណា!...លោកគ្រូឃើញមិត្តសូវៀតរបស់សិស្សខ្លួនអសមត្ថភាពហើយក៏ប្រញិបប្រញាប់ដឹកជញ្ជូនគ្រឿងចក្រនឹងឧបករផ្សេងៗមានរានទ្រនឹងបំពង់បូមប្រេងកាតមកចាប់ផ្តើមកៅឆាយរកស៊ីឱ្យបានចំណេញខ្លះព្រោះបានវិនិយោគដើមទុនរាប់កោដិដុល្លារឱ្យសិស្សរាប់សិបឆ្នាំមកហើយមិនទាន់រកផលចំណេញបានមួយសេនខ្វាក់ណាសោះ។ បុរសខ្លាំងង្វៀងតឹងយុងមានទៅដូច ហ៊ុន សែន នាយយករដ្ឋមន្ត្រីខ្មែរអីគេអន្ទងទៅប្រទេសអាស៊ានទាំងឡាយ,ទៅខាងអឺរ៉ុបនៅមិនទាន់ខ្លាំងទៀត គេថែមទាំងមកគោះទ្វារដល់អតីតសត្រូវរបស់គេទៀត គឺអាមេរិកឱ្យជួយផង! ចិនចង់ធ្វើឱ្យចលាចល់ពិភពលោកហើយ! ចិនចង់បិទច្រកចរាចរនៃនាវាសមុទ្រពិភពលោកហើយ!...មិនដឹងជាលោក អូបាម៉ាមានប្រសាសន៍ថា ម៉េចបានជាមហាមិត្តចិនដែលកំពុងស្វានរកប្រេងកាតនាកោះនោះដកយករានទម្រនឹងបំពង់បូមប្រេងកាតដែលកំពុងមានសកម្មភាពគគ្រឹកគគ្រេងទៅទុកយ៉ាងស្ងៀមសាត់បាត់ទៅ។ នេះជាឧទាហរណ៍មួយលោកនាយករដ្ឋមន្ត្រីខ្មែរគួររៀនសូត្រពីគ្រូរបស់ខ្លួនឱ្យបាន។ យើងមិនចង់ឱ្យរៀនរហូតដល់ការបោកប្រាស់របស់គ្រូដូចចុះហត្ថលេខាទទួលឱ្យគេហើយបែរជាឡាំប៉ាមិនព្រមវិញយ៉ាងនោះទេ គ្រាន់តែចេះការពារដីទឹកខ្លួនឯងទុកឱ្យកូនខ្មែរជំនាន់ក្រោយមានដីគ្រាន់រស់នៅនឹងគេកុំឱ្យក្លាយខ្លួនជាជនអនាថាពាសពេញពិភពលោកឱ្យសោះក្នុងនោះក៏មានកូនចៅរបស់អស់លោកអ្នកដឹកនាំសព្វថ្ងៃនេះផងដែរ។ យួនគេមានច្បាប់ចែងថា ជនណាបានធ្វើឱ្យបាត់បង់ទឹកដីមួយចំអាមត្រូវចាត់ថា ជាជនក្បត់ជាតិមាតុភូមិ។ លោក ង្វៀង តឹងយុងមិនបានចុះហត្ថលេខាប្រគល់កោះនោះឱ្យចិនផងទេតែគេជាជនស្នេហាជាតិសុខចិត្តយកខ្លួនពាំងកុំឱ្យបាត់បង់កេរ្តិ៍អាករដូនតាគេ ទោះបីប្រជុំកោះ

តទៅទំព័រទី ២០

តមកពីទំព័រទី ០៧ វិសម្សកាលចុងរដូវក្តៅនៅរ៉ូដអាយឡិន...

តំបន់ម៉ុំឆ្នេរសមុទ្រនាក្រុងប្រវត្តិសាស្ត្រញូវភ័ត NEWPORT តែរកមិនបានទេ ថ្លៃហើយថែមទាំងមិនទំនេរទៀតផង យើងក៏បង្ខំចិត្តយកបន្ទប់សណ្ឋាគារមួយនៅក្រុងញូវថោន NEWTOWN ឆ្ងាយពីប្រជុំជននឹងពីសមុទ្របន្តិច ។ ញូវភ័តជាក្រុងដែលរៀបចំទទួលទេសចរប្រកបដោយទេសភាពយ៉ាងប្រណិតនៃសួនច្បារនៃទីប្រជុំជននៃផ្សារមាត់សមុទ្រទីឆ្នេរខ្សាច់កំពុងផែរនាវាកំសាន្ត គឺកន្លែងណាក៏ដូចកន្លែងណាមានមនុស្សប្រជ្រៀតគ្នាក្នុងសំលៀកបំពាក់វែង ឬខ្លីចម្រុះពណ៌រកទីញអីវ៉ាន់អនុស្សាវរីយហូបអាហារពិសេសក្នុងតំបន់សមុទ្រមើលអ្នកនេសាទទម្លាក់ផលិតផលសមុទ្រថ្មីៗឱ្យទៅភោជនីយដ្ឋានគ្រាន់តែប៉ុណ្ណោះ ក៏ប្រើពេល២-៣ម៉ោងយ៉ាងលឿនទប់មិនឈ្នះទៅហើយ ។

ថ្ងៃអាទិត្យបន្ទាប់មកមេឃបន្តនៅស្រឡះល្អធាតុអាកាសក្តៅតែមិនស្អុះស្អាប់ទេ យើងជិះរថយន្តវែនរបស់យើងទស្សនាជុំវិញក្រុងមើលទិដ្ឋភាពក្រុងទាំងមូលហើយកោតសសើរមិនដាច់មាត់ពីការខិតខំប្រឹងប្រែងរបស់ថ្នាក់ដឹកនាំក្រុងទាំងឡាយនៃមាត់សមុទ្រឱ្យនៅតែស្រស់ស្អាតដ៏ប្រណិតសួនឱទ្យានមានផ្កាចម្រុះពណ៌ អាគារប្រវត្តិសាស្ត្រទាំងឡាយថែរទាំដូចជាមានម្ចាស់កំពុងរស់នៅទីនោះនៅឡើយធ្វើឱ្យអារម្មណ៍រំសាយរីករាយធូរស្បើយពីការនឿយហត់នានាពីមុនមកមិនខុសចិត្តមែន...មុននឹងសំដៅទៅរកមាត់សមុទ្រដ៏វែងលាតសន្ធឹងតាមបណ្តោយមាត់សមុទ្រ"អាត់ឡង់ទីក"។

នាថ្ងៃត្រង់នេះមេឃក៏ស្រឡះល្អយើងក៏បានបើករថយន្តយឺតៗយ៉ាងនឿយហត់ហេវទៅហើយ



ទៅឈប់សំចតនៅចំណតឡាន ដូច្នេះដ៏ធំមួយដើម្បីយើងចូលស្រស់ស្រូបនាភោជនីយដ្ឋានផលិតផលសមុទ្រដ៏មានប្រជាប្រិយមួយនាកណ្តាលក្រុងញូវភ័ត។ មែនក្តាម ខ្ចង បង្កង បង្គារ បំរើនៅក្តៅហុយៗ ស្រស់ៗថ្មីៗ ធ្វើឱ្យយើងស្រក់ទឹកមាត់ច្រោកៗដោយស្រេកឃ្លាន។

ស្រស់ស្រូបថ្ងៃត្រង់រួចហើយ យើងដើរលេងមួយជុំឱ្យស្រកពោះរួចសំដៅទៅមាត់សមុទ្រញូវភ័តដ៏ល្បីល្បាញនៃរដ្ឋរ៉ូដអាយឡិន ។ ដោយសារមេឃស្រឡះល្អនៃថ្ងៃនេះ ហើយបានជាឆ្នេរខ្សាច់ញូភ័តមានអ្នកមកលេងសមុទ្រអ៊ូរអររកប្រជ្រៀតកន្លែងតាំងទីបានយ៉ាងលំបាក។ ឆ្នេរខ្សាច់ធំៗមានពាក់កន្លែងជាប់ៗគ្នារលកសមុទ្រធំ គួរសមនាំអ្នកលេងកីឡាបណ្តែតទឹកមកច្រើនមានការថែទាំសំអាតមានអ្នកយាមអ្នករកស៊ីជួលអីវ៉ាន់កំសាន្តមានគ្រូពិនិត្យអ្នកហែលទឹកកុំឱ្យគ្រោះថ្នាក់ដូចជាពិធីបុណ្យធំអ៊ីចឹង។

តំបន់ញូវភ័តនៃរដ្ឋរ៉ូដអាយឡិននេះ ក៏ដូចជាតំបន់ជាប់គ្នានៃ"ខេបខត"CAP COD នៃរដ្ឋមាសាឈូសែតដែរ មានជីវភាពចង្អៀតណែនតែ៦ខែប៉ុណ្ណោះ ក្នុងមួយឆ្នាំនៅសល់៦ខែទៀត គេសម្រាកនាខែត្រជាក់ ឬក៏រៀបចំសម្រាប់រកស៊ីប្រដេញនឹងគេ នា៦ខែនៃពេលរដូវក្តៅត្រឡប់មកវិញ។នៅមានសកម្មភាពខ្លះដែរដែលនៅរក្សាទុកឱ្យទេសចរណ៍មកទស្សនាដូចជាអាគារដែលបានក្លាយជាជាសារមន្ទីរមានឱ្យប្រេក័រទះ E BRAKERS-ស្ពាត្តូស៊ូមែ CHATEAU-SUR -MER ឬ ឃីងខូត KING COTE ជាដើមនៅមានច្រើនទៀត មានសោភ័ណ្ឌភាពជាផ្ទះអភិជនមានអំណាចមានទ្រព្យមានអ្នកបំរើច្រើន កាលពីសតវត្សមុន ។ ប្រវត្តិទាំងនោះ បានត្រូវក្រុមអភិរក្សរៀបចំយកមកបង្ហាញសាធារណជនឱ្យបានក្បោះក្បាយ ដូចដែលធ្លាប់មានពិតៗពីមុនមក ។

*លេខក្រោយយើងនឹងសរសេរអំពីអាគារដែលស្មើនឹងប្រាសាទទាំងឡាយនៅញូវភ័ត ជូនជាសណ្តាប់ជាបន្តទៅទៀតនៅភាគ៤ ។*

# តើភាពជាដៃគូរវាងកម្ពុជា និងចិនជំរុញសេដ្ឋកិច្ច ឬបង្កហានិភ័យដល់កម្ពុជាពេលអនាគត?


លឹម គិមយ៉ា

ថ្នាក់ដឹកនាំរដ្ឋាភិបាលខ្មែរតែងតែទៅទស្សនកិច្ចនៅប្រទេសចិនច្រើនជាងគេ។ រាល់ទស្សនកិច្ចម្តងៗថ្នាក់ដឹកនាំប្រទេសទាំងពីរតែងតែចុះកិច្ចព្រមព្រៀងសំខាន់នានាដូចជាការធ្វើពាណិជ្ជកម្មការលើកលែងពន្ធរួមទាំងការផ្តល់កម្ចីដល់ប្រទេសកម្ពុជាជាដើម។

ទំនាក់ទំនងនេះកាន់តែបង្ហាញភាពជិតស្និទ្ធរហូតដល់ខ្មែរទទួលស្គាល់ថាប្រទេសចិនជាដៃគូអភិវឌ្ឍន៍គ្រប់ជ្រុងជ្រោយដែលមិនអាចខ្វះបាន ។

តើភាពជាដៃគូនេះអាចជំរុញសេដ្ឋកិច្ចកាន់តែរឹងមាំឬបង្កជាហានិភ័យសម្រាប់សង្គមខ្មែរនាពេលអនាគត? នេះជាសំនួររបស់វិទ្យុអាស៊ីសេរី ។

ដើម្បីពិចារណាទៅលើសំនួរនេះទៅបានទាល់តែយើងមើលពីប្រវត្តិនៃការទំនាក់ទំនងរវាង ខ្មែរ និង ចិន ហើយនឹងការទំនាក់ទំនងរវាងចិន និងប្រទេសដ៏ទៃ ដូចជានៅទ្វីបអាហ្វ្រិកជាដើម។

ប្រទេសខ្មែរធ្លាក់ចូលក្នុងឥទ្ធិពលចិនកាលពីជំនាន់ឆ្នាំ១៩៦០ ដោយសារតែជំនួយអត់ចំណងរបស់ចិនដែលរាជរដ្ឋាភិបាលខ្មែរបានទទួលពីចិន ។ ហើយនៅពេលនោះ រាជរដ្ឋាភិបាលខ្មែរឈប់ទទួលជំនួយពីសហរដ្ឋអាមេរិក ព្រមទាំងផ្តាច់ទូតជាមួយប្រទេសនេះថែមទៅទៀត។

ដោយសារតែខ្មែរនៅក្រោមឥទ្ធិពលចិនដូច្នេះហើយចិនបានជំរុញខ្មែរឱ្យជួយយួនហាណូយក្នុងការធ្វើសង្គ្រាមឈ្លានពានយួនខាងត្បូង ។ នយោបាយនេះ ជំរុញឱ្យខ្មែរមានវិបត្តិនយោបាយទាល់តែសភាខ្មែរដកសេចក្តីទុកចិត្តពីសម្តេចសីហនុចេញពីតំណែងប្រមុខរដ្ឋ ។

ចិនជំរុញប្រទេសខ្មែរឱ្យមានសង្គ្រាមដែលដឹកនាំដោយសម្តេចសីហនុ ហើយយួនជាអ្នកបញ្ជាទ័ព ចំណែកពួកខ្មែរក្រហម និងខ្មែរវៀតមិញ គណបក្សប្រជាជនជាអ្នកសែងគ្រាប់។ ចិនបានជួយក្នុងការធ្វើសង្គ្រាមនេះ តែជំនួយនេះមិនមែនជាជំនួយឥតសំណងនោះទេ ។ ដូចយើងឃើញ កាលពីសម័យខ្មែរក្រហមកាន់អំណាចខ្មែរក្រហមបានបញ្ជូនភោគផលប្រទេសខ្មែរដើម្បីសងបំណុលទៅឱ្យចិន ដែលបណ្តាលឱ្យប្រជាពលរដ្ឋខ្មែរមួយប្រទេសអត់ឃ្លានអស់រយៈពេលជិត៤ឆ្នាំព្រមទាំងប្រទេសហិនហោចរហូតមកដល់សព្វថ្ងៃនេះ ។

ចំណែកខ្មែរដែលជំពាក់លុយសហរដ្ឋអាមេរិកជំនាន់នោះ គឺខ្ចីលុយយកមកទិញស្បៀងដើម្បីចិញ្ចឹមប្រជាពលរដ្ឋដោយសារសង្គ្រាមឈ្លានពានពីពួកកុម្មុយនិសអាស៊ី។

កាលពីដើមខែកញ្ញាឆ្នាំ២០១៤នៅពេលដែលទៅចូលរួមពិព័រណ៍ចិនអាស៊ានលើកទី១១ លោក ហ៊ុន សែន បានស្នើសុំទៅរដ្ឋាភិបាលចិន-ផ្តល់គម្រោងកម្ចីក្នុងផ្នែកសហប្រតិបត្តិការទ្វេភាគីសម្រាប់វិស័យការពារជាតិនិងសន្តិសុខជាតិ។ ប្រទេសខ្មែរមានការខ្វះខាតយ៉ាងច្រើនគ្រប់វិស័យ តើយើងចាំបាច់ត្រូវពង្រឹងវិស័យការពារជាតិ និងសន្តិសុខជាតិទេ ? ដែលខ្មែរមានការការពារបូរណភាពទឹកដីនយោបាយពីសហគមន៍អន្តរជាតិក្រោយពីមានសន្ធិសញ្ញាទីក្រុងប៉ារីសកាលថ្ងៃទី២៣តុលា ១៩៩១។

ទំនាក់ទំនងចិនជាមួយប្រទេសអាហ្វ្រិកក៏ស្ថិតនៅលើផលប្រយោជន៍ចិនដោយផ្តោតទៅលើវិស័យកសិកម្មការរុករករ៉ែ និងប្រេងកាតដែលចិនត្រូវការក្នុងការអភិវឌ្ឍន៍សេដ្ឋកិច្ចប្រទេសខ្លួន ។ ចិនអត់ទៅខ្វល់ពីការអភិវឌ្ឍន៍សេដ្ឋកិច្ចប្រទេសអស់នោះទេ ដែលធ្វើឱ្យប៉ះពាល់ដល់សង្គម និងប្រជាពលរដ្ឋប្រទេសទាំងនោះយ៉ាងធ្ងន់ធ្ងរក្នុងនោះបានធ្វើឱ្យប្រជាពលរដ្ឋបានបាត់បង់ដីធ្លីផ្ទះសម្បែងប៉ះពាល់ដល់បរិស្ថានដូចជានៅប្រទេសខ្មែរដែរ។

សង្គមស៊ីវិលនិងស្ថាប័នផ្តល់ជំនួយដល់ប្រទេសកម្ពុជាក្នុងនោះរួមមានធនាគារអភិវឌ្ឍន៍អាស៊ី (ADB) បានធ្វើការរិះគន់ពីតួនាទីរបស់ចិននៅក្នុងការអភិវឌ្ឍន៍សេដ្ឋកិច្ចរបស់កម្ពុជានោះគឺធ្វើឡើងក្នុងរូបភាពជាកម្ចីសម្បទានមិនមែនការផ្តល់ជំនួយឥតសំណងនោះទេ។ហើយបានប៉ះពាល់ដល់សង្គមនិងប្រជាពលរដ្ឋខ្មែរក្នុងនោះបានធ្វើឱ្យប្រជាពលរដ្ឋខ្មែរបាត់បង់ដីធ្លីផ្ទះសម្បែងប៉ះពាល់ដល់បរិស្ថាននិងបន្ទុកនៃការជំពាក់បំណុលបរទេសរបស់ប្រជាពលរដ្ឋខ្មែរនឹងកើនឡើងយ៉ាងច្រើនលើសលុប។

ការដែលចិនឱ្យខ្មែរខ្ចីលុយដ៏ស្រួលៗនេះធ្វើឱ្យមានការពុករលួយទៅលើប្រាក់កម្ចីជាច្រើនលានដុល្លាគង់តែបុគ្គលិកចិនខ្លះក៏បានទទួលផលប្រ-យោជន៍ពីលុយកម្ចីនេះដែរ។ភាពពុករលួយមិនអាចជំរុញសេដ្ឋកិច្ចឱ្យរឹងមាំបាននោះទេព្រមទាំងជំរុញឱ្យមានភាពអយុត្តិធម៌ក្នុងសង្គមយ៉ាងខ្លាំង។

បើយើងមើលឱ្យលំអិតទៅលើរបាយការណ៍ពីលក្ខខណ្ឌនៃហិរញ្ញប្បទានឥណទានសម្បទានទាំងអស់រវាងខ្មែរនិងប្រទេសដទៃឬស្ថាប័ននានាឃើញថា តម្លៃលុយខ្ចីពីចិនខ្ពស់ជាងគេដោយចិនគិតតាំងពីកម្រៃគ្រប់គ្រងនិងកម្រៃសន្យាដែលអ្នកឱ្យខ្ចីខ្លះផ្សេងទៀតមិនបានគិតកម្រៃអស់នោះទេ ។ រហូតមកដល់ខែកក្កដា ២០១៤ រាជរដ្ឋាភិបាលខ្មែរបានខ្ចីគេចំនួន២១៨បំណុលហើយបំណុលជាច្រើនមិនបានធ្វើតាមគម្រោងនិងកម្មវិធីនោះទេដោយបានដកលុយខ្លះយកមកចាយតែប៉ុណ្ណោះ។

ហេតុនេះទៅអនាគតប្រទេសកម្ពុជានឹងជួបហានិភ័យទៅលើប្រាក់កម្ចីដោយសារគ្មានមធ្យោបាយនឹងសងគេដូចប្រទេសខ្លះដូចជាប្រទេសក្រេចប្រទេសអាហ្សង់ទីនជាដើម។ ហានិភ័យនេះនឹងធ្វើឱ្យប្រជាពលរដ្ឋខ្មែរកាន់តែក្រទៅៗទៀត៕

**លឹម គីមយ៉ា តំណាងរាស្ត្រ**

តមកពីទំព័រទី ១០

## គួររៀនសូត្រពីចៅហ្វាយនាយខ្លះហើយ...

នោះតូចជាងកោះត្រល់ខ្មែរយើងរាប់រយពាន់ដង។ ហើយពេលដែលកងទ័ពចិននឹងយួនកំពុងច្បាំងគ្នាដើម្បីដណ្តើមកាន់កាប់កោះនោះ ប្រជាជនវៀតណាមស្នេហាជាតិបានធ្វើបាតុកម្មប្រឆាំងមហាមិត្តចិនស៊ីងរាល់ថៃនៅពាសពេញប្រទេសគេ ។ បាតុកម្មអហឹង្សាបានក្លាយជាកុប្បកម្មដុតរោងចក្រចិននឹងដេញវាយម្ចាស់រោងចក្រជាជនជាតិចិនឱ្យរត់ធ្លាយដល់ស្រុកខ្មែរសុំជ្រកកោនរង់ចាំប្រជាជនស្នេហាជាតិវៀតណាមសប់កំហឹនសិន ទើបហ៊ានត្រឡប់ទៅវិញ។ អ្នករត់ម៉ូតូឌុប,គាត់ស៊ីមិនព្រមទទួលដឹកជញ្ជូនភ្ញៀវជាជនជាតិចិន,សណ្ឋាគារ,អាហារដ្ឋានក៏មានអាការៈដូចគ្នាចំពោះមហាមិត្តចិនក្នុងគ្រានោះ។ រដ្ឋាភិបាលគេមិនខំប្រឹងប្រែងស្វែងរកអ្នកធ្វើកុប្បកម្មប្រឆាំងមហាមិត្តចិនរបស់គេដូចរដ្ឋាភិបាល ហ៊ុន សែន សោះឡើយ។

និយាយឱ្យខ្លីទៅអស់លោកអ្នកដឹកនាំខ្មែរសព្វថ្ងៃស្វែងរកបានគ្រូល្អហើយតែគួរឱ្យស្តាយណាស់អស់លោកមិនព្រមរៀនតាមគំរូល្អរបស់លោកគ្រូសោះ,រៀនបានតែគំរូអាក្រក់ដែលគេបានបោះបង់ចោលឱ្យយើង។ បើកភ្នែកមើលគេពេលវេលានៅសល់សម្រាប់កែខ្លួននៅតិចណាស់លុយកាក់មាសប្រាក់ដែលអស់លោកខំប្រមូលជាង៣០ឆ្នាំនេះវាមិនងាយគ្រប់គ្រាន់ទេ ល្មមមើលជនរួមជាតិក្រីក្រ,ក្មេងៗមិនបានទៅសាលារៀនរស់លើគំនរសម្រាម,ស្រីក្មេងៗសុខចិត្តលះបង់កេរ្តិ៍ខ្មាស់ចោលផ្ទះទៅយកប្តីស្រុកគេក្រែងមានជីវភាពធូរធារបន្តិចខ្លះគ្មានទាំងបានវិលមកស្រុកផងត្រូវគេកេងប្រវ័ញ្ចធ្វើបាបជួញដូរដូចសត្វរហូតដល់បាត់បង់ជីវិត។ ជនចំណាកស្រុកកាន់តែកើនឡើងរាល់ឆ្នាំគ្មានជំរើសទេ ត្រូវដឹកកូនជញ្ជូនចៅទៅនៅស្រុកគេ ព្រោះតែចង់បានឆ្អែតក្រពះស្រែកឃ្លានហើយត្រូវគេប្រើដូចសត្វធាតុ,គេបង្ខំឱ្យប្រើគ្រឿងញៀនដើម្បីចម្រាញ់យកឱ្យអស់ឋាមពលគ្នា ហើយចុងក្រោយមានតែខូចខ្លួន,ពិការនឹងស្លាប់។ នេះជាបុព្វហេតុបណ្តោយឱ្យជនអន្តោប្រវេសន៍ខុសច្បាប់ចូលមករស់នៅពេញស្រុកបង្កអណាធិបតេយ្យពាសពេញនគរ។ អស់លោកនឹងកូនចៅអស់លោកថៃក្រោយទៅក៏ត្រូវលំបាកវេទនាទាំងអស់គ្នា ព្រោះយើងក្លាយជាជនភាគតិចនៅក្នុងស្រុករបស់ខ្លួន។ ល្មមរៀនធ្វើតាមលោកគ្រូវិញម្តងហើយ, ពីព្រោះតែដុល្លារអស់លោកខំប្រឹងបំផ្លាញព្រៃឈើ,បណ្តេញរាស្ត្រប្រជាឱ្យចាកចោលផ្ទះសំបែងទៅដេកហាលភ្លៀង,អត់បាយទឹក,យំថ្ងូរស្រែកដង្ហោយគ្រប់ស្រុកដែលល្បីថា ព្រះពុទ្ធសាសនាជាសាសនារបស់រដ្ឋនេះ។ ល្មមភ្ញាក់ខ្លួនឡើងអស់លោកអ្នកដឹកនាំខ្មែរ! ជីវិតមិនមែនអមតៈទេ ទោះមានលុយដុល្លារប៉ុន្មានកោដិក៏ដោយ។ គួរសន្សំបុណ្យទុកឱ្យកូនប្រសើរជាង ៕

តមកពីទំព័រទី ១៩

## ស.រ.អាធ្វើសង្គ្រាមប្រឆាំងនឹងទ័ពអ៊ីស្លាម...

ដែលជាហេតុធ្វើឱ្យរដ្ឋាភិបាលអ៊ីរ៉ាក់ទទួលការគៀបសង្កត់ពីចលនាភេរវកម្មអ៊ីស្លាមគាំទ្រដោយប្រទេសស៊ីរីនឹងអ៊ីរ៉ង់កាន់តែខ្លាំងឡើងរហូតដល់យកបានភាគខ្លះនៃអ៊ីរ៉ាក់ទៀតផង។ ស្ថានភាពនេះបណ្តាលឱ្យគណបក្សសាធារណរដ្ឋបន្ទោសលោក បារាក់ អូបាម៉ា ថា មកពីប្រញាប់ដកទ័ពអាមេរិកាំងចេញពីអ៊ីរ៉ាក់ពេកធ្វើឱ្យភេរវករពីភពលោក អាខាយ ដាបានដៃបកវាយយកអ៊ីរ៉ាក់ស្ទើរបួតបាន។

នៅលើប្រតិបត្តិការសឹកលើកនេះទៀតលោកប្រធានាធិបតីអាមេរិកាំងមានមោទនភាពនឹងនិយាយថា សហរដ្ឋអាមេរិកមិនទៅច្បាំងតែម្នាក់ឯងទេ គឺមានទ័ព "ណេតូ" នឹងប្រទេសអារ៉ាប់ដែលប្រឆាំងនឹងក្រុមភេរវកម្មចូលរួមផង ដូចជាប្រទេសបារេនជចដានីអារាប៊ីសាអ៊ូឌីកូតានឹងអារ៉ាប់ រួម ។

ការវាយប្រហារតាមជើងអាកាសមកទល់នឹងចុងសប្តាហ៍ទី១នេះបានកំទេច ជំរុំហាត់ហ្វឹកហ្វឺនយុទ្ធជនភេរវករទីតាំងយោធាធំៗនៅស៊ីរីយានឹងនៅអ៊ីរ៉ាក់ដែល "អាយស៊ីស" យកបាន ជាពិសេសបំផ្លាញទីតាំងចំរាញ់ប្រេងកាតដ៏សំខាន់ដែលរៀងរាល់ថ្ងៃផ្តល់ថវិកាឱ្យភេរវករ២លានដុល្លាដល់ក្រុម "អាយស៊ីស"។

យោធានៃទីបញ្ជាការធំ "ប៉ង់តាគួន" និយាយថា នាវាបាញ់កាំជ្រួច "ថម៉ាហក" ៤៧គ្រឿងកំពុងប្រចាំការនៅសមុទ្រហ្វីលីពីនមានទីបញ្ជាការនៅសមុទ្រក្រហមនឹងនៅខាងជើងនៃឈូងសមុទ្រអារាប៊ីសម្រាប់បញ្ជាពីចម្ងាយឱ្យបាញ់ទៅគោលដៅណាមួយនៅស៊ីរីយាក៏ដូចជានៅអ៊ីរ៉ាក់ដែរ ។ពីទីនោះក៏ជាទីបញ្ជាការផងដែរសម្រាប់កងកម្លាំងណាវីអាមេរិកាំងឱ្យបញ្ជូនយន្តហោះប្រដេញ ឬទម្លាក់គ្រាប់បែកទៅគាំទ្រកងទ័ពសម្ពន្ធមិត្រដែលមានបេសកកម្មនៅជើងគោក។ បេសកកម្មជើងអាកាសចុងក្រោយនេះលោកប្រធានាធិបតីអូបាម៉ា មានបំណងជម្រុញឱ្យទ័ពជើងគោកសម្ព័ន្ធមិត្រជាពិសេសទ័ពរដ្ឋាភិបាលអ៊ីរ៉ាកនឹងចលនារំដោះស៊ីរីមានកម្លាំងនឹងមានប្រៀបបន្ទាប់ពីវាយឡើងទៅមុខលែងរួចមកឱ្យអាចត្រឡប់ទៅវាយបកយកទីតាំងខ្លះឱ្យបានមកវិញ។

ការវាយប្រហារនេះមិនបានធ្វើឱ្យក្រុម "អាយស៊ីស" បន្ទាប់ការគម្រាមកំហែងត្រឡប់វិញទេ ក្រុមអ្នកស៊ើបការសំងាត់បានឱ្យដឹងកាលពីថ្ងៃព្រហស្បតិ៍ ទី២៥ នេះមកថា ពួកភេរវករមានសញ្ជាតិអាមេរិកាំងនឹងបារាំងនឹងមកធ្វើការអុកឡុកនៅក្រុងញូយ៉កនឹងនៅក្រុងប៉ារីសតបវិញ ៕

Continued from Page 16

# Documents Shed Light on...

operational guidelines, obtained over the weekend, provides new details about the plan.

The documents confirm some of the basics of the four-year deal laid out Friday. They say Australia will bear all costs for resettling and supporting the refugees—even flying Cambodian officials to Nauru to meet with eligible families—and that all transfers will be voluntary.

And while neither Cambodian nor Australian officials have said where the refugees will stay in Cambodia, the guidelines state they will be provided temporary accommodation in Phnom Penh "until they have achieved basic Khmer language skills and have passed a medical examination."

After that, the guidelines say, Australia and Cambodia "will collaborate in finding a location outside of Phnom Penh for the delivery of services for the settlement of refugees."

"Settlement services" will cover everything from private accommodation to language and job training, business start-up loans, food, clothes, health services and "other" expenses both sides agree to later, the guidelines say.

"Settlement services will be provided for 12 months from the date of departure from temporary accommodations of each refugee," the guidelines say. "Following the first 12 months, an assessment will be made on a case-by-case basis of any further need for settlement services."

Mr. Kheng could not be reached Sunday. Sok Phal, director of the interior Ministry's immigration department, declined to comment.

Denise Coghlan, who heads the Jesuit refugee service in Phnom Penh, said 12 months of assistance was unlikely to be enough for some of the new refugees.

"People who are sick and mentally traumatized, those who cannot find employment, will need basic assistance longer. If the refugees are given a monthly allowance after the year, this should be tapered off over another year so refugees can gradually adjust," she said.

Ms. Coghlan said the deal was also ambiguous about where the refugees would learn basic Khmer in Phnom Penh, because it only mentions providing "services" outside of the capital, and does not provide specifics about moving them out of the city.

She noted that most of the 60 or so refugees currently living in Cambodia have settled on the outskirts of the capital, and that the new arrivals should not have to face any additional restrictions on where they can live.

"Freedom to resettle where they like seems the best option," she said.

The MoU and guidelines say services for the refugees will be "commensurate with local community standards" and that the resettled individuals will be provided with the documents they need to find work and send their children to school.

The MoU provides no information on how many refugees Cambodia will take in from Nauru—where just over 200 of the roughly 1,000 asylum seekers there have had their applications for refugee status approved—and leaves the timing up to Cambodia. On Thursday, the interior Ministry's Mr. Kheng said an initial "pilot project" would see no more than five refugees resettled in the country.

The documents also do not say how much the deal might cost Australia in total.

On Friday, however, Mr. Morrison told the Australian broadcasting Corporation that Australia would be boosting its aid package to Cambodia by $40 million over the four-year span of the refugee deal. According the ABC report, Australian Foreign affairs Minister Julie bishop said the money "will be directed toward enhancing the competitiveness of Cambodian rice exports and the country's capacity to clear land mines."

The MoU, however, says some of the additional Australian aid coming Cambodia's way will go specifically to those communities where the refugees eventually settle.

"The government of Australia will provide additional development assistance within the agreed bilateral development priorities," it says, "including to ensure benefits to local communities where refugees are settled."

Optimistically, the MoU also says that Cambodia and Australia will "work closely" with the UNHCR on the deal. The U.N. refugee agency has criticized the plan and says it has "no role" in it. It says the deal is unsustainable and that Australia's palming off of the refugees to Cambodia sets a dangerous global precedent.

Other critics of the deal say Australia is also breaking its contract with Nauru to find "a third safe country" for the asylum seekers.

The Minority rights Group international said in a statement Sunday that it was "deeply alarmed" by the pending transfer of refugees to Cambodia, "which has a track record of deporting ethnic minorities, including uighurs from China and Montegnards from Vietnam, back to their home countries," where some of them have been arrested, jailed and sentenced to forced labor.

"Cambodia has repeatedly proven that it is not a safe country for ethnic minorities fleeing persecution," Mark Lettimer, the London-based group's executive director, said in the statement.

"The prospect of new asylum seekers or refugees being systematically resettled there from Australia is deeply unsettling."

តមកពីទំព័រទី ០៩

## ពិធីបុណ្យចេញព្រះវស្សា និងបុណ្យកឋិន...

ក៏បានសម្តែងនូវក្តីករុណាមេត្តាដល់ការលំបាករបស់បុព្វជិតទាំងនោះ ស្របពេលដែលមានឧបាសកឧបាសិកា ទើបនឹងប្រគេនថ្វាយត្រៃចីវរដល់ព្រះអង្គ ។ ព្រះអង្គក៏យកត្រៃចីវរនោះ ប្រទានទៅឱ្យភិក្ខុ១អង្គក្នុងចំណោម៣០អង្គ ។ ព្រះអង្គក៏បានបន្ថយនូវវិន័យហាមឃាត់មិនឱ្យព្រះសង្ឃនិមន្តទៅសួរសុខទុក្ខញាតិញោមលើសកំណត់ពាដងក្នុងពេលកាន់ព្រះវស្សាជាដើម ។

រួចហើយព្រះអង្គក៏បានបើកនិតីបញ្ញាត្តិឱ្យព្រះសង្ឃមានសិទ្ធប្រទានក្រណាត់ ឬទទួលក្រណាត់យកទៅដេរ ជាត្រៃចីវរ ។

**ព្រះអង្គបានសម្តែងថា:** នៅខណៈពេលចេញព្រះវស្សានេះ នឹងមានឧសបាសក ឧសបាសិកា យកមកប្រគេនដល់ចំណោមជុំនុំសង្ឃ ប៉ុន្តែមិនមែនជារបស់ឯកជនសង្ឃណាឡើយ ។

ជាធម្មតាមានការជ្រើសរើសព្រះសង្ឃពីរអង្គក្នុងចំណោមព្រះអង្គទាំងអស់ក្នុងអារាម ដើម្បីទទួលត្រៃចីវរដែលទាយកទាយិកាមានសទ្ធាជ្រះថ្លាយកមកប្រគេន ។ ព្រះសង្ឃមិនអាចមានសំណូមពរចង់បានត្រៃចីវរដោយខ្លួនឯងឡើយ ទោះបីជាមានការបន្ទិចបន្ទួចពាក្យសំដីឱ្យព្រះសង្ឃទូទៅយកត្រៃចីវរនោះប្រើប្រាស់ក៏ដោយ ។

ក្នុងខណៈដែលដេរត្រៃចីវរ គេត្រូវលាក្រណាត់នោះនៅលើគម្រោងមួយគម្រោងនោះ ហៅថា "កឋិន" បានន័យថា ភាពស្ថិតស្ថេរ ម្លោះហើយ ទើបមានរាងកឋិនទាន ឬគ្រោងកឋិនរហូតរៀងមកដល់សព្វថ្ងៃ ៕

# ទិកនិចបន្ថែមភាពភ្លឺរលោងដល់សក់រួញ



**ស្ត្រីដែលមានសក់រួញក្រាស់ងាយនឹងធ្វើឱ្យសក់ស្គុត ហើយប្រសិនបើអ្នកចង់ឱ្យសក់ដែលស្គុតនោះត្រឡប់ជាស្រស់ស្អាតវិញ អ្នកគួរអនុវត្តនូវវិធីទាំង៥ដូចខាងក្រោមនេះ :**

### ១-បន្ថែមសំណើម :

សម្រាប់សក់ដែលបាក់ ឬមានគន្លាក់ដោយការចងសក់ងាយនឹងទទួលរងការខូចខាតកន្ទ្រើងដែលជាហេតុធ្វើឱ្យសក់បាត់បង់ភាពសំណើម ។ អ្នកអាចកែខៃបានដោយប្រើសាប៊ូកក់សក់ និងក្រែមម៉ាស្សាសម្រាប់សក់ដែលអ៊ុត ឬសក់ដែលរួញ ព្រោះវាធ្វើឱ្យសក់មានសំណើមជាងមុន ។ ប្រសិនបើអ្នកខូចខាតខ្លាំងអ្នកគួរម៉ាស្សាស្បែកក្បាល និងសរសៃសក់បន្ទាប់ពីកក់រួច ព្រោះវាអាចជួយធ្វើឱ្យសរសៃសក់រឹងមាំបានល្អជាងការប្រើក្រែមបំប៉នសក់ ។

### ២-ប្រើផលិតផលបំប៉នសក់ប្រភេទមិនចាំបាច់លាងទឹកចេញ :

សម្រាប់សក់ដែលធ្លាប់អ៊ុត ឬសក់ដែលរួញខូចភាគច្រើនមិនមានភាពភ្លឺរលោងនោះទេ ដូចនេះអ្នកគួរប្រើក្រែមផ្តល់សំណើមប្រភេទទឹក (Leave in Moisturizer) ដែលជួយបន្ថែមភាពស្រស់ស្អាតដល់សរសៃសក់ ។

### ៣-ធ្វើសក់ឱ្យមានរលក :

ដោយប្រើក្រែមជំនួយសរសៃសក់សម្រាប់សក់អ៊ុតដើម្បីបន្ថែមជាតិសំណើមផៃទាំអាចជួយឱ្យសក់មានរលកស្អាត ។

### ៤-ប្រើក្បាលរបស់ម៉ាស៊ីនផ្លុំសក់ឱ្យបានត្រឹមត្រូវ :

ម៉ាស៊ីនផ្លុំសក់ទូទៅភាគច្រើនធ្វើឱ្យសរសៃសក់ប៉ើងរញ៉េរញ៉ៃបណ្តាលឱ្យឱ្យពិបាកក្នុងការសិតសក់ ។ ដូចនេះអ្នកចាំបាច់ត្រូវជ្រើសរើសក្បាលរបស់ប្រដាប់ផ្លុំសក់ឱ្យបានសមស្រប ព្រោះវាអាចកំណត់កម្តៅបានយ៉ាងល្អ ជាពិសេសអ្នកគួរជ្រើសរើសក្បាលប្រដាប់ផ្លុំសក់ដែលប្រើសម្រាប់សក់អ៊ុត ។

### ៥-បន្ថែមភាពភ្លឺថ្លាដល់សរសៃសក់ :

អ្នកអាចបំពោកប្រេង ឬស៊ីរ៉ាំងឱ្យសព្វសរសៃសក់ដើម្បីធ្វើឱ្យសក់ស្រស់ស្អាតរួមទាំងជួយបន្ថយបញ្ហាសក់រឹងកន្ទ្រើងផងដែរ ៕

## តមកពីទំព័រទី ១៦ ក្រុមជនភៀសខ្លួននៅអូស្ត្រាលីបដិសេធ...

បានទៅដឹកនាំបាតុកម្មប្រឆាំងនឹងកិច្ចព្រមព្រៀង ហើយបានបដិសេធមិនផឹក ឬញ៉ាំរយៈពេល២ថ្ងៃ។

ក្មេងស្រីម្នាក់ទៀត ដែលលេបសាប៊ូបោកខោអាវបណ្ដាលឱ្យក្អួតឈាមនោះបានសះស្បើយនៅមន្ទីរពេទ្យទីក្រុងស៊ីដនី កាលពីម្សិលមិញ បន្ទាប់ពីត្រូវបានបញ្ជូនតាមផ្លូវអាកាសពីកោះកាលពីថ្ងៃចុងសប្ដាហ៍។

ម្សិលមិញ គឺជាថ្ងៃទី៤ នៃបាតុកម្មលើកោះប្រឆាំងនឹងផែនការតាំងលំនៅថ្មីដែលសម្បូរទៅដោយករណីប៉ុនប៉ងធ្វើអត្តឃាតនិងបង្ករបួសខ្លួនឯងក្នុងចំណោមកុមារ។

មន្ត្រីពីស្ថានទូតអូស្ត្រាលីនៅភ្នំពេញ និងលោក Scott Morrison រដ្ឋមន្ត្រីអន្តោប្រវេសន៍ ពុំឆ្លើយតបនឹងការសុំការអត្ថាធិប្បាយទេ កាលពីម្សិលមិញ។

លោក Morrison ដែលត្រូវបានមើលឃើញថា ជាតារាកំពុងរះក្នុងរដ្ឋាភិបាលលោកនាយករដ្ឋមន្ត្រី Tony Abbott បានចុះកិច្ចព្រមព្រៀងនៅក្រសួងមហាផ្ទៃ កាលពីថ្ងៃសុក្រទន្ទឹមនឹងពេលជនស្នើសុំសិទ្ធិជ្រកកោនមួយចំនួនព្យាយាមធ្វើអត្តឃាត។

ការចុះហត្ថលេខានេះបានធ្វើឡើង បន្ទាប់ពីការចរចាដោយសម្ងាត់រវាងប្រទេសទាំងពីរ ចាប់តាំងពីលទ្ធភាពក្នុងការបញ្ជូនជនភៀសខ្លួនមកកម្ពុជាត្រូវបានលើកឡើង កាលពីខែកុម្ភៈ ក្នុងជំនួបរវាងលោកស្រី Julie Bishop រដ្ឋមន្ត្រីការបរទេសអូស្ត្រាលីជាមួយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន។

លោកស្រី Bishop បានប្រាប់ទូរទស្សន៍ ABC កាលពីថ្ងៃអាទិត្យថា កិច្ចព្រមព្រៀងនឹងផ្ដល់ប្រយោជន៍ដល់កម្ពុជា។ លោកស្រីបន្តថា: "កម្ពុជាចង់យកមនុស្សចូលក្នុងប្រទេសខ្លួនដែលអាចជួយឱ្យសេដ្ឋកិច្ចរីកចម្រើន។ ខ្ញុំមិនគិតថា ខ្ញុំ ឬក៏អ្នកទេ អាចប្រាប់ថា កម្ពុជាមិនអាចក្លាយជាទីតាំងសម្រាប់ជនភៀសខ្លួននោះ"។

មន្ត្រីកម្ពុជាកាលពីម្សិលមិញបានការពារកិច្ចព្រមព្រៀងនេះដោយបញ្ជាក់របាយការណ៍មុនៗថា កម្ពុជានឹងយកជនភៀសខ្លួនមួយចំនួនតូចជាបឋមសិន បន្ទាប់ពីមន្ត្រីបានចុះទៅពិនិត្យនៅកោះ Nauru។

ក្នុងសុន្ទរកថាថ្លែងទៅកាន់និស្សិតសាកលវិទ្យាល័យកាលពីម្សិលមិញ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានថ្លែងថា មានផែនទីបង្ហាញផ្លូវច្បាស់លាស់ ក្នុងការទទួលយកជនភៀសខ្លួនមកតាំងលំនៅថ្មីនៅប្រទេសកម្ពុជា។

លោកបានបន្តថា កម្ពុជានឹងទទួលយកជនភៀសខ្លួនមួយចំនួនពីអូស្ត្រាលីផ្អែកលើគោលការណ៍ស្ម័គ្រចិត្ត។ គ្មានអ្នកណាម្នាក់ត្រូវបង្ខំពួកគេឱ្យមកកម្ពុជាទេ។ កម្ពុជាមានផែនទីបង្ហាញផ្លូវច្បាស់ក្នុងការទទួលយកជនភៀសខ្លួនទាំងនេះ ហើយគ្មានអ្នកណានឹងស្ម័គ្រចិត្តមកកម្ពុជាទេ ប្រសិនគេមិនដឹងថា កម្ពុជាជាប្រទេសបែបណានោះ។

លោក ឡុង វិសាលោ រដ្ឋលេខាធិការក្រសួងការបរទេសបានប្រាប់អ្នកយកព័ត៌មានថា ក្រុមមន្ត្រីនឹងត្រូវបញ្ជូនទៅកោះ Nauru ដើម្បីធ្វើការវាយតម្លៃលើជនភៀសខ្លួន។

លោកបន្តថា: "យើងនឹងបញ្ជូនមន្ត្រីទៅកោះ Nauru ដើម្បីជូនដំណឹងជនភៀសខ្លួនអំពីកម្ពុជា។ ដូចជា ការរស់នៅប្រពៃណីទំនៀមទម្លាប់ និងសាសនា"។ លោកបន្ថែមថា ចំនួន និងពេលវេលានៃការមកដល់របស់ជនភៀសខ្លួនមិនទាន់សម្រេចទេ ហើយទីតាំងសម្រាប់ពួកគេរស់នៅក៏មិនទាន់កំណត់ដែរ។

លោកបញ្ជាក់ថា: "ការតាំងលំនៅបណ្ដោះអាសន្ន និងទីតាំងមកដល់គឺនៅភ្នំពេញ ប៉ុន្តែយើងនៅតែមិនដឹងទីតាំងទេ។ ការតាំងលំនៅជាអចិន្ត្រៃយ៍ និងការធ្វើសមាហរណកម្មក្នុងសហគមន៍កម្ពុជានៅមិនទាន់ដឹងទេប៉ុន្តែគឺនៅក្រៅរាជធានីភ្នំពេញ"។

លោកបានបន្តថា: "យើងមិនដឹងថា ជនភៀសខ្លួនប៉ុន្មាននាក់នឹងមកដល់ទេ ប៉ុន្តែលើកដំបូងមានចំនួនតិចតួច។ ប្រសិនមានបញ្ហាក្នុងគម្រោងសាកល្បងឱ្យកិច្ចព្រមព្រៀង" នឹងត្រូវធ្វើវិសោធនកម្ម។

លោកបន្តថា ទីភ្នាក់ងារជនភៀសខ្លួនរបស់អង្គការសហប្រជាជាតិ (UNHCR) នឹងសហការជាមួយនឹងអាជ្ញាធរ ប៉ុន្តែថា គេមិនទាន់ពិភាក្សាពីកិច្ចសហប្រតិបត្តិការនេះជាមួយនឹងទីភ្នាក់ងារនេះទេ។

លោក Vivian ទាន អ្នកនាំពាក្យការិយាល័យថ្នាក់តំបន់របស់ UNHCR នៅបាងកក ថ្លែងតាមអ៊ីមែលថា ប្រសិនបើគម្រោងនេះបរាជ័យ វានឹងធ្វើឱ្យជីវិតរបស់ជនភៀសខ្លួនកាន់តែមានហានិភ័យបន្ថែមទៀត។

លោកស្រីបន្តថា: ការពិតដែលកម្ពុជាមានប្រព័ន្ធជ្រកកោនដំណាក់កាលដំបូងមានការភ័យខ្លាចថា អាចមានការប្រព្រឹត្តទៅលើជនភៀសខ្លួនមានស្រាប់នៅកម្ពុជាខុសពីអ្នកតាំងលំនៅថ្មីពីកោះ Nauru ហើយបើជនភៀសខ្លួនមិនអាចធ្វើសមាហរណកម្មក្នុងសង្គមកម្ពុជាមានលទ្ធភាពដែលពួកគេអាចប្រថុយជីវិតផ្លាស់ទៅប្រទេសផ្សេងទៀតដើម្បីស្វែងរកទីសុវត្ថិភាព និងស្ថិរភាព៕

**Continued from page 16**

## Refugee groups in Australia...

Refugees said another refugee, who reportedly own throat after heard that it does not obtain a temporary visa in Australia, had not been heard, but 14-year-old daughter of a man has to take led demonstrations against the agreement and refused to drink or eat for 2 days.

A girl who swallowed, washing soap cause vomiting blood, was recovering in hospital Sydney yesterday after was sent by air from the island on the weekend.

Yesterday was the 4th day of demonstrations on the island against the resettlement plan with plenty of cases of attempted suicide and causing injury themselves among children.

Officials from the Australian Embassy in Phnom Penh and Scott Morrison Immigration Minister did not respond to a request for comment yesterday.

Mr Morrison, who was seen as a rising star in the government of Prime Minister Tony Abbott has signed a deal at the Ministry Friday At the same time requested the right to asylum of attempted suicide.

The sign was made after secret negotiations between the two countries since the ability to send refugees Cambodia was raised in February during the meeting between Ms Julie Bishop Australian Foreign Minister with Prime Minister Hun Sen. .

Ms Bishop told ABC television on Sunday that the deal will benefit the country. She said: 'want to get people into the country who could help the economy grow. I do not think I or you can tell that the country can not be home for refugees.

Cambodian officials yesterday defended the deal, confirmed previous reports that the country will take some refugees Small primary after officials had to check on the island of Nauru.

In his remarks to the university students yesterday, Prime Minister Hun Sen said that a clear roadma p the acceptance of refugees being resettled in the country.

He said the country will accept some refugees from Australia based on the **Continued to page 27**

ទស្សនៈនយោបាយ

ដោយ : ពុធ សុខសាន្ត

# ជឿ ឬមិនជឿ?

តើបងប្អូនជឿលើការដឹកនាំរបស់ប្រធានគណបក្ស អនុប្រធាន និងថ្នាក់ដឹកនាំទាំងអស់របស់គណបក្សសង្គ្រោះជាតិដែរ ឬទេ ?

គួរតែជឿហើយ សូម្បីលោក កឹម សុខា ឈ្លាសវៃនិយាយត្រូវសឹងតែមួយរយភាគរយក្តី ក៏ទាមទារការរួមចំណែកកសាងបក្សថ្មីមួយដែលមានឈ្មោះថា សង្គ្រោះជាតិនេះ ពីបក្សសម រង្ស៊ី ដែរ ។

មកពីការជឿទឹងទុកចិត្តនេះហើយ ទើបមានបងប្អូនខ្មែរយើងនៅក្នុងប្រទេស និងនៅក្រៅប្រទេសជួយជ្រោមជ្រែង រហូតឈ្នះការបោះឆ្នោតអាណត្តិទី៤ នេះបាន២៦អាសនៈ ។ មិនមែនជារឿងងាយទេ សល់ពីលួចឈ្នះ២៦កៅអីនៅក្នុងរដ្ឋសភា តើចាំបាច់ទៅខឹងធ្វើអីគ្រាន់តែបក្សសង្គ្រោះជាតិចូលសភា គួរតែចាំមើលបន្តិចសិន តើមានគណបក្សណាអាចដឹកនាំធ្វើបាតកម្មបានមនុស្សរាប់លាននាក់ដែរ ឬទេ?

ទោះបីមានអ្នកគាំទ្ររាប់អានអ្នកក្តីអ្នកមិនស្របតែ៥០០នាក់ ក៏ធ្វើឱ្យស្រអាប់បន្តិចដែរ តែមិនអីទេ! ក្រោយភ្លៀងមេឃស្រឡះ? បើសង្គ្រោះជាតិធ្វើបាតុកម្មទៀតជឿទេថា ហ៊ុន សែន នឹងចុះចេញ បើធ្វើបាតុកម្មទៀតមានថវិកាគ្រប់ទេ ទំរាំ ហ៊ុន សែន ចុះចេញ បើ ហ៊ុន សែន ព្រមចុះចេញជឿទេ ថានឹងចប់ខ្មែរក្រនឹងមានពួកស៊ីឈ្នួលយើងមើលអ៊ីរ៉ាក់ ទុយនេស៊ី ស៊ីរី លីប៊ី ។ បើធ្វើបាតុកម្មទៀត មានរបួសមានស្លាប់អ្នកណាទទួលខុសត្រូវថែទាំជំងឺមើលខុសត្រូវម្តាយឪពុកប្រពន្ធកូនគេដែលនៅរស់ ។ ការពិតសង្គ្រោះជាតិរៀបចំគម្រោងទុកមុនរួចហើយ បើយើងទាមទារបានសម្រេច ទោះជាយ៉ាងណាក៏យើងស្គាល់សណ្ឋានកុម្មុយនីស្តច្បាស់ហើយ ។ គម្រោងទាមទារមានស្រាប់ការចរចារ៥ម៉ោងមិនជាការជឿពេកទេ ។ យើងជុំនុំបងប្អូនកូនចៅ ថានឹងទិញផ្ទះបើត្រូវថ្លៃដល់ត្រូវថ្លៃហើយចាំគ្នាកូនចៅធ្វើអីឃឹតពេកគេទិញបាត់អត់ទទេ ។

ទិញ ដី ផ្ទះ ឡាន បានថោកនៅមានម្ចាស់ចង់លក់ ។ យើងមិនអាចចង់បានអ្វីមួយរយភាគរយទេ គេក៏ដូចគ្នា ។ ទោះយ៉ាងណាក៏សូមអរគុណខ្មែរទាំងអស់ភ្ញាក់រលឹកទាន់ពេលទោះជាប្រទេសតាំងពីតំណាងរាស្ត្របក្សប្រឆាំងព្រមព្រៀងចូលសភាមកសភាពការណ៍នយោបាយស្រុកខ្មែរហាក់ល្អប្រសើរ ទោះបីសង្គ្រាមពាក្យសំដីកើតមានខ្លះក្តីក៏យើងមើលឃើញថា អាចនឹងបោះជំហ៊ានទៅមុខជាបណ្តើរៗមានការកែប្រែច្បាប់ខ្លះនៅថ្ងៃមុខឱ្យល្អប្រសើរផងកន្លងមកដែលបក្សប្រជាជនកែប្រែច្បាប់រដ្ឋធម្មនុញ្ញបំរើមហិច្ឆតាការលោភអំណាចរបស់ខ្លួនហាក់ដូចជាមិនបំរើប្រទេសជាតិ និងពលរដ្ឋបន្តិចសោះកន្លងមកពលរដ្ឋខ្មែរជាច្រើននៃក្រុងតែងនាំគ្នាមកតវ៉ារឿងដីធ្លី ដល់ផ្ទះលោក ហ៊ុន សែន ក្តីដល់មុខរដ្ឋសភាក្តីមានការទទួលយកញត្តិហើយក្តី ក៏មិនឃើញមានដំណោះស្រាយហេតុផលដូច្នេះ ហើយទើបបញ្ហាដីធ្លីកើតមានធ្ងន់ធ្ងរឡើងធ្ងន់ធ្ងរឡើងនៅទូទាំងប្រទេស សួរថាតើតំណាងរាស្ត្របានសន្លឹកឆ្នោតពីរាស្ត្រទទួលប្រាក់ខែរដ្ឋគាត់ធ្វើខ្លះ? តើអាចមកពីអំណាចនិតិបញ្ញត្តិ និតិប្រតិបត្តិ និងតុលាការនៅលើតែមនុស្សម្នាក់ដែរ ឬទេ? តើមនុស្សដែលក្តោបអំណាចតែម្នាក់ឯងអាចធ្វើការងារមានជោគជ័យ ឬទេ? ឬក៏ជាមនុស្សមុខក្រាស់អត់ខ្មាស់ទៅចំពោះមុខមនុស្សរាប់លាននាក់ទាំងនៅក្នុងប្រទេស និងនៅលើពិភពលោក ។

សួរថាតើមនុស្សលោភអំណាចធ្វើមិនដឹងមិនឮពីទុក្ខវេទនាអស់រាស្ត្រាបអានអ្នកជាមនុស្សបែបណា? រាស្ត្រខ្មែររស់នៅរបបមនុស្សអវិជ្ជាដឹកនាំប្រទេសខ្មែរកន្លងមកមានតែមនុស្សអាត្មានិយមប៉ុណ្ណោះ ដែលរស់នៅលើទ្រព្យសម្បត្តិដែលមានមកពីការឆក់ប្លន់ពីប្រជាជនពីការលក់ទ្រព្យសម្បត្តិរដ្ឋពីការកិបកេងថវិការរដ្ឋ ព្រោះតែបែបនេះទើបធ្វើឱ្យរាស្ត្រខ្មែរជាងប៉ែតសិបភាគរយរស់ក្នុងបន្ទាត់ក្រីក្រ ។ សព្វថ្ងៃនៅក្នុងប្រទេសកម្ពុជាព្រោះតែជីវភាពធ្វើឱ្យខ្មែរខ្លះដែលគាត់មិនចេះពិចារណាវែងឆ្ងាយក្លាយទៅជាចោរជាឃាតករជាមនុស្សបោកឡោយកអំពើយកអំពើហឹង្សាជាត្រីមុខលែងមានតម្លៃថាជាមនុស្សអ្នកដែលគួរឱ្យអាណោចអធ័ម គឺប្រពន្ធ និងកូនចៅដែលនៅក្មេងកើតមកហើយ ជួបនឹងទុក្ខវេទនាដែលមនុស្សអវិជ្ជាដឹកនាំប្រទេសផ្តាច់ការយកខុសធ្វើត្រូវយកត្រូវធ្វើខុស ។ រឿងរ៉ាវទាំងនេះទាមទារឱ្យបងប្អូនរួមឈាមខ្មែរទាំងអស់ជួយដល់ប្រជាជាតិខ្មែរទាំងអស់គ្នាឱ្យបានធូរស្បើយផង ៕

# លាងសម្អាតស្បែកមុខ កុំឱ្យម្សៅផាត់មុខក្លាយជាអាវុធមុខពីរ



ថ្វីត្បិតតែម្សៅផាត់មុខ និងគ្រឿងសម្អាងទៃទៀត អាចជួយបង្កើនសម្រស់ផ្ទៃមុខស វាមានផលអវិជ្ជមានជាច្រើន ។ ប្រសិនបើប្រើវាជាប្រចាំ ហើយមិនបានលាងសម្អាតឱ្យស្បែកដកដង្ហើមបានស្រួលទេនោះ វានឹងជ្រាបចូលរន្ធញើសបង្កបញ្ហាស្បែកមុខ និងជំងឺផ្សេងៗ ។

យ៉ាងណាមិញការសម្អាតផ្ទៃមុខពីក្រែម ម្សៅ វាមិនងាយស្រួលឡើយ ។ ដំបូងអ្នកត្រូវចាប់ផ្តើមដោយយកកំណាត់ ឬប្រដាប់ត្បារត្រចៀក ជ្រលក់ទឹកសម្អាតរង្វង់ភ្នែកជាមុនសិន ចាំលាងវាសម្អាតជាមួយទឹកត្រជាក់តាមក្រោយ ។ បន្ទាប់មកអ្នកអាចប្រើហ្វមលាងមុខតាមការចូលចិត្ត ។ ប្រសិនបើស្បែកមានខ្លាញ់អ្នក គួរប្រើប្រភេទជែល ។ តែបើស្បែកស្ងួតអ្នកគួរប្រើហ្វមលាងមុខដែលមានជាតិក្រែម ។ ប្រសិនបើអ្នកចង់ឱ្យស្អាតមែន ទែននោះ អ្នកគួរតែចំណាយពេលប្រើមាស់បិទ មុខ ដើម្បីឱ្យស្បែកមានសភាពស្រស់ថ្លា ៕

# ពេលទិញក្រែមលាប បបូរមាត់មិនដូចបំណង



សុភាពស្ត្រីច្រើននាក់ហើយប្រហែលជាធ្លាប់ជួបប្រទះនឹងបញ្ហាថា មានពេលខ្លះទិញក្រែមលាបបបូរមាត់មកហើយមិនបានពណ៌ដូចប្រាថ្នា ហើយត្រូវទុកក្រែមនោះចោល តែចាប់ពីពេលនេះតទៅ ប្រសិនបើជួបនឹងបញ្ហាបែបនេះ យើងមានដំណោះស្រាយអាចជួយបានដូចខាងក្រោម :

កុំទាន់លាបក្រែមដែលទិញមកខុសនោះ តែណែនាំឱ្យលាបក្រែមប្រេងមុន ទើបលាបក្រែមទិញមកខុសនោះតាមក្រោយ ។ បន្ទាប់មកប្រើក្រដាសអនាម័យផ្តិតថើៗនៅលើបបូរមាត់ រួចទើបប្រើក្រែមប្រេងលាបពីលើម្តងទៀត ។ លើកនេះអ្នកអាចលាបក្រែមដែលបានទិញមកខុសនោះកាន់តែស្អាតជាងមុនមិនបាន ៕

# ខ្មែរអ្នកជាតិនិយម

**តពីលេខមុន**
**តទៅលេខក្រោយ**

ធ្វើឃាតនៅពេលដែលលោក កៅ តក់ ធ្វើដំណើរពីស្រុកក្រឡាញ់ទៅកាន់ទីរួមខេត្តសៀមរាបនៅត្រង់ចន្លោះទីប្រជុំជនសសរស្តម្ភ និងទីប្រជុំជនពួក ។ នៅខែដដែលនោះដែរ សារព័ត៌មាន "ខ្មែរថ្មី" ក៏ត្រូវគេបិទទ្វាររួចចាប់ចាងហ្វាងឃុំឃាំង ។

នៅខែមិនា ឆ្នាំ១៩៥៥ ក្រុមភ្នំដងរែកនៅភ្នំពេញ បានបង្កើតសារព័ត៌មានមួយទៀតឈ្មោះថា "ទៅមុខ" ប៉ុន្តែត្រូវគេបិទទ្វារនៅខែមិថុនា ឆ្នាំ១៩៥៥ ហើយគេចាប់ចាងហ្វាងដាក់គុក ។

ចំណែកសម្តេចសីហនុ ព្រមទាំងពពួកលុយក្រាប លុះបានឃើញការរួបរួមរបស់អតីតអ្នកតស៊ូ និងគណបក្សប្រជាធិបតេយ្យដូច្នោះ ក៏ប្រឹងរិះរកកលល្បិចកំចាត់កំចាយពួកនេះ ។ នៅថ្ងៃទី២៥ មករា ១៩៥៥ ទ្រង់បានបង្គាប់ទៅរាជរដ្ឋាភិបាលលោក ឡេង ង៉ែត ឱ្យចែកកៅអីរដ្ឋមន្ត្រីទៅគណបក្សទាំងអស់ដែលមានវៀរលែងតែគណបក្សប្រជាធិបតេយ្យ និងគណបក្សប្រជាជន ។

ថ្ងៃទី៧ កុម្ភៈ ១៩៥៥ សីហនុ បានបញ្ជាឱ្យធ្វើប្រជាមតិ ដែលមានសំនួរថា ព្រះរាជបេសក


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

កម្មដែលទ្រង់បានបំពេញនោះ ជាទីពេញចិត្តនៃប្រជារាស្ត្រ ឬទេ? អ្នកបោះឆ្នោតក្នុងបញ្ជីចំនួន ៩២៥.៨១២នាក់ ឆ្លើយថា ពេញចិត្តទាំងអស់គ្នាហើយ... ។

ថ្ងៃទី ១៩ កុម្ភៈ ១៩៥៥ សីហនុវ័ន្ន បានប្រកាសឱ្យកែប្រែទម្រង់រដ្ឋធម្មនុញ្ញត្រង់មាត្រាដែលចែងថា "នាយករដ្ឋមន្ត្រីទទួលខុសត្រូវនៅចំពោះមុខរដ្ឋសភា" ត្រូវកែទៅជា "នាយករដ្ឋមន្ត្រីទទួកខុសត្រូវនៅចំពោះមុខព្រះភ័ក្ត្រព្រះរាជា" វិញ។ ការកែទម្រងរដ្ឋធម្មនុញ្ញនេះ បានត្រូវគណៈកម្មការត្រួតពិនិត្យរដ្ឋធម្មនុញ្ញជំទាស់ ត្បិតខុសនឹងច្បាប់រដ្ឋធម្មនុញ្ញ ។

នរោត្តម សីហនុ បានយល់ឃើញថា បើមិនចេញធ្វើនយោបាយដោយខ្លួនឯងទេ ច្បាស់ជាមិនអាចយកឈ្នះលើពួកប្រជាធិបតេយ្យបានឡើយ ។ ដូច្នេះ នៅថ្ងៃទី ២ មីនា ១៩៥៥ ទ្រង់ក៏ប្រកាសដាក់រាជផ្ទេរថ្វាយទៅព្រះរាជបិតានរោត្តម សុរាម្រិត ដែលខុសនឹងច្បាប់ប្រពៃណីរាជបល្ល័ង្កខ្មែរទាំងស្រុង ។

នៅចុងខែមេសា គ.ស. ១៩៥៥ សម្តចឧបយុវរាជនរោត្តម សីហនុ ប្រមុខរដ្ឋកម្ពុជា បានបង្កើតគណបក្សនយោបាយមួយឈ្មោះថា "សង្គមរាស្ត្រនិយម" តែទ្រង់បានប្រកាស និងប្រកែកថា មិនមែនជាគណបក្សទេ គឺជាចលនារួបរួមជាតិដែលមានសហជីវិនជំនិត១មួយចំនួនចូលរួមផង គឺលោក សម សារី, យ៉ែម សំបូរ, ឃីម ទិត រួចបានអំពាវនាវ និងបង្ខំឱ្យគណបក្សដទៃ១ចូលរួមជាមួយ ។ ក្រៅពីគណបក្សប្រជាធិបតេយ្យ និងគណបក្សប្រជាជន គណបក្សកំប៉ិកកំប៉ុកទាំងប៉ុន្មានដែលសុទ្ធតែជាបក្ខពួកលុតក្រាបអែបអបក៏បានរំលាយខ្លួនចូលជាមួយសង្គមរាស្ត្រនិយមទាំងអស់ ។ ដើម្បីឱ្យមានពេលវេលាគ្រប់គ្រាន់សម្រាប់រៀបចំគម្រោងកលល្បិចបំផ្លាញគណបក្សជំទាស់យកជ័យជំនះដាច់ខាតក្នុងការបោះឆ្នោតនោះ សម្តេចសីហនុ បានពន្យារពេលបោះឆ្នោតទៅថ្ងៃទី១១ កញ្ញា ១៩៥៥ វិញ ។ ក្នុងសម័យឃោសនាបោះឆ្នោតសង្គមរាស្ត្រនិយមដែលមានទ្រង់សីហនុជាព្រះប្រធានបានប្រើកិច្ចកលក៏តម្រក់ថោកទាប និងប្រើអំពើសាហាវយង់ឃ្នង់ជាទីបំផុត ដូចជាប្រើប៉ូលិស ទាហាន និងក្រុមតិញសម្ងាត់ឱ្យទៅឆាឆៅអុកឡុកគណបក្សជំទាស់, ចាប់ឃុំឃាំងពួកអ្នកសារព័ត៌មាន, លើកគ្នាទៅវាយដំច្រំធាក់បេក្ខជនគណបក្សជំទាស់ជាដើម ។ នេះជាអំពើព្រៃផ្សៃឃោរឃៅអយុត្តិធម៌ក្នុងសម័យបោះឆ្នោតសង្គមរាស្ត្រនិយមដែលរាស្ត្រខ្មែរបានយំរហូតមក ។

ដោយបានឃើញហេតុការណ៍ដ៏ឃោរឃៅអាក្រក់ក្រៃលែង ដូចខាងលើនេះ ក្រុមដែងរែកនៅភ្នំពេញព្រមទាំងគណបក្សជំទាស់ក៏បានប្តឹងតវ៉ាទៅគណៈកម្មការអន្តរជាតិខាតបទត្រួតត្រាតែឥតបានការអ្វីឡើយ ត្បិតគណៈកម្មការអន្តរជាតិនេះបានមិនត្រឹមតែឥតមានសមត្ថភាព គឺថែមទាំងធ្វើព្រងើយកន្តើយទៀតផង ។ ការណ៍នេះ លោក សឺន ង៉ុកថាន់ បានយល់ច្បាស់ជាមុនថា ការបោះឆ្នោតនៅថ្ងៃទី១១ កញ្ញា ១៩៥៥ នេះប្រាកដជាគ្មានយុត្តិធម៌ឡើយ ។ ដូច្នេះមានផ្លូវតែមួយគត់ដែលអាចទប់ទល់នឹងអំពើចង្រៃថោកទាបនោះបាន គឺត្រូវបំផ្លាញការបោះឆ្នោតកុំប្រព្រឹត្តទៅកើត ។ ដើម្បីអនុវត្តរឿងនេះ យើងត្រូវបង្កសន្តិសុខនៅតាមមណ្ឌលបោះឆ្នោតប្រសិនបើអាចធ្វើទៅបាន **តទៅលេខក្រោយ**

Continued from page 23

## Refugee groups in Australia...

voluntary principle. No one is forcing them to come to Cambodia. Cambodia has a clear roadmap to accept these refugees, and no one would volunteer if they not know what kind.

Long VISA Gen secretary of state at the Ministry of Foreign Affairs, told reporters that officials will be sent to the island of Nauru to make an assessment on refugees.

He said: 'We will send officials to the island of Nauru to inform refugees about Cambodia. As living traditions, customs and religions. He added that the number and time of arrival of refugees, pending and location for their lives not yet determined.

He said: 'The temporary abode and arrived in Phnom Penh, but we still do not know the location. The permanent settle permanently, and integration in the community do not know, but is outside the city.

He said: 'We do not know that many refugees would arrive, but first there are fewer. If there is a problem in the pilot project [agreement] will be amended.

He said the refugee agency of the United Nations (UNHCR) will cooperate with the authorities, but that they had not yet discussed the cooperation with this agency.

Vivian Tan, spokesman for the regional office of the UNHCR in Bangkok, said in an email that if the project fails, it will make the lives of people more refugees have additional risk.

She said: 'The fact that asylum system first stage there is a fear that can be held on existing refugees in the country differ from those settlers from the island of Nauru and refugees can not make integration Cambodian society, they can afford to risk moving to another country to seek safety and stability.

តមកពីទំព័រទី ៧

## Review of “Year Zero”...
## បានទៅទស្សនារឿង“ឆ្នាំសូន្យ”

សកម្មភាពជនពាលតាមផ្លូវ ។ ម្ដាយនឹងឪពុកនាងរ៉ានឹងវុឌ្ឍីមិនដែលនិយាយពីរឿងរ៉ាវកើតឡើងនៅជំនាន់ខ្មែរក្រហមឱ្យកូនស្ដាប់ទេ តែបានរ៉ាយរ៉ាប់រឿងទាំងនោះទៅហានដែលកាលពីមុនធ្លាប់មកលេងហាងជំជែកលេងជាមួយម្ដាយរ៉ា ។ បន្ទាប់ពីហាននិយាយពីការលំបាករបស់ម្ដាយនាពេលមុនមកអាមេរិកប្រាប់រ៉ារ៉ាក៏សម្រេចរៀបចំរក្សាអ្វីដែលនៅសល់ពីម្ដាយរស់ជុំបងប្អូនវិញ ។ នាងក៏បែកចេញពីប្រុសកំណាន់ត្រឡប់ទៅមហាវិទ្យាល័យវិញរួចយក វុឌ្ឍីមករស់នៅជាមួយខ្លួនដើម្បីអោយមករៀននៅវិទ្យាល័យក្នុងភូមិខ្លួនបាន ។

រឿងឆ្នាំសូន្យនេះសម្ដែងបានល្អហើយបង្ហើបប្រាប់រឿងសំខាន់ដល់អ្នកដែលរស់នៅឡូវែល ។ រឿងនោះបង្ហាញនូវយុវវ័យបើទោះជាមិនកើតនៅស្រុកខ្មែរក៏ដោយក៏នៅតែរងគ្រោះពីបទពិសោធន៍កម្រគ្រួសារជាមួយខ្មែរក្រហមដែរ ។ អរគុណដល់កាសែតខ្មែរផុសស.រ.អា ដែលបានគាំទ្រក្រុមល្ខោនឆ្នាំសូន្យនេះហើយនាំយកមកសម្ដែងលើឆាកនៅឡូវែលនេះបាន ៕

as part of a street gang. Their mother had never talked about what happened in Cambodia under the Khmer Rouge to Ra and Vuthy but she did talk about it with Han when he used to hang around in her store. After Han tells Ra about her mother's struggles to come to America, Ra decides to keep what is left of her family together. She breaks up with her boyfriend but returns to college bringing Vuthy with her so he can transfer to a high school in that city.

Year Zero was very well acted and told an important story especially for people who live in Lowell. It showed how Cambodian young people, even if they were not born in Cambodia, are still affected by the experiences their family members had under the Khmer Rouge. Thanks for the KhmerPost USA newspaper for being the media sponsor of Year Zero and helping to bring this important play to the stage in Lowell.

# សំនួរក្នុងថ្ងៃបោះឆ្នោត

**របាយការណ៍ដោយលោក : រីឆាត ហូវេអ**
**Richard P. Hower Jr.**
**បកស្រាយដោយ : ថាច់ វណ្ណា**

ថ្ងៃអង្គារ៍ ទី៤ វិច្ឆិកា ឆ្នាំ២០១៤ អ្នកបោះឆ្នោតទូទាំងរដ្ឋម៉ាសាជូសិត និងនាំគ្នាទៅបោះឆ្នោតជ្រើសរើសតំណាងអភិបាលរដ្ឋ និងតំណាងរាស្ត្រ ព្រមទាំងការិយាល័យសំខាន់ៗជាច្រើន គេនឹងលើកប្រជាមតិ៤ប្រការដាក់ជាបញ្ហា ដូចខាងក្រោមនេះ :

**១-បំបាត់ពន្ធប្រេងឥន្ធនៈ :** សព្វថ្ងៃនេះ ក្នុងរដ្ឋម៉ាសាជូសិតបង់ពន្ធប្រេងសាំងឥន្ធនៈក្នុង១ហ្គាឡុង២៤សេន សាលប្រជុំសភារដ្ឋ នឹងធ្វើការបោះឆ្នោតអនុញ្ញាតិឱ្យតម្លៃឡើង ឬចុះ យោងទៅតាមអតិផរណានៃតម្លៃ ។

ប្រជារាស្ត្រណាមានមតិថា : "yes"បានន័យថា ថ្លៃពន្ធមិនអាចតម្លើងដោយស្វ័យប្រវត្តិបានឡើយ ប៉ុន្តែសាលប្រជុំសភាអាចនឹងបោះឆ្នោតជ្រើសរើសភាមតិក្នុងការតម្លើងពន្ធ។

-បើប្រជារាស្ត្រណាឆ្លើយថា "No"បានន័យថា : ថ្លៃពន្ធអាចនឹងកើនឡើងដោយស្វ័យប្រវត្តិពីព្រោះលុយពន្ធទាំងនោះ នឹងបានយកទៅជួសជុលផ្លូវថ្នល់ និងស្ពាន ប្រសិនជាថ្លៃជួសជុលមានការតម្លើងថ្លៃក៏ព្រោះតែបញ្ហាអតិផរណានៃតម្លៃទូទៅ ព្រោះហេតុនោះត្រូវការលុយបន្ថែមទៀតដើម្បីសងថ្លៃទាំងនោះ ។

**២-បង្កើនច្បាប់បង់ប្រាក់កក់ចំពោះភេសជ្ជៈគ្រប់ប្រភេទ :**

សព្វថ្ងៃនេះ យើងបង់ប្រាក់កក់៥សេនក្នុង១ប្រអប់សូដា ឬបៀរ , ប្រសិនឆ្លើយ "Yes" បានន័យថា បន្តបង់៥សេនទៅលើថ្លៃទឹកបរិសុទ្ធ១ដបជាដើម ។ ប្រជារាស្ត្រដែលឆ្លើយ"Yes" ខាងលើ នឹងមានការកើនឡើងចំនួនដប ឬកំប៉ុងដែលត្រូវយកទៅប្រើម្តងទៀត"ធ្វើនិស្សរណកម្ម" ។

ប្រជារាស្ត្រណាឆ្លើយថា "No"បានន័យថា គាំទ្រការដាក់ធុងនិស្សរណកម្ម "Recycle"តាមចិញ្ចើមថ្នល់ ជាជាងការដឹកបញ្ជូនដប និងកំប៉ុងទាំងនោះយកទៅប្តូរយកប្រាក់កក់មកវិញ ។

**៣-បង្កើនការហាមឃាត់លេងល្បែងស៊ីសង :** ជាច្រើនឆ្នាំកន្លងមក សាលប្រជុំសភាបានបើកច្បាប់ឱ្យបើកបនល្បែងជាច្រើនប្រភេទក្នុងរដ្ឋម៉ាសាជូសិត ប្រជារាស្ត្រណាឆ្លើយថា "Yes" បានន័យថា ជំទាស់នឹងច្បាប់នោះ ហើយនឹងត្រូវមានការរាំងរាមិនឱ្យបើកបនល្បែងក្នុងរដ្ឋម៉ាសាជូសេត ប្រសិនឆ្លើយ"No"នោះ គឺថា សុខចិត្តក្នុងការអនុញ្ញាតិបនល្បែងគ្រោងនឹងបើកទ្វារ ។

**៤-ពេលដែលកម្មករមានជំងឺ :** សព្វថ្ងៃនេះ កម្មករ ពុំមានការទាមទារឱ្យមានសងប្រាក់ឱ្យកម្មករក្នុងរយៈពេលមានជំងឺ ហេតុដូច្នេះហើយពេលដែលគេមានជំងឺត្រូវឈប់សម្រាក រួចហើយកម្មករនោះនឹងត្រូវបញ្ចប់ពីការងារ នៅចំណុចច្បាប់នេះ ប្រសិនឆ្លើយថា "Yes"គឺទាមទារឱ្យកម្មករទាំងអស់ក្នុងរដ្ឋម៉ាសាជូសិត បានទទួលពេលវេលាចំនួន៤០ម៉ោងក្នុងមួយឆ្នាំ ទុកសម្រាប់ឈឺស្កាត់ក្នុង៤០ម៉ោងនោះ ក្រុមហ៊ុនត្រូវសងតម្លៃតាមម៉ោងធ្វើការធម្មតា ។ ប្រជារាស្ត្រដែលឆ្លើយថា "Yes"នឹងបានសងកម្រៃផលក្នុងពេលមានជំងឺចំនួន៤០ម៉ោង ប្រសិនបើឆ្លើយ"No"បានន័យថា មិនត្រូវការទេ ឬបានយល់ថា ការសងថ្លៃហួសហេតុពេក ៕

# Ballot Questions on Election Day

**By Richard P. Howe Jr.**

On Tuesday, November 4, 2014, voters across Massachusetts will go to polling places to vote for our new governor, our new state representative, and for many other important government offices. There will also be four referendum questions on the ballot. Here is a summary of each of the questions:

**1.** Eliminate Gas Tax Indexing. Right now, when you pay for a gallon of gasoline, 24 cents goes to the state of Massachusetts as a tax. The state legislature has voted to allow that amount to go up or down in accordance with the rate of inflation. People who want you to vote YES on this question say that taxes should not be raised automatically but that the state legislature should have to vote to raise taxes. People who want you to vote NO say that the automatic increase is good because all of the money goes to repair roads and bridges. If it costs more to make those repairs because of inflation, then there needs to be more money to pay those costs.

**2.** Expand the Beverage Container Deposit Law. Now, we pay a 5 cent deposit on all containers for soda and beer. A YES vote on this question would extend the 5 cent deposit to other containers like bottled water. People who want you to vote YES say this will increase the amount of bottles that are recycled. People who want you to vote NO say that we should promote curbside recycling of all containers instead of returning them to get our deposits back.

**3.** Expand Prohibitions on Gambling. Several years ago the state legislature passed a law to allow several gambling casinos to be built in Massachusetts. Voting YES on this question would reverse that law and would prevent any casinos from opening in Massachusetts. Voting NO would allow the planned casinos to open.

**4.** Earned Sick Time for Employees. Now, employers are not required to give their employees paid sick days. If employees are out sick, they must go without pay and risk being fired. Voting YES on this law would require all employers in Massachusetts to give workers up to 40 hours per year of paid sick time. People who want you to vote YES say paid sick time is good for workers and for businesses. People who want you to vote NO say it is too expensive for businesses and that it is not needed.

# CLASSIFIED ADS

CALL: 978.677.7163
EMAIL: SOBENPIN@KHMERPOST.US



# ជោគជតារាសីលោកអ្នក ទាំង១២ ប្រចាំឆ្នាំមមី

## ឆ្នាំជូត



រាសីល្អជាមធ្យម ។ ក្នុងរយៈពេលនេះការរស់នៅលោកអ្នកត្រូវបំបាត់ភាពប្រកែប្រកាន់ចេញពីខ្លួនខ្លះទើបប្រសើរដែលមិនមានបញ្ហានាំឱ្យត្រូវឈឺក្បាល ហើយកើតតែរឿងរាវចំពោះមុខ ។ ការបំពេញការងារនៅថ្ងៃនេះវិញមានការរីកលូតលាស់សន្សឹម១ទៅមុខតែបើចង់លោភលន់វិញមិនគាប់ដូចបំណងទេតែងខកបំណងច្រើនជាង ។ សម្រាប់អ្នកប្រកបរបររកស៊ីជួញដូរមានការទិញចូលលក់ចេញដាច់មួយ១គ្រាន់បង្គ្រប់ឆ្នាំងបាយ ប៉ុន្តែយ៉ាងណាសម្រាប់ស្ត្រីឱ្យប្រយ័ត្នកើតជម្លោះវិវាទដោយសារក្រុមមនុស្សបាបមិត្តបង្កឡើង ។ រីឯសម្ព័ន្ធស្នេហាប្រុសស្រីកុំចង់សាកល្បងកាមគុណពិសេសស្ត្រីប្រយ័ត្នកើតរឿងធំខូចទាំងកិត្តិយសអស់ទាំងអនាគតភ្លឺស្វាង ។

## ឆ្នាំឆ្លូវ



រាសីស្រុតចុះ ។ នៅថ្ងៃនេះលោកអ្នកធ្វើអ្វីតែងលេចបាតុភាពរាំងស្ទះជាពិសេសធ្វើច្រើនទទួលបានផលតិចថែមទៀត ។ ទាំងស្ត្រីបុរសពេលនេះងាយឈ្លក់វង្វេងនឹងល្បែងស៊ីសងណាស់ប្រយ័ត្នជាប់ផុងខ្លួនហើយក្រែងដកពុំរួច ។ សម្រាប់អ្នកប្រកបរបររកស៊ីជួញដូរមុនធ្វើអ្វីមួយត្រូវចេះត្រិះរិះពិចារណាឱ្យបានគ្រប់ជ្រុងជ្រោយហើយពុំត្រូវមានគំនិតវៀចវេឡើយ បើពុំនោះទេនាំជួបផលលំបាកដល់អាត្មាខ្លួនឯងដោយសារអតិថិជនលែងមកក្បែរ ។ រីឯបញ្ហាស្នេហាកំលោះក្រមុំក្នុងពេលនេះជូនត្រូវជូនឈ្លោះធ្វើឱ្យកើតការខ្វាយខ្វល់ឥតសូវស្បើយប៉ុន្មានឡើយ ។

## ឆ្នាំខាល



រាសីខ្ពស់ត្រដែត ។នៅថ្ងៃនេះលោកអ្នកអាចមានជោគសំណាងខាងបញ្ហាទំនាក់ទំនងបន្តិច ព្រោះបើមានការស្នើសុំ ឬចង់បានអ្វីមួយដែលមិនធំដុំពេកតែងអ្នកដទៃគេអាណិតស្រឡាញ់ និងជួយជ្រោមជ្រែងជានិច្ច ។ ក្រៅពីនេះទោះលោកអ្នកប្រកបកិច្ចការអ្វីក៏ដោយមានការចម្រើនលូតលាស់ទៅមុខជាសន្សឹម១ឥតថយក្រោយឡើយ ។ ចំពោះអ្នកប្រកបរបររកស៊ីជួញដូរពេលនេះប្រៀបដូចបានជា"ភ្លៀងធ្លាក់មួយមេមេឃស្រឡះ"ព្រោះអាចកម្ចាត់រាល់ឧបទ្រពចង្រៃទាំងពួងឱ្យវិនាសជាអហោសិកម្មអស់ហើយលោកអ្នកអាចប្រកបមុខរបរពេញដៃពេញជើងឡើងវិញ ។ រីឯបញ្ហាសេចក្តីស្នេហាកំលោះក្រមុំមានការរីកលូតលាស់និងផ្អែមល្ហែមប្រពៃណាស់ ។

## ឆ្នាំថោះ



រាសីស្រុតចុះ ។ ក្នុងថ្ងៃនេះដំណើរជីវិតរបស់លោកអ្នកស្រុតចុះដូចនេះមិនផ្តល់ផលល្អក្នុងការប្រកបការងារដែលសំខាន់ ឬកិច្ចការងារណាដែលធំដុំពេកឡើយ ពីព្រោះថា ផលមិនល្អនោះតែងឆ្លើយតបច្រើនជាងសព្វមួយដង ។ អ្នកប្រកបរបររកស៊ីជួញដូរមានការទិញចូលលក់ចេញគ្រាន់បើតែយ៉ាងណាលោកអ្នកទាល់តែខិតខំខ្លាំងទើបទទួលជោគជ័យជន្ទញធំ១ទៅរួច ។ ការធ្វើដំណើរចេញក្រៅផ្ទះលោកអ្នកចូរប្រយ័ត្នការមានជម្លោះវិវាទសម្តីបន្តិចបន្តួចដោយសារការមិនចុះសម្រុងគ្នា ឬការប្រឆាំងគ្នាដោយប្រការណាមួយ ។ រីឯសម្ព័ន្ធស្នេហាកំលោះក្រមុំមានការប្រែប្រួលប្តូរផ្លាស់ព្រោះជូនត្រូវរ៉ូវគ្នាជូនទាស់ទែងគ្នា ។

## ឆ្នាំរោង



រាសីល្អជាមធ្យម ។ នៅថ្ងៃនេះបើទោះបីមានរឿងរាវចូលមកកក្វរផ្លូវចិត្តបន្តិចក្តីតែក៏មិនមានឧបសគ្គអ្វីនាំទុក្ខព្រួយដែរដោយលោកអ្នកអាចធ្វើការដោះស្រាយគ្រាន់ធូរចិត្តទៅវិញ ។ ការប្រកបការងារលោកអ្នកឱ្យប្រយ័ត្នជួបរឿងធ្វើច្រើនខុសច្រើនហើយបើទោះបីលោកអ្នកខំរត់ចុះឡើងក៏ពុំសូវសម្រេចដូចគាប់បំណងដែរតឹតែងខកបំណងច្រើនជាង ។ចំពោះអ្នកប្រកបរបររកស៊ីជួញដូរក៏ដូច្នេះដែរ ការចង់បោះទុនទៅលើអ្វីមួយត្រូវមើលមុខមើលក្រោយ ព្រោះផ្លែផ្កាទទួលបានមកវិញមានភាពយ៉ាប់យ៉ឺន និងបញ្ហាចូលមកលុកលុយច្រើន ។ រីឯសម្ព័ន្ធស្នេហាប្រុសស្រីមានដំណើរប្រទាំងប្រទើសដែលងាយកើតរឿងជម្លោះវិវាទណាស់ ។

## ឆ្នាំម្សាញ់



រាសីស្រុតចុះ ។ ក្នុងថ្ងៃនេះដួងរាសីមិនគាប់ប្រសើរប៉ុន្មានទេ ដូច្នេះបើទោះបីធ្វើអ្វីមួយក៏ដោយត្រូវប្រយ័ត្នប្រយែង ហើយមិនត្រូវជឿពាក្យអុជអាលអ្នកដទៃដែរ បើពុំនោះទេ រឿងខ្លះតូចតាចសោះ អាចរីកក្លាយជាធំជាក់ជាពុំខាន ។ សម្រាប់អ្នកប្រកបរបររកស៊ីជួញដូរមានការទិញចូលលក់ចេញគ្រាន់រស់រវើកបន្តិចវិញប៉ុន្តែយ៉ាងណាផលកម្រៃក៏មិនសូវឆ្លើយតបដូចសេចក្តីប៉ងប្រាថ្នាទេ ឬអាចនិយាយបានថាគ្រាន់មួយទប់ទល់ចាយវាយ ។ រីឯបញ្ហាសេចក្តីស្នេហាកំលោះក្រមុំងាយទាំងទាស់ទែង និងត្រូវរ៉ូវគ្នា ។

## ឆ្នាំមមី



រាសីខ្ពស់ត្រដែត ។ នៅថ្ងៃនេះដំណើរជីវិតរបស់លោកអ្នកភ្លឺថ្លា ហើយធ្វើអ្វីក៏តែងមានភ្លើងខៀវបើករង់ចាំច្រើនចំពោះមុខជានិច្ច ។ សម្រាប់លោកអ្នកដែលប្រកបរបររកស៊ីជួញដូរការរកផលចំណូលមានហូរចូលគ្រាន់គួរជាទីកក់ក្តៅ ហើយបើចង់ជួញផ្លូវឆ្ងាយផងជាការប្រសើរដោយលោកអ្នកអាចកើបផលចំណូលត្រឡប់មកវិញយ៉ាងស្រួលចិត្ត ។ រីឯបញ្ហាស្នេហាកំលោះក្រមុំមានការលូតលាស់ទៅមុខនិងផ្អែមល្ហែមគួរជាទីកក់ក្តៅ ។

## ឆ្នាំមមែ



រាសីល្អជាមធ្យម ។ នៅថ្ងៃនេះលោកអ្នកមិនមានអ្វីចូលមកយាយីនាំពិបាកឆ្លងកាត់ទេ ហេតុនេះមិនថា ជាការងារបញ្ហាប្រាក់កាស គឺមានការជឿនលឿនសន្សឹម១ដូចសព្វមួយដង ។ ទោះបីយ៉ាងណាបញ្ហាសុខភាពរបស់លោកអ្នកមិនល្អប្រសើរទេគប្បីមានការប្រយ័ត្នប្រយែងបន្តិច ។ សម្រាប់អ្នកប្រកបរបររកស៊ីជួញដូរក្នុងថ្ងៃនេះដែរចូរប្រយ័ត្នក្រុមមនុស្សអុជអាលអ្វីមួយនាំឱ្យកើតការក្តៅក្រហាយបង្កជាជម្លោះជាមួយអ្នកដទៃឡើង ។ រីឯបញ្ហាសេចក្តីស្នេហាប្រុសស្រី ចូរប្រយ័ត្នក្រុមមនុស្សទីពាចូលមកអុកឡុកនាំកើតជម្លោះវិវាទឈានដល់ការបែកបាក់ ។

## ឆ្នាំវក



រាសីល្អជាមធ្យម ។ ក្នុងថ្ងៃនេះដំណើរជីវិតរបស់លោកអ្នកមិនល្អប្រសើរទេ ដូចនេះទោះធ្វើអ្វីតោងតែមានការអត់ធ្មត់ព្យាយាមខ្លះទើបអាចដោះស្រាយបញ្ហាមួយចំនួនដាច់ស្រេចទៅរួច ។ សម្រាប់អ្នកប្រកបរបររកស៊ីជួញដូរវិញលោកត្រូវចេះរៀបចំបញ្ហាបញ្ជីប្រាក់កាសឱ្យបានច្បាស់លាស់ ពីព្រោះថា ងាយកើតបញ្ហាភាន់ច្រឡំណាមួយឡើងជាងសព្វមួយដង ។ ការធ្វើដំណើរទីជិតឆ្ងាយមិនសូវមានសុវត្ថិភាពប៉ុន្មានទេ ពិសេសអ្នកបើកបរហាមសេពគ្រឿងស្រវឹង ។ បញ្ហាសេចក្តីស្នេហាកំលោះក្រមុំពិសេសស្ត្រីឱ្យប្រយ័ត្នគ្រោះចាញ់បោកភាគីម្ខាងទៀត ដោយប្រការណាមួយហើយមកដេកសោកស្តាយអនាគតភ្លឺស្វាងឥតអំពើ ។

## ឆ្នាំរកា



រាសីល្អជាមធ្យម ។ នៅថ្ងៃនេះការប្រកបការងារអ្វីត្រូវចេះមើលមុខក្រោយពីព្រោះថាផលអាក្រក់នោះងាយកើតឡើងនាំសៅហ្មងផង ។ អ្នកប្រកបរបររកស៊ីជួញដូរនៅក្នុងថ្ងៃនេះដែរមានភាពលំនឹងល្អហើយទោះជួញទីជិតឆ្ងាយអាចរកផលកម្រៃចូលហៅ១គ្រាន់សម្រាប់ការចាយវាយ ។ ការធ្វើដំណើរទីជិតឆ្ងាយជួបភាពសុខដុមទាំងពេលទៅនិងត្រឡប់មកវិញ ។ បញ្ហាគូស្នេហាកំលោះក្រមុំពុំគប្បីយកភាពប្រកែប្រកាន់និងកំហឹងទល់កំហល់ដាក់ខ្លួនប្រយ័ត្នកើតរឿងជម្លោះវិវាទឥតឈប់ឈរហើយឈានមិនដល់ខ្លោងទ្វារអាពាហ៍ពិពាហ៍ ។

## ឆ្នាំច



រាសីល្អជាមធ្យម ។ នៅថ្ងៃនេះការប្រកបការងារអ្វីត្រូវចេះមើលមុខក្រោយ ពីព្រោះថាផលអាក្រក់នោះងាយកើតឡើងនាំសៅហ្មងផង ។ អ្នកប្រកបរបររកស៊ីជួញដូរនៅក្នុងថ្ងៃនេះដែរមានភាពលំនឹងល្អហើយទោះជួញទីជិតឆ្ងាយអាចរកផលកម្រៃចូលហៅ១គ្រាន់សម្រាប់ការចាយវាយ ។ ការធ្វើដំណើរទីជិតឆ្ងាយជួបភាពសុខដុមទាំងពេលទៅនិងត្រឡប់មកវិញ ។ បញ្ហាគូស្នេហាកំលោះក្រមុំពុំគប្បីយកភាពប្រកែប្រកាន់ និងកំហឹងទល់កំហល់ដាក់ខ្លួនប្រយ័ត្នកើតរឿងជម្លោះវិវាទឥតឈប់ឈរហើយឈានមិនដល់ខ្លោងទ្វារអាពាហ៍ពិពាហ៍ ។

## ឆ្នាំកុរ



រាសីខ្ពស់ត្រដែត ។ នៅថ្ងៃនេះការងារតូចធំលោកអ្នកអាចសម្រុកពេញទីបានហើយពីព្រោះថាផ្លែផ្កាល្អ១តែងហុចមកវិញគ្រាន់ជាទីពេញចិត្តជានិច្ច ។ សម្រាប់អ្នកប្រកបការងាររកស៊ីជួញដូរពេលនេះដួងរាសីមិនប្រសើរទេ ពិសេសបុរសដូចនេះទោះប្រកបការងារអ្វីក៏តោងតែប្រយ័ត្នប្រយែងបន្តិច ។ការធ្វើដំណើរឆ្ងាយជិតចូរប្រយ័ត្នបញ្ហាក្រុមមនុស្សបៀតបៀនយាយី ។ រីឯបញ្ហាសេចក្តីស្នេហាកំលោះក្រមុំបើស្គាល់ចិត្តស្គាល់ថ្លើមគ្នាយូរហើយជាឱកាសល្អបំផុតក្នុងការរៀបចំផ្សំផ្គុំគ្រួសារហើយ ។

**Accepting New Patients**

# មជ្ឈមណ្ឌលពេទ្យ និងទទួលព្យាបាល ស៊ី ប៊ី ស៊ី

**AT NEW LOCATION**
**ចាប់បើកហើយ**

## CBC Medical & Walk-In Center

*Serving the Lowell Community for over 20 years!*

**Mon - Fri 8AM-4PM. 1st & 3rd Sat: 8AM-NOON. 978-454-9703**

**ទទួលអ្នកជំងឺថ្មី**

**Primary Care & Urgent Care Services**
**ពេទ្យគ្រួសារ និងសង្គ្រោះបន្ទាន់**

### Services:

- In House Lab & Blood Work
- Immunizations
- Physical Exams
- Emergency Room Follow-Ups
- Nebulizer & Asthma Treatments

- EKG Testing
- Wellness & Preventative Care
- Workers Comp Medical Treatment
- DOT Physicals
- Walk-Ins for Illness & Minor Injury

- ពិនិត្យឈាមនៅមន្ទីរពិសោធន៍ក្នុងមជ្ឈមណ្ឌល
- ចាក់វ៉ាក់សាំងការពារ
- ពិនិត្យរាងកាយ
- តាមដានពិនិត្យនៅបន្ទប់ព្យាបាលបន្ទាន់
- ហ្វឹកហាត់ផ្លែកដកដង្ហើម

- ថតចលនាបេះដូង
- ថែទាំសុខភាពទូទៅសម្រាប់គ្រួសារ
- ទទួលព្យាបាលអ្នកទទួលគ្រោះថ្នាក់នៅកន្លែងធ្វើការ
- ពិនិត្យនិងផ្តល់លទ្ធផលបញ្ជាក់ដើម្បីទទួលសិទ្ធ
- អាចពិនិត្យពេលឈឺ និងគ្រោះថ្នាក់ដោយមិនបាច់ណាត់ជួប

**Cambodian Speaking Staff** *(បុគ្គលិកនិយាយភាសាខ្មែរ)*

**យើងខ្ញុំមានសេចក្តីសោមនស្សរីករាយជម្រាបជូនលោកអ្នក**
**យើងខ្ញុំនឹងផ្លាស់ទៅទីតាំងថ្មី**
*នៅផ្លូវ16 Pine St Unit #5 Lowell, MA 01851*
*នាថ្ងៃទី 21 កក្កដា ឆ្នាំ 2014*



**CBC Staff And Dr. Joshi**
**Welcome You!**
**បុគ្គលិក និងវេជ្ជបណ្ឌិត យូស៊ី**
**សូមស្វាគមន៍លោកអ្នក !**

***ចាក់ថ្នាំ Flu មកដល់ហើយ**







**CALL TO MAKE AN APPOINTMENT TODAY**
**(សូមទូរស័ព្ទដើម្បីណាត់ជួប)**

**978-454-9703**

# 16 Pine Street Unit #5 Lowell, MA 01851